លី.ធាមតេង

# អក្សរសាស្ត្រខ្មែរ



# LA LITTERATURE KHMERE



បណ្ណាគារ សេង-ងួន-ហួត

# អក្សរសាស្ត្រខ្មែរ

# LA LITTERATURE KHMERE

លី-ធាមតេង

សមាជិកក្រុមអភិបាលសមាគមអ្នកនិពន្ធខ្មែរ

សាស្ត្រាចារ្យជំនួយខាងវិជ្ជាខ្មែរនៅមធ្យមសិក្សា

រៀបរៀង



បោះពុម្ពលើកទី២

បណ្ណាគារ



លេខ ៦៧ វិថីព្រះបាទបន្ទូរាជា ភ្នំពេញ



ព.ស. ២៥០៣ ★ គ.ស. ១៩៦០

សូមឧទ្ទិស

ស្នាដៃនេះជូនដល់វិញ្ញាណក្ខន្ធ

កវី និងអ្នកនិពន្ធ

ដែលឃ្លាតឆ្ងាយទៅកាន់បរលោកកាល



# ឧទ្ទិស

ខ្ញុំសូមឧទ្ទិសស្នាដៃដ៏ខិតខំ និងផ្ចិតផ្ចង់បំផុតរបស់ខ្ញុំនេះ ជូនចំពោះវិញ្ញាណក្ខន្ធនៃបិតាខ្ញុំ នាម លី-ម៉ុង ដែលលោកបានខំបង្ហាត់បិត្តខ្ញុំ ឲ្យចេះស្រឡាញ់អក្សរសាស្ត្រខ្មែរតាំងពីអាយុ ៧ ឆ្នាំ ។ គ្រានោះលោកបានសរសេរសាស្ត្រារឿងមួយយ៉ាងវែង ដោយគំនិតផ្ទាល់របស់លោក ឲ្យឈ្មោះថារឿង « សុវណ្ណគោ » សំរាប់បង្ហាត់ខ្ញុំឲ្យចេះអានជាបឋមខ្មែរបុរាណយ៉ាងត្រឹមត្រូវ និងធ្វើឲ្យខ្ញុំគ្រប់ភ្លក់រសជាតិអក្សរសាស្ត្រខ្មែរតាំងពីនោះរហូតមក ។

ល. ធ. ត.



# អារម្ភកថា

ជាយូរមកហើយដែលខ្ញុំជាប់ជំពាក់ចិត្ត ក្នុងបញ្ហាអក្សរសាស្ត្រខ្មែរ ៗ គោលបំណងនេះ ក៏ជាសំគៀងចិត្តខ្ញុំឲ្យប្រឹងប្រែងស្រាវជ្រាវរកទម្រង់លក្ខណ៍ការណ៍សំខាន់ ៗ របស់អក្សរសាស្ត្រជាតិយើង ដើម្បីប្រមូលក្រងគោលគំនិតឲ្យបានគ្រប់គ្រាន់ ៗ ក្នុងការស្វែងស្រាវជ្រាវ, ខ្ញុំតែងជួបនឹងឧបសគ្គជាច្រើន សឹងតែអស់សង្ឃឹមថាពុំអាចធ្វើទៅទៀតកើត ប៉ុន្តែចិត្តមានះនៅតែមានជានិច្ច ពុំរារែកពីខ្លួនខ្ញុំឡើយ ៗ ដូចលោក-អ្នកគ្នាធ្លាប់ជ្រាបស្រាប់ហើយ លក្ខណ៍គោលផ្សេង ៗ នៃអក្សរសាស្ត្រយើង សឹងតែស្ថិតនៅក្នុងសាចិកចាំង សឹងតែទាំងអស់ ៗ អក្សរចារឹកសុទ្ធតែនៅនឹងថ្មកប់នៅកណ្ដាលព្រៃ ឬ ទីណាដ៏ស្ងាត់ ហើយសុទ្ធតែជាភាសាបាលី – សំស្ក្រឹតថែមទៀត ៗ សាស្ត្រា ឬ ក្រាំងផ្សេង ៗ ស្ថិតនៅតាមវត្តអារាម ហើយប៉ោះប៉ាយមិនបានគត់មត់ល្អទេ ៗ រឿងព្រេង ឬ បទចម្រៀងសោតក៏នៅតែតាមមាត់អ្នកស្រុក ជាពិសេស

គឺអ្នកនៅឆ្ងាយពីទីក្រុង ៗ តែជាសំណាងល្អដែរ, ជាយូ
មកហើយ រាជការយើងមានក្រសួងធម្មការ បានបង្កើតជ
ក្រុមមួយហៅថា «ពុទ្ធសាសនបណ្ឌិត្យ» ដែលមានការ
ប្រមូលឯកសារគ្រប់សព្វ ខាងវប្បធម៌របស់ខ្មែរ តាំងពីបូរា
បូកណាមក គឺមាន៖ ក្រុមជំនុំទំនៀមទំលាប់, ក្រុមជំនុំប្រែ
ព្រះត្រៃបិដក, ក្រុមស្រាវជ្រាវក្បួនខ្នាតផ្សេងៗ , ក្រុមវក្យ
សាស្ត្រា, ក្រាំង គម្ពីរនិងសៀវភៅគ្រប់បែបគ្រប់យ៉ាង ដែល
យើងហៅថាបណ្ណាល័យ ៗ ដូចនេះ ក្រុមពុទ្ធសាសនបណ្ឌិត្យ
មិនមែនមានការៈតែត្រឹមស្រាវជ្រាវ ឬ ផ្សាយពុទ្ធសាសនា
មួយមុខនោះទេ គឺពិតជាវិជ្ជាស្ថានវប្បធម៌មួយយ៉ាងជាក់ប្រា-
កដរបស់ខ្មែរ ៗ អាស្រ័យលើឯកសារយ៉ាងចំណាន ៗ របស់
វិជ្ជាស្ថាននេះឯង ដែលជួយបំភ្លឺផ្លូវ, ដឹកនាំដំណើរស្រាវជ្រាវ
របស់ខ្ញុំឲ្យបានស្រួលច្រើន ៗ ព្រោះគម្ពីរក្បួនខ្នាត ឬ សៀវ-
ភៅរបស់អ្នកប្រាជ្ញ សរសេរពីការស្រាវជ្រាវបុរាណវត្ថុរបស់ខ្មែរ
សុទ្ធតែមានដម្កល់នៅក្នុងទីនោះ ៗ តែនោះបីជាខ្ញុំបានទទួល

ផលល្អពីបណ្ណាល័យនេះហើយគឺ ខ្ញុំត្រូវតែចំណាយពេលក្រៅពីអានសៀវភៅ, ពីការកត់ត្រាតាមសៀវភៅទាំងនោះ ជាច្រើនទៀត ព្រោះត្រូវការស៊ើបសួរ, ប្រមែប្រមូលបញ្ជាក់លើករណីដែលជួបប្រទះក្នុងសៀវភៅនោះថែមទៀតផង ។ ឯរឿងរ៉ាវសាស្ត្រា ឬ ក្រាំងណាដែលពុំមាននៅក្នុងបណ្ណាល័យនេះទេ ក៏ត្រូវស្វែងរកឲ្យឃើញដែរ ដោយធ្វើដំណើរទៅកាន់ទីឆ្ងាយ ៗ មានវត្តអារាម និង បុរាណប្រាសាទនានាដែលមានជាប់ទាក់ទងនឹងរឿងរ៉ាវនេះជាដើម ។

ដោយសារការស្វះស្វែងពិនិត្យអស់រយៈកាលជាង ៧ ឆ្នាំមកហើយ ទើបខ្ញុំប្រមូលឯកសារ និងគោលគំនិតខាងអក្សរសាស្ត្របានច្រើនបន្តិច ល្មមឲ្យពឹងផ្អែកខ្លួនឯងបានខ្លះ ៗ ប៉ុន្តែខ្ញុំពុំទាន់រកមធ្យោបាយណា នឹងផ្សាយការសន្សំរបស់ខ្ញុំនេះបាននៅឡើយ ៗ លុះមកដល់ គ.ស. ១៩៥៧ ទើបក្រសួងឃោសនាការ បានអនុញ្ញាតឲ្យសមាគមអ្នកនិពន្ធខ្មែរផ្សាយអំពីអក្សរសាស្ត្រតាមវិទ្យុជាតិ ដើម្បីណែនាំឲ្យបណ្ដាជនខ្មែរ

ជាគ្រឿងបំភ្លឺមួយជាជាន់គ្មានពន្លឺសោះដែរ » ។ ប្រសិនណាជាថ្ងៃក្រោយទៅ មានសិល្បករចំណានណា ជួយរចនាកូនប្រទីបខ្ញុំ ពោលគឺកិច្ចការនេះ ឲ្យកាន់តែភ្លឺរន្ទាលច្បាស់ចាំងថែងឡើងនោះ រឹងរឹតតែសមប្រាថ្នាជាក់ស្តែងឡើង សំរាប់ជាសាធារណប្រយោជន៍តទៅ ។

លុះយល់សព្វគ្រប់ដូចពណ៌នាមកខាងលើ ខ្ញុំក៏ដាច់ចិត្តរៀបចំសរសេរជាអត្ថបទខ្លី ១ ល្មមយកទៅថ្លែងផ្សាយតាមវិទ្យុជាតិ រៀងរាល់ថ្ងៃព្រហស្បតិ៍ ចាប់តាំងពីខែ កញ្ញា គ.ស.១៩៥៧ មក ។ កាលណាបានផ្សាយជាច្រើនលើកចំនួនជិតពីរឆ្នាំទៅហើយ មានមិត្តភក្តិខ្ញុំជាច្រើនយល់ថា៖ កិច្ចការរបស់ខ្ញុំនេះ មានប្រយោជន៍ដល់អ្នកសិក្សាណាស់ ។ គេក៏ពោលជាសំតឿនឲ្យខ្ញុំចងក្រងបោះពុម្ពជាសៀវភៅឡើង ព្រោះការស្តាប់តាមត្រចៀក ម្តងបន្តិច ១ មកនោះ ជាការភាក់កយពន់ពេក ។

កាលពីខែតុលា គ.ស. ១៩៥៨ ប្រទេសនានានៃជន

ស្គាល់ផ្ទៃមុខផ្កានេះផង ៗ គណៈកម្មការនៃសមាគមក៏បាន ប្រគល់ភារៈការផ្សាយនេះ ដែលជាបន្ទុកមួយយ៉ាងធ្ងន់មកលើខ្លួនខ្ញុំ ៗ ខ្ញុំទទួលភារៈដោយទើសទាល់ព្រោះក្នុងចិត្តបារម្ភជាខ្លាំងថា៖ ធ្វើម្តេចហ្ន៎! ឲ្យរឿងក៏អក្សរសាស្ត្របានលេចរូបរាងទៅបង្ហាញជនរួមជាតិឲ្យបានច្បាស់លាស់ បើខ្ញុំនៅតែនឹកគិតរាល់ទៅទៀត ៗ ហើយបើងាកមើលមកគ្នាឯង ក៏ឃើញថាមានចំណេះស្តួចស្តើងពេក ពុំសមល្មមហ៊ានពារទៅលើកិច្ចការដ៏ធំនេះសោះ ព្រោះក្រែងជួនជាប៉ះទៅលើការខុសត្រង់ខ្លះទៅ, មុខជាត្រូវពាក្យនិន្ទាពីអ្នកផងមិនខាន ៗ តែក្នុងគ្រាជាមួយគ្នានេះ មានគំនិតថ្មីមួយមករំលឹកស្មារតីខ្ញុំថា៖ ការយល់ដូចខាងលើនេះ ជាហេតុនាំឲ្យរេចរិលទៅវិញទេ ព្រោះថា៖ កិច្ចការដែលធ្វើទៅហើយ រមែងតែមានត្រូវត្រង់ជាមិនខាន គឺមានតែអ្នកមិនធ្វើសោះនោះទេ ដែលមិនចេះខុសសោះ ។ ហើយម្យ៉ាងទៀត ខ្ញុំយល់ថា "ក្នុងទីងងឹត សូម្បីតែទៀនប្រទីបតូចក៏ដោយ បើគ្មានចង្កៀងធំទេ ក៏គង់បានជា

ជាតិអាស៊ីនិងអាហ្វ្រិក បានប្រមូលគ្នាធ្វើសន្និសីទនៅទីក្រុងតាស្កេន (សហភាពសូវៀត) ស្តីពីអក្សរសាស្រ្តនិងវប្បធម៌ ។ ខ្ញុំក៏មានកិត្តិយស បានទទួលសេចក្តីទុកចិត្តពីអ្នកនិពន្ធនានា ដែលតម្រូវឲ្យខ្លួនខ្ញុំនិងមិត្តសំឡាញ់ខ្ញុំ, លោកម៉ា-ឡាយទេម, ធ្វើជាដំណាងប្រទេសកម្ពុជា ឲ្យទៅកាន់សន្និសីទនោះ ។ នាកាលនេះ លទ្ធផលក្នុងការស្រាវជ្រាវរបស់ខ្ញុំ ក៏បានទៅលាតត្រដាងបង្ហាញរូបភាពអក្សរសាស្រ្តនិងវប្បធម៌ជាតិ ដល់បណ្តាដំណាងប្រទេសនានា ។ ពេលនោះទៀត គេមានបង្កើតការពិព័ណ៌សៀវភៅរបស់ជនជាតិទាំងអស់ ដែលបានទៅរួមប្រជុំ ។ ខ្មែរយើងក៏បានបញ្ចេញសៀវភៅ ជាង ៥០ ក្បាលតាំងនឹងគេដែរ តែមានភ្ញៀវជាច្រើនចេះតែសួររកសៀវភៅដែលស្តីពីអក្សរសាស្រ្តខ្មែរ ហើយដែលកាលនោះយើងពុំទាន់មាននៅឡើយ ។ លុះត្រឡប់មកវិញ ខ្ញុំរឹតតែប្រាថ្នាធ្វើយ៉ាងណាឲ្យកើតបានជាសៀវភៅនេះនឹងគេឡើង ។

លុះមកដល់ គ.ស. ១៩៥៩ នេះ ក្រសួងសិក្សាធិការ

បានចាត់ឲ្យខ្ញុំទៅបង្រៀននៅអនុវិទ្យាល័យព្រះនរោត្តម, ខ្ញុំក៏បានឱកាសធ្វើវិសិដ្ឋការចំពោះមុខវិជ្ជានេះថែមទៀត ។

ហេតុមកដល់សព្វថ្ងៃនេះ កិច្ចការរបស់ខ្ញុំក៏បានលេចរូបរាងឡើងសំរាប់ជួយផ្តល់សេចក្តីត្រូវការ ឲ្យអ្នកសិក្សាអក្សរសាស្ត្រខ្មែរ ដែលសម័យបច្ចុប្បន្នកំពុងតែស្វះស្វែងតម្រូវតាមកម្មវិធីសិក្សាផង និងតម្រូវតាមឋានៈប្រទេសយើងដែលជារដ្ឋឯករាជ្យគ្រប់លក្ខណៈផង ។ ខ្លួនខ្ញុំក៏មានចិត្តរីករាយណាស់ ដោយបានបំពេញករណីយកិច្ចតាមបំណងដែលមានជាយូរមកហើយ ទុកដូចជាខ្ញុំបានសងបំណុលមួយដែលធ្លាប់ជំពាក់ក្នុងចិត្តជាច្រើនឆ្នាំមកហើយដែរ ។

ហេតុនេះ ខ្ញុំសូមអភ័យទោសពីសំណាក់អស់លោក-អ្នកប្រាជ្ញទាំងឡាយ ក្រែងលោមានការខុសឆ្គងត្រង់ណា សូមមេត្តាជួយកែតម្រង់ឲ្យបាន ព្រោះស្នាដៃនេះជាការល្បងរបស់ខ្ញុំក្នុងកិច្ចសិក្សា និង វែកញែកអំពីអក្សរសាស្ត្រខ្មែរ ។

ជាបញ្ចប់ ខ្ញុំសុំលំឱនកាយគោរពដល់វិញ្ញាណខន្ធអស់លោកកវី-អ្នកនិពន្ធ ពីព្រេងនាយ ដែលបានទុកស្នាដៃឲ្យយើងរហូតសព្វថ្ងៃនេះ ។

ភ្នំពេញ មីនា ១៩៥៩

លី-ធាមតេង

ដំរីជើងបួនគង់មានភ្លាត់
អ្នកប្រាជ្ញចេះស្ទាត់គង់មានភ្លេច



ជំពូកទីមួយ

# ដើមកំណើតភាសា និង អក្សរខ្មែរ

## ក– ដើមកំណើតភាសាខ្មែរ

បើយើងសង្កេតតាមសេចក្តីកត់ត្រាក្នុងប្រវត្តិសាស្ត្រខ្មែ
យើងឃើញថា នៅលើកោះមួយ ដែលបុរាណឲ្យនាមថា
កោះគោកធ្លក(១) មានចណ្តាជនរស់នៅជាអន្លង់ណាស់ម
ហើយ គឺតាំងពីសម័យមុនប្រវត្តិសាស្ត្រទៅទៀត ។ ឯមនុស្ស
ទាំងនេះ រស់នៅដោយពួក ១ ផ្សេង ១ ពីគ្នា ពុំចេះចំណុ
ចុះចូលគ្នា ឬ មានការប្រាស្រ័យគ្នាទៅវិញទៅមកនៅឡើយ
ទេ ។ បើនរណារស់នៅក្រុមត្រង់ណា ក៏ទាក់ទងប្រាស្រ័យ
គ្នាតែក្នុងបរិវេណជិតខាងខ្លួនប៉ុណ្ណោះ ឥតរវល់ចង់ជួបក

១– បានគេឈ្មោះ គោកធ្លក ព្រោះកោះនេះមានធ្លកមួយដើមដុះនៅកណ្តាល

ក់ជាមួយចំណោមអ្នកដទៃទៀយ ។ ឯកាសាដែលគេ
ប្រើប្រាស់ក្នុងកិច្ចរស់នៅអចិន្ត្រៃយ៍នោះ គឺមានរូបគោមយ៉ាក់
ាកដដោយឡែកៗពីគ្នាដែរ ពុំអាចស្ដាប់គ្នាបានដោយងាយ
នចំណោមមួយទៅចំណោមមួយទៀយ ។

លុះចំណេរតមក នៅគ្រាដែលចាប់ផ្ដើមមានប្រវត្តិ-
ាស្ត្រអ្នកស្រុកដែលរស់នៅលើកោះគោកធ្លក ក៏បានប្រមូល
បផ្តុំគ្នាជាប្រជាជាតិមួយ នៅក្រោមមេត្រួតត្រាតែមួយ ។
អ្នកត្រួតត្រានោះជាស្ត្រីកេទប្រកបដោយរូបឆោមនឹងប្រាជ្ញា
នវែដលអ្នកកត់ត្រា បានដាក់នាមប្លែកៗពីគ្នា ៗ ខ្លះថានាង
សក់ក្រអូប » ឬ នាង « សុវណ្ណកេសី » ដូចមានរឿង
ពង្សប្រចាំស្រុកនៅមណ្ឌលបូរីនិទានថា ៖ នាងនេះ បានចាញ់
ាកនាយឈ្មួញសំពៅបរទេស ដែលបញ្ឆោតឲ្យនាងចុះទៅ
កំសប្បាយក្នុងសំពៅ ហើយគេស្រាវយុថ្កាចេញសំពៅទៅ
ណ្ដាលសមុទ្រកុំឲ្យនាងចុះវិញបាន ។ល។ តាមរឿង
តានផ្សេងទៀតថា ៖ នាងនេះមាននាមជានាង « នាគី »

ដែលជាកូនតាគមកលេងទឹកសមុទ្រ ហើយត្រូវបានជួប
មួយព្រះថោង[១]ជារាជបុត្រ ព្រះបាទអាទិច្ចវង្ស គ្រងក
នៅឥន្ទបត្តបុរី[២] ដែលចេញមកក្រសាលតាមរលកប្រ
សមុទ្រ ហើយក៏បានរៀបអភិសេកជាមួយគ្នាទៅ ។

តាមឯកសាររបស់អ្នកកត់ត្រា ជាតិចិន[៣]បានកត់ឆា
ថា ព្រះនាង «លីវ-យី»[៤]ដែលនៅពេលនោះមានពួកអន្ត
ប្រទេស ជាតិព្រាហ្មណ៍មកពីប្រទេសឥណ្ឌា ប៉ែកខាងត្បូ
ចូលមកវាតទីក្នុងស្រុក ហើយមេនៃពួកនោះបានលើកព្រ
នាងនេះធ្វើជាអគ្គមហេសី នៅគ្រប់គ្រងលើផែនដីគោកធ្ល
រហូតមក ។ ព្រះទៅនេះឯងដែលសិលាចារឹកបានថ្វាយ
ព្រះនាមថា «ព្រះបាទកៅណ្ឌិន្យ» ហើយដែលអ្នកកត់ត្រ

---

១– ព្រះថោង ក្លាយពីពាក្យសៀម «ព្រះថង» ប្រែថាស្តេចមាស ព្រោ
នៅគ្រងរាជ្យលើប្រជ្រោយសុវណ្ណភូមិ ដែលគេហៅថា ដែនដីមាស ។ ២– តាម
ឯកសារប្រវត្តិសាស្ត្រខ្លះ ថានាមនេះជានាមប្រទេសខ្មែរបុរាណ ។ ៣–លោ
Pelliot បានប្រែជាភាសាបារាំងពីឯកសារលោកជីវ-តាក្វាន់ 周達
ឲ្យឈ្មោះសៀវភៅនោះថា: Le Founan ។ ៤– ពាក្យនេះក្លាយពីភាសាចិ
លីវ-យេ ( 柳葉 = Lieuo - Ye ) ប្រែថា ស្លឹកស្វល ។

ន បានថ្វាយនាមថា «ហ៊ុន-ទៀន»(១) ។ ព្រះករុណានេះ
ើយ ជាបឋមក្សត្ររបស់យើង ដែលបានរៀបចំកសាង
ណាចក្រនគរភ្នំ(២)ជាដំបូង ។

ដូចនេះ បើយើងសង្កេតតាមហេតុការណ៍ដូចពណ៌នា
មកហើយនេះ ឃើញថាបណ្ដាជនដែលរស់នៅលើកោះ
កឆ្នកទាំងប៉ុន្មាន មានភាសានិយាយប្រចាំជាតិរៀងអស់ទៅ
ើយ ។ កស្តាំង គឺការបេះប្រាស្រ័យគ្នា, រួបរួមគ្នាជា
ង្គមជាតិមួយ នៅក្នុងកិច្ចត្រួតត្រារបស់ព្រះនាងនាគីសោមា
លីវយេ ។

ភាសាទាំងនេះឯង ខ្លៅវែកញែកវែក ជាជាន់ ហេតុ
ព្វថ្ងៃនេះ គឺភាសាតូចតាចរបស់អ្នករស់នៅក្នុងព្រៃ នា
ណាខេត្តកម្ពុជាយើងនេះ ដូចជាជាតិព្នង, ជង, វេជ,

---

១– 混塡 = Houen-T'ien (P.Pelliot, Le Founan) ។

២– ពាក្យ ភ្នំ នេះ ដែលបារាំងសរសេរក្លាយទៅជា ហ្វូណាម (扶南 = Fou-nam) ហើយដែលបារាំងសរសេរក្លាយទៅទៀតជា Fou-nan ។

១. Kon-jin : កោន្ឌិញ្ញ → កៅណ្ឌិន្យ
កោន. ឌិន

សម្រៃ, គួយជាដើម ។ មានអ្នកប្រាជ្ញស្រាវជ្រាវខាងភាស
ជាច្រើនរូប បានកត់ត្រានិងធ្វើការសិក្សាបញ្ជាក់ពីភាសាខ្មែ
យើង ហើយដែលគេកប់បញ្ចូលភាសាទាំងអស់ខាងលើ ខែ
ទាំងភាសាអ្នកដទៃខាងខ្លះថានៅក្នុងចំណោមភាសាខ្មែរ ។

យើងរមែងឮអ្នកផងពោលដោយក្តីប្រឡំថា ភាសាខ្មែ
យើង មានដើមកំណើតមកពីភាសាសំស្ក្រឹតនិងភាសាបាលី
ព្រោះគេឃើញក្នុងភាសាយើងសព្វថ្ងៃមានលាយច្របល់ដោ
ពាក្យបាលីជាច្រើន ដូចពាក្យថា : ផល, កល, ហេតុ, គេ
គេហដ្ឋាន, . . . និងសំស្ក្រឹត ដូចពាក្យ : មិត្រ, ប្រព្រឹត្ត, ត្រ
ស្រី, . . . ។ ប៉ុន្តែយើងអាចដោះស្រាយវិញដោយងាយថា
ពាក្យទាំងឡាយដែលក្លាយចេញមកពីបាលី និងសំស្ក្រឹតនេ
មិនមែនកើតឡើង តាំងពីមុនសម័យជនជាតិឥណ្ឌាចូលស្រុ
ពេលដ៏មុនរជ្យព្រះបាទកៅណ្ឌិន្យនោះទេ ។ ព្រោះពាក្យទាំ
នេះសុទ្ធតែចូលមកជាមួយនឹងអារ្យធម៌ឥណ្ឌា ក្នុងពេលត្រឹ
សតវត្សទី ២ ក្រោយដែលព្រះបាទកៅណ្ឌិន្យ កសាងអាណា

ក្នុងគម្ពីរបុរេហើយ ៗ ម្យ៉ាងទៀត យើងអាចសួរទៅវិញ
៖ បើថាភាសាខ្មែរមានដើមកំណើតមកពីភាសាសំស្ក្រឹត
៍ បាលី ដូចនេះ តើបណ្ដាជនខ្មែរដំបូងសម័យគោកធ្លក
ូនគ្រាផ្សព្វណៀនាំភាសាទាំងពីរមកនោះ , ជនជាតិនេះបេះ
យាយឬទេ? បើបេះនិយាយតើនិយាយភាសាអ្វី? ត្រង់នេះ
ញុំយើងឲ្យច្បាស់ថា ភាសាខ្មែរមិនមែនមានដើមកំណើត
ពីភាសាបាលី និងសំស្ក្រឹតដែលជាមូលដ្ឋានលទ្ធិសាសនា
ន ៗ ដែលហូរចូលមកស្រុកយើងសម័យក្រោយនេះទេ ៗ
តិជាខ្មែរមានភាសាកំណើតរបស់ខ្លួនពីយូរអង្វែងមកហើយ
នភាសានោះមិនសូវសម្បូណ៌លួតលាស់ប៉ុន្មាន ៗ ពាក្យ
ចន៍នៅតិច, មិនទាន់មានសំនួនវោហារគ្រប់លក្ខណៈ ៗ

ដូចនេះ យើងត្រូវស្គាល់ថា ភាសាបាលីនិងសំស្ក្រឹត
ន់តែជាភាសាចំណូលថ្មី ដែលហូរតាមអារ្យធម៌ឥណ្ឌា
រហូតបញ្ចូល បន្ថែមក្នុងភាសាដើមរបស់យើងប៉ុណ្ណោះ ៗ

# ១– ដើមកំណើតអក្សរខ្មែរ

ឯអក្សរខ្មែរមិនមែនកើតឡើងស្មើនឹងភាសាទេ ព្រ
សម័យដែលមនុស្សស្ថិតនៅលើគោកធ្លក ជាដំបូងនេ
គ្រាន់តែបង្កើតបាននូវភាសាសំរាប់និយាយប្រាស្រ័យ
ប៉ុណ្ណោះ ចំណែកអក្សរសំរាប់ជាគ្រឿងចារិកសំគាល់មិនទ
ទាន់កើតនៅឡើយទេ ។ ដូចនេះ មនុស្សជំនាន់នោះមិនគ
ចេះសរសេរសំបុត្រស្នាម ផ្ញើទៅមកគ្នា ឬចេះកត់ត្រាអ្វី
ឡើយ ។ បើគេចង់កត់ចំណាំអ្វីមួយ គេមានតែគ្រឿងចង
កន្ទិចតិចប៉ុណ្ណោះ ។ មនុស្សសម័យនោះ ទំនងជាយកវ
ភេទផ្សេងៗ ជាគ្រឿងចំណាំ ដូចជាយកដុំស្ទូកឈើលា
ឬឈើផ្លូធ្វើជាគ្រឿងចំណាំខាងពេលវេលាជាដើម ។

លុះចំណេរតមក ដល់គ្រាដែលខ្មែរបានទទួលការឃ
ឥណ្ឌា ក៏បង្កើតដោយសន្និដ្ឋានជារូបរាងអក្សរ ដោយអ

ប្រហ ធ្វើសម័យនោះ ៖ ប្រមើលយកតាម ភាក្សាទស្សន៍ មួយ ចែ

…ភាគទក្ខិណបថ (១) ។ អក្សរឥណ្ឌៀមានច្រើនយ៉ាង
…ាស់ ប៉ុន្តែបែបអក្សរដែលមានអាយុចាស់ជាងគេគឺអក្សរ
…ព្រាហ្មី ។ អ្នកស្រុកឥណ្ឌៀបូរាណបានសន្មតថា ជាអក្សរ
…ដែលព្រះព្រហ្មបានបង្កើតមក ទុកសំរាប់ឲ្យមនុស្សប្រើប្រាស់
…តាមពិត គឺមនុស្សខ្លួនឯងទេ ដែលជាអ្នករកមធ្យោបាយ
…ង្កើតតួអក្សរ ដែលជាតំណាងសំគាល់សំរាប់សរសេរប្រាស្រ័យ
…ទៅវិញទៅមក ។ អក្សរព្រាហ្មីនេះ មានរូបរាងជាតួ
…បអន្លៗ ប្លែកៗពីគ្នា តែមានពិធីផ្សំស្រៈ, ព្យញ្ជនៈ, ចំនួន
…បអក្សរដែលខ្មែរយើងប្រើសព្វថ្ងៃនេះ ។ មានអក្សរច្រើន
…បទៀត ដែលកើតបន្តមកពីអក្សរព្រាហ្មី ហើយមានពិធី
…ប្រើប្រហាក់ប្រហែលគ្នា ខុសមួយតែត្រង់រូបភាពប៉ុណ្ណោះ ។
…រះបាទកៅណ្ឌិន្យ ដែលជាបឋមក្សត្រខ្មែរ ទ្រង់បានដឹកនាំ
…នត្រឹមតែទំនៀមទំលាប់, ប្រពៃណី, សាសនាឥណ្ឌៀ
…កសាបព្រោះ ឲ្យសាយភាយលើប្រទេសយើងប៉ុណ្ណោះទេ,

១-: ភូមិភាគផ្នែកខាងត្បូងលើខ្ពង់រាប Dekkan ។

ទ្រង់បាននាំតំរង់បែបអក្សរវេណ្ឌៀ(១) នៅផ្នែកទក្ខិណប
(ខាងត្បូង) មកផ្សាយនៅក្នុងប្រទេសយើងផង ។ អក្សរន
មានបែបភាពកង់មូល ។ ដែលយើងប្រឌិតយកលំនាំតាម
កើតបានជារូបរាងអក្សរជាតិយើងសព្វថ្ងៃនេះ ។ យើងគួរ
ទុកថា៖ ប្រជាជាតិខ្មែរយើងតាំងពីបូរាណមក ជាជាតិមួ
មានសិល្បៈនិងទេពកោសល្យជាប់និងខ្លួនជានិច្ច គឺថា បើ
អ្វីមួយ លុះណាតែខ្លួនបានរេះរេនា ទើបសុខចិត្តសន្និដ្ឋានថាបា
ការ ។ ដូចជាការប្រើអក្សរវេណ្ឌៀបែកខាងត្បូងនេះជាដើ
បុព្វបុរសយើង មិនមែនប្រើតាមរបៀបវេណ្ឌៀសុទ្ធ ៗ
លោកបានប្រឹងរេនាកែច្នៃបែបអក្សរនេះបន្តិចម្តង ៗ គ្រា
កើតបានជាបែបពិសេសដោយឡែក គឺធ្វើឲ្យមានលក្ខណ
ជាអក្សររបស់ជាតិខ្លួនពិត ៗ ។

មានអ្នកប្រាជ្ញស្រាវជ្រាវគួរអក្សរជាច្រើនរូប បានផ្ស

១– មានអ្នកស្រាវជ្រាវខ្លះថា អក្សរនោះឈ្មោះអក្សរគ្រន្ថៈ តែយើងរកពុំទា
ឃាត ប្រទះឃើញរូបរាងអក្សរនេះនៅឡើយ ។

អក្សរសិលាចារឹកខ្មែរបុរាណ  និងអក្សរឥណ្ឌៀប៉ែកខាងត្បូង
ក៏ឃើញថា  មានទ្រង់ទ្រាយដូចគ្នាមែន  ដូចជាសិលាចារឹក
ខ្មែរនៅវ៉ូកាញ់ (ញ៉ាត្រាំង-យៀកណាម) និងសិលាចារឹកនៅ
ហាន់ជ័យ (កំពង់ចាម) ជាដើម ។ ប៉ុន្តែ តួអក្សរទាំងនោះ
មិនមែនដូចគ្នានឹងអក្សរយើងសព្វថ្ងៃទេ  ព្រោះបុព្វបុរសយើង
ចេះតែកែច្នៃកែប្រែ  ដូចបានពោលរួចមកហើយខាងលើ ។
គឺជាអក្សរ  ដែលខ្មែររៀបចំឲ្យកាន់តែស្រួលបន្តិចម្ដង ៗ នេះ
ហើយ  ដែលប្រទេសជិតខាងខ្លះ  បាននាំយកបែបនេះទៅ
កាឡៃធ្វើជាអក្សរគេតទៅទៀតផង ។

ដោយមានអំបូរចេញមកពីប្រភពជាមួយគ្នា ទាំងភាសា,
ទាំងអក្សរដូចនេះហើយ  ទើបអ្នកប្រាជ្ញទាំងឡាយឲ្យឈ្មោះ
ភាសាអ្នកជិតខាងខ្លះថាមានអំបូរក្នុងវង្សភាសា «មន-ខ្មែរ»
ដ្បិតសម័យបុរាណ  មានតែជាតិទាំងពីរនេះទេ  ដែលបាន
លូតលាស់ខាងវប្បធម៌, អារ្យធម៌ជាងគេក្នុងចំណោមប្រទេស
នានានៅជ្រោយសុវណ្ណភូមិនេះ ។

ដើម្បីឲ្យបានច្បាស់ប្រាកដ យើងសូមជូនគំរូអក្សរ តាមសម័យខ្លះៗ ដែលយើងឃើញៈ

គំរូទី-១

គំរូទី ១ នេះ ជាអក្សរសម័យដំបូង បន្ទាប់ពីការចំឡងចេញពីអក្សរព្រាហ្មី ។

គំរូទី-២

អក្សរគំរូទី ២ នេះ គេឃើញមានប្រើនៅក្នុងសតវត្សទី ៦ តាសិលាចារឹកនៅ ភ្នំហាន់ជ័យ (កំពង់ចាម)។

គំរូទី - ៣

ក ខ គ ឃ ង ច ឆ ជ ឈ ញ
ដ ឋ ឌ ឍ ណ ត ថ ទ ធ ន
ប ផ ព ភ ម យ រ ល វ ឝ
ឞ ស ហ ឡ អ

អក្សរគំរូទី ៣ គេឃើញមានប្រើនៅក្នុងសិលាចារឹកទាំងឡាយ កាលពីសតវត្ស ១១ ដល់ទី ១២ ។

គំរូទី - ៤

ក ខ គ ឃ ង ច ឆ ជ ឈ ញ
ណ ត ថ ទ ធ ន
ប ផ ព ភ ម យ រ ល វ
ស ហ ឡ អ

គំរូទី ៤ ជាអក្សរដែលយើងប្រទះឃើញនៅលើផ្ទាំងសិលាចារឹក ប្រាសាទអង្គរវត្ត កសាងពីសតវត្សរ៍ទី ១៤ ដល់ទី ១៨ ។

សរុបសេចក្ដីទៅ យើងអាចចាំបានថា៖ ខ្មែរមានភាសា
ប្រចាំជាតិជាយូរអង្វែងកាលណាស់មកហើយ គឺតាំងពីមុន
សម័យប្រវត្តិសាស្ត្រម៉្លេះ ។ ឯអក្សរវិញ ទើបតែនឹងចាប់មាន
ឡើងត្រឹមរជ្ជកាលព្រះបាទកៅណ្ឌិន្យ ជាមួយគ្នានឹងអារ្យធម៌
ឥណ្ឌា ដែលចូលមកស្រោបពាសពេញប្រទេសយើង នោ
សតវត្សទី ២ នៃគ្រឹស្តសករាជ ។ អានុភាពខ្លាំង នៃអារ្យធម៌
នេះ គឺចាប់តាំងពីសតវត្សទី ២ នោះមក ប៉ុន្តែអក្សរដើម ចេះតែ
មានអក្សរវិវត្តជាច្រើនរូប ព្យាយាមកែប្រែឲ្យកាន់តែស្រួលរៀន,
ស្រួលចាំឡើងទៀត ។ ឯភាសាសោត ក៏មានការប្រែក្លាយ
បញ្ចូលជាច្រើនក្នុងភាសាដើមយើងដែរ ព្រោះមានពាក្យ
សំស្ក្រឹតជាដំបូង ដែលចូលមកជាមួយលទ្ធិសាសនាព្រាហ្មណ៍
និងពុទ្ធសាសនាមហាយាន កាលមុនសម័យអង្គរ និងពាក់
កណ្ដាលខាងដើម នៃសម័យអង្គរ ។ លុះចាប់តាំងពីពាក់
កណ្ដាលខាងចុងសម័យអង្គរ រហូតមកដល់សព្វថ្ងៃ យើងបាន
ទទួលភាសាបាលីមួយ បញ្ចូលមកក្នុងភាសាខ្មែរទៀត ។ ភាសា

ាន់ក្រោយនេះហូរចូលដោយសារលទ្ធិពុទ្ធសាសនាហីនយាន ដែលជាបែបសាសនាដ៏ប្រសើរមួយដែលយើងនាំគ្នាគោរព ដល់បច្ចុប្បន្នកាលនេះ ។





## ជំពូកទីពីរ



# អានុភាពអក្សរសាស្ត្រ

ហេតុអ្វីហ្ន៎! គឺអក្សរសាស្ត្រយើងនៅមានរឿងកំរច្រើ
ម្ល៉េះ? ត្រង់នេះយើងសូមបញ្ជាក់ថា ៖ តាំងពីយូរយារមក
ហើយ ពាក្យថាអក្សរសាស្ត្រ ៗ នេះ បីដូចជាខ្យល់លេ
អាកាសបក់បណ្តែតមករើយ ៗ ប៉ុណ្ណោះ មិនសូវមានអ្នកណា
ឲ្យជាប់រូបអក្សរសាស្ត្រនេះមកពិនិត្យសង្កេតឲ្យបានហ្មត់ចត់
ជាក់ប្រាកដ ឲ្យឃើញជាគិនភាគថា យ៉ាងនេះ ឬ យ៉ាងនោ
ឡើយ ។ មានបុព្វបុរសយើងពីព្រេងនាយច្រើនរូបណាស់
ដែលបានខំពិនិត្យសង្កេតអំពីរឿងនេះ តែជនជាតិយើងហា
ដូចជាភ្លេចភ្លាំងទៅវិញ នៅគ្រាដែលវប្បធម៌បស្ចិមប្រទេស

...រួលមកគ្រប់ដណ្តប់ ៗ ទោះជាយ៉ាងនេះក៏ដោយ យើងតែង
...ប្រទះឃើញវីរជនច្រើនរូបណាស់ដែរ ដែលប្រឹងនឹងទៀល
...ជាមួយបញ្ហាអក្សរសាស្ត្រ តែយើងសូមអភ័យទោសដោយ
...នបានស្រង់នាមមករៀបរាប់ក្នុងពេលនេះ ៗ

អក្សរសាស្ត្រយើងពីព្រេងនាយបានបោះឫសយ៉ាងស៊ប់
...ជួនណាស់នៅក្នុងសន្តានចិត្តនៃប្រជាជនជាតិយើង ដោយ
...កនផ្ចិតជាប់នៅក្នុងសន្តានចិត្តបណ្តាជនខ្មែរ តាមបែបផ្សេង ៗ
...ញដូចតទៅ ៖ អក្សរសាស្ត្រផ្តិតក្នុងលទ្ធិសាសនា, រឿង
...ប្រលោមលោក, រឿងព្រេង និង កំណាព្យកាព្យឃ្លោង និង
...ចម្រៀងផ្សេង ៗ ឥឡូវនេះយើងសូមលើកយកមួយវគ្គ ៗ មក
...និត្យសង្កេតនិងធ្វើអត្ថាធិប្បាយឲ្យអស់សង្ស័យដូចតទៅ ៖

## ក_ អក្សរសាស្ត្រលទ្ធិសាសនា

ដូចម្តេចបានជាយើងពោលថាអក្សរសាស្ត្រស្ថិតនៅក្នុង
...លទ្ធិសាសនា ? ចំពោះសំនួរនេះ យើងមិនបាច់ឆ្ងល់ទេ

ព្រោះយើងឃើញស្រាប់ហើយ ៗ ព្រះធម៌ទាំងឡាយដែល
ជាគ្រឿងបំណែលទុករបស់យើងរាល់គ្នានេះ តើមានអ្វីជាគោល
ចារឹក ? គឺមានគម្ពីរផ្សេង ៗ មានព្រះត្រៃបិដកជាមូលដ្ឋាន ៗ
បំណែកទៅក្នុងគម្ពីរនោះទៀត ក៏យើងឃើញសុទ្ធតែចារជា
អក្សរយ៉ាងច្បាស់ក្រឡៅជាវគ្គជាឃ្លា តាមគោលសេចក្ដីរៀង
ដកបទៅ ៗ ទោះបីជាអក្សរទាំងនោះជាភាសាបាលីក៏ដោយ
ក៏ខ្មែរយើង សរសេរច្បាស់ជាតួអក្សរខ្មែរ យ៉ាងជាក់ប្រាកដ
ដែរ ៗ ដូចនេះ បើយើងអានភាសាបាលីនោះបាន ក៏ឈ្មោះថា
យើងជាអ្នកគ្រប់សជាតិអក្សរសាស្ត្រដែរ ៗ យើងសង្កេត
ទៅទៀតថា មានគម្ពីរជាច្រើនទៀត ដែលមានបរិយាយជា
ភាសាខ្មែរសុទ្ធ ហើយគម្ពីរទាំងនោះមានលក្ខណៈជាក់លាក់
ជាភាសាខ្មែរ ដែលតុបតែងឡើងជាច្រើនសតវត្សមកហើយ
ផង ៗ គម្ពីរប្រភេទនេះ ប្រកដោយពាក្យពេចន៍ល្អស្រស
ល្មមជាស្នាដៃខ្មែររៀបរៀងមែន ៗ គ្រាន់តែអធិប្បាយជារឿង
ក៏ផ្អែកទៅតាមទ្រឹស្ដីនៃព្រះពុទ្ធសាសនា គឺច្រើនតែដកស្រង់

ើនដែលមានស្រាប់នៅក្នុងគម្ពីរជាភាសាបាលី មកបក
ាយជាភាសាខ្មែរ និងរៀបដំណើរចំណងពាក្យឲ្យសមជា
ក្យខ្មែរគ្រប់លក្ខណៈប៉ុណ្ណោះ ។ គម្ពីរសំរាយដែលយើង
ាយមកនេះហើយ ដែលខ្មែរយើងនិយមស្តាប់ និយមអាន
ងអ្វីទាំងអស់ ព្រោះសទ្ធាចិត្តគេពឹងផ្អែកទាំងស្រុងទៅលើ
ទ្ធិពុទ្ធសាសនារួចស្រេចទៅហើយ ។ ហើយមួយទៀត
ាយពិបាកអានគម្ពីរជាភាសាបាលីផង ។ ទើបនាំគ្នានិយម
ូបយកគម្ពីរភាសាខ្មែរនេះ មកហាត់ហ្វឹកហ្វឺនសិក្សារៀង ។
ន ។ ចំពោះរឿងនេះ នាំឲ្យយើងនឹកដល់សម័យដែល
ទេសយើងត្រូវធ្លាក់បរាជ័យនៅក្រោមឥទ្ធិប្រទេសដទៃ ។
លនោះខ្មែរភាគច្រើន អស់សង្ឃឹមថានឹងបានរួចពាកពីការ
ង្វឹកបង្ហាត់របស់បច្ចាមិត្រវិញហើយ ក៏នាំគ្នាផ្ញើសទ្ធាសទ្ធិ-
ពទៅលើលទ្ធិសាសនាតែសព្វៗ ខ្លួន ៗ ពេល ៗ ថ្ងៃគេតែង
ង្ហាយគេសន្តិភាព ដោយពឹងលើធម៌ព្រះពុទ្ធមានលោះ
ន ពោះពីផាយល់ថា៖ មិនដឹងជាដល់ថ្ងៃណានឹងបាន

សម្រេចក៏ដោយ ៗ សេចក្ដីផុតសង្ឃឹមនេះ យើងឃើញ
ពោះជាមុខវិជ្ជាផ្សេង ៗ ក៏ត្រូវផុតជាប់ផុតជំរៀ ឬ សូន្យ
ឈឹងក៏សឹងមាន ៗ ឯអក្សរសាស្ត្រយើង ក៏ពួនខ្លួនស្ងាត់ឈឹ
សូន្យគណ្ដាលបកជ័យរបស់ជាតិនោះទៅដែរ តែការស្ម
អានុភាពរបស់អក្សរនោះ មិនទាន់ដាច់សូន្យផុតរូបទេ ៗ
កាលណាគេពិនិត្យសង្កេតទៅ ឃើញមួយរំពេចថា អក្ស
សាស្ត្រកំពុងតាក់ស្រេះសរសៃជាប់ នៅក្នុងលទ្ធិពុទ្ធសាស
ដែលបណ្ដាជនយើងកំពុងពឹងផ្អែក ឬ កំពុងប្រសិទ្ធិសុំសេច
សុខសាន្តគ្រប់ពេល ៗ អានុភាពព្រះធម៌នេះឯង មិនបេះស្ងួ
ស្ងាត់ទេ តែងតែបានឆ្លុះទៅជានិច្ច បន្តកូនចៅផៅសន្ត
ហេតុទៅដល់អនាគតវែងឆ្ងាយ ៗ ឯអក្សរសាស្ត្រយើ
ដែលកប់នៅក្នុងនោះក៏ចេះតែបានបន្តបកម្មភាពជាហូរហែ
ជាមួយគេដែរ ៗ ការដេញដោលខាងលើនេះហើយដែល
កស្តុតាង បញ្ជាក់ចំពោះពាក្យថាអក្សរសាស្ត្រផ្ដិតជាប់
ក្នុងលទ្ធិពុទ្ធសាសនា ៗ បានសេចក្ដីថា សូម្បីតែអ្នកណ

បានរៀនធម៌ឬសូត្រធម៌មួយមាត់ ក៏ទុកដូចជាបានក្រេបរសជាតិអក្សរសាស្ត្រមួយដំណក់ដែរ ហើយរសជាតិនេះមានសភាពគ្រប់គ្រាន់ណាស់ផង ។ ព្រះសង្ឃជាធម្មថិកទាំងឡាយ បានទេសនាណែនាំពុទ្ធបរិស័ទឲ្យជក់ចិត្តតាមពក់ទរបស់ព្រះពុទ្ធ គឺបានប្រើផ្សាយនូវស្នាដៃដែលជាគម្ពីរសេចក្តីសំរាយនេះដែរ ។ ចំណែកអ្នកស្រុកអ្នកភូមិក៏ត្រងត្រាប់ស្តាប់យកនូវសេចក្តីទាំងនេះ គ្មានហ៊ានប្រហែសឡើយ ។ ត្រង់នេះឯងក៏បង្ហាញយើងឲ្យឃើញថាអក្សរសាស្ត្រ ចេះតែមានមធ្យោបាយហូរចូលទៅកាន់សន្តានចិត្តរបស់ប្រជាពលរដ្ឋទាំងមូល ។

ក្រៅពីនេះ ព្រះពុទ្ធសាសនាជាទីប្រជុំអក្សរសាស្ត្រយើងមួយផ្នែកយ៉ាងធំទៀត គឺត្រង់ការសិក្សារបស់កុមារខ្មែរពីសម័យមុន ។ យើងឃើញហើយថា កាលពីពេលដែលយើងត្រូវស្ថិតនៅក្នុងបរជ័យយ៉ាងស្ងប់ស្ងាត់ សាលារៀនទាំងឡាយមិនទាន់កើតមាននៅឡើយ ។ ដូច្នេះការសិក្សាខាង

អក្សរសាស្ត្រខ្មែរត្រូវផ្សាយចេញពីសំណាក់ព្រះសង្ឃ នៅគ្រប់វត្តគ្រប់អារាមទាំងអស់ ។ កូនអ្នកស្រុកអ្នកភូមិ កាលណាមានអាយុល្មមរៀនសូត្រហើយ ឪពុក-ម្តាយ បាននាំយកទៅផ្ញើឲ្យសិក្សានៅឯវត្ត ដែលមានព្រះសង្ឃជាអ្ន បង្ហាត់បង្រៀនប្រកបដោយមេត្តាធម៌យ៉ាងក្រៃលែង ។

ហេតុការណ៍ដែលបង្ហាញមកខាងលើនេះ នាំឲ្យយើ យល់ច្បាស់លាស់ អំពីការជ្រកបំពួនអាត្មារបស់អក្សរសាស្ត្រ ជាតិយើង នៅក្នុងលទ្ធិពុទ្ធសាសនាដែលជាពិធីផ្សាយមួយ យ៉ាងល្អបំផុត ។ ដូច្នេះហើយបានជាសម័យមុននោះ តែងនិយាយថា អក្សរសាស្ត្រខ្មែរនៅជ្រកតាមវត្តអារាម ។

## ១_ អក្សរសាស្ត្ររឿងព្រេង

ហេតុម្តេចបានជាយើងពោលដូច្នេះ? បើរឿងព្រេងសុ តែជារឿងនិទានដោយមាត់មនុស្សបន្ត ៗ គ្នាទេតើ? ពិតមែ ហើយរឿងព្រេងជារឿងនិយាយត ៗ គ្នាមែន តែសំដី, ពាក្

ពេចន៍, រឿងកំរ, សំនួនពោលោរ, ល្បិចកល ក្នុងរឿងទាំងនោះសុទ្ធតែមានលក្ខណៈជាអក្សរសាស្ត្រជាក់ប្រាកដ ៗ ហើយអក្សរសាស្ត្រប្រភេទនេះ ផ្សាយខ្ចូទៅបានរហ័សក្រៃលែង ព្រោះគេផ្សាយទៅដោយពិធីស្ដាប់មិនមែនដោយពិធីអានទេ ៗ បើយើងអានសៀវភៅរឿងកំរអ្វីមួយ គឺយើងដឹងបានត្រឹមតែរូបយើងមួយប៉ុណ្ណោះ ចំណែកអ្នកដែលមិនបានអានជាមួយយើងទេ មិនអាចដឹងរឿងកំរទាំងនោះដូចយើងឡើយ លុះត្រាតែប្រឹងអានខ្លួនឯងម្ដងទៀតទើបបានដឹង ៗ ឯរឿងព្រេងដែលនិយាយដោយមាត់មនុស្សវិញ តែមានជនម្នាក់នៅអង្គុយនិយាយហើយ ច្បាស់ជាមានជនអ្នកស្ដាប់មិនតិចទេ ហើយអ្នកស្ដាប់ទាំងនោះ អាចនិយាយបន្តទៅអ្នកដទៃ ១ ទៅទៀតជាច្រើនគ្នា ៗ មួយទៀតរឿងព្រេងទាំងនោះ សុទ្ធតែជារឿងសាមញ្ញងាយស្ដាប់ងាយយល់ ប្រកបដោយភ្នកកំប្លែងគួរជាគ្រឿងកែកំសាន្ត សំរួលអារម្មណ៍អស់ប្រជាពលរដ្ឋទៅ ៗ ពេលគេធ្វើការហត់នឿយ មាន

ការធ្វើស្រែចម្ការច្បារដំណាំជាដើម គ្មានអ្វីមកធ្វើឲ្យគេបំភ្លេ
នូវការនឿយហត់ទាំងនេះបានទេ មានតែរឿងព្រេងប៉ុណ្ណោះ
ដែលអាចប្រលោមចិត្តគេឲ្យសោយ ភ្លេចការហត់នឿយលំបាក
លំបាកខ្លះ ។ ពេលគេជួបជុំក្រុមញាតិ ឬ មានការប្រជុំ
មួយពេលអ្នកស្រុកដែលនៅភូមិជិត ។ គ្នា គេច្រើនតែនាំ
និទានរឿងព្រេងជាគ្រឿងកែកំសាន្ត ហើយទីងបញ្ចោតពេល
វេលា ឲ្យហោះហើរទៅ ដោយឥតសូវស្តាប់ក្នុងចិត្ត ។ រឿ
ព្រេងទាំងនេះ មានឯកភាពល្អណាស់ គឺភូមិណាក៏និទានដូ
ជាភូមិណាដែរ ទោះបីជានៅឆ្ងាយពីគ្នាយ៉ាងណាក៏ដោយ ។
បើយើងសង្កេតទៅ ដំបូងឡើងរឿងព្រេង មិនមែនប្រទាំ
កើតដោយមាត់មនុស្សទេ គឺពិតជាមានចារឹកជាក្រាំងឬជា
សាស្ត្រា ប៉ុន្តែក្រាំងឬសាស្ត្រាទាំងនោះអន្តរាយទៅតាមកាល
វេលាដែលកន្លងមកជាយូរលង់ ហើយម្យ៉ាងទៀតដោយរឿ
ទាំងនេះបានចាំស្ទាត់ក្នុងមាត់ជនខ្លះទៅ ទៅហើយផង ទើ
ក្រាំងឬសាស្ត្រា ទាំងនេះមិនមែនជាការចាំបាច់របស់ជនសម័

នោះឡើយ ។ ឯការចាំតៗ គ្នា បាត់បង់គោលដើមដូច្នេះ
គួរណាស់តែខ្ចាត់ខ្ចាយប៉ាត់ប៉ាយអស់ហើយ តែនេះមិនដូច
នោះទេ បែរជារឹតតែលាតសន្ធឹងការនុកាតលើសដើមទៅទៀត
ដូចជារឿងធនញ្ជ័យ, រឿងកាឡៅ, រឿងមាយាស្រី, រឿង
ចៅចាក់ស្មុគ, រឿងកាក្អាក់កាខ្វិន និង រឿងពស់កេងកង
ជាដើម ។ យើងមិននិយាយទេពីគុណតម្លៃរបស់រឿងទាំងនេះ
យើងគ្រាន់តែលើកមកបង្ហាញពីការនុកាតអក្សរសាស្ត្រ ដែល
ផ្តិតជាប់ក្នុងរឿងប៉ុណ្ណោះ ។ ព្រោះតែការនុកាតនេះ ផ្សាយ
មុតជាប់ទៅក្នុងសន្តានចិត្តរបស់ជនជាតិយើង ជាជាងគេទាំង
អស់ ។ សូម្បីតែជនណាមួយ ប្រុសក្តី ស្រីក្តី អ្នកចេះដឹងក្តី
អ្នកល្ងង់ខ្លៅក្តី សុទ្ធតែបានក្រេបរសជាតិរឿងទាំងអម្បាលនេះ
គ្រប់ៗគ្នា បើមិនច្រើនក៏តិចតួចដែរ ។ នៅគ្រាបច្ចុប្បន្ននេះ
មានអស់លោកអ្នកប្រាជ្ញខាងអក្សរសាស្ត្រជាច្រើនរូប ប្រឹង
ស្រាវជ្រាវប្រមូលឯកសារផ្សេង ៗ ដែលស្តីពីរឿងព្រេងទាំង-
នេះមកបង្កើតឲ្យកើតបានជាសៀវភៅ ដើម្បីទុកតពេល

វេលាទៅមុខឲ្យបានយូរអង្វែង សំរាប់បំពេញបំណងនៃប្រជា

ពលរដ្ឋយើងទៅគ្រាអនាគតកាល ។

## គ_ អក្សរសាស្ត្ររឿងប្រលោមលោក

ដូចម្តេចហៅថាអក្សរសាស្ត្រ ជាប់ទងប្រលោមលោក

ប្រលោមលោក ឬ រឿងល្ខោន ជាវណ្ណកម្មមួយយ៉ាង

ល្បីល្បាញរបស់បុព្វបុរសខ្មែរ សម័យអង្គរ និង សម័យក្តុង

អ្នកប្រាជ្ញបណ្ឌិតទាំងឡាយ បានយកចិត្តទុកដាក់ចំពោះ

កិច្ចការប្រកបនេះយ៉ាងហ្មត់ចត់ ទោះបីជាប្រទេសជាតិមាន

ចលាចល ឬ មួយជារហូតដល់ធ្លាក់ខ្លួនបរាជ័យទាំងស្រុង

ក៏ដោយ, ព្រឹទ្ធាចារ្យយើងនៅតែមិនព្រមលះបង់ចោលគត

ខាងអក្សរសាស្ត្រនេះឡើយ ។ មួយទៀតយើងក៏អាចជឿ

បានដែរថា៖ ចំណេះវិជ្ជា ឬ គោលគំនិតខាងអក្សរសាស្ត្រជា

ទ្រព្យផ្ទាល់ខ្លួនជានិច្ច ទោះបីជាជួបនឹងសត្រូវយ៉ាងយ៉ាងណា

ក្តី ទ្រព្យធននេះមិនមានអន្តរាយ ឬ សូន្យរូបបាត់បង់ទៅណា

ហើយ គ្រាន់តែត្រូវសម្ងំមួយលើកមួយគ្រាឲ្យផុតពីកលយុគប៉ុណ្ណោះ ៗ ពេលដែលសម្ងំនេះមិនមែនជាពេលសោយសុខទេ តែជាពេលចំរើនផុះផាលទៅវិញ. ដ្បិតពេលសម្ងំ ជាពេលបណ្តុះបណ្តាលចិត្តគំនិត សម្រិតសម្រាំង ប្រាជ្ញាស្មារតី បង្កើតឧត្តមគតិខាងអក្សរសាស្ត្រ ឲ្យកាន់តែបានទូលំទូលាយថែមទៀត ៗ លុះដល់ពេលផុតកលយុគវិកវរទៅ ព្រឹទ្ធាចារ្យយើងកាន់តែបានកើតគំនិតប្រាជ្ញា បេះដូងជាអក្សរសាស្ត្រឲ្យរីករឹតតែបានចាំចាំ នឹងមានស្នេហណ្ណកយ កាន់តែច្បាស់ឡើងៗ ជាលំដាប់ ៗ ម្យ៉ាងទៀត ដោយជំនាន់នោះមានការឧបត្ថម្ភ និងការនិយមវណ្ណគតិនេះគ្រប់តែមជ្ឈដ្ឋានផង គឺប្រជារាស្ត្រទាំងប្រុស - ស្រីសុទ្ធតែនិយមគ្រងគ្រាប់ដូចៗគ្នា, នាម៉ឺនសព្វមុខមន្ត្រីក៏តែងយកចិត្តទុកដាក់នឹងទុកជាគោលសិក្សាខាងអក្សរសាស្ត្រផង ៗ ព្រះមហាក្សត្រទាំងឡាយទ្រង់តែងសព្វព្រះរាជហឫទ័យនឹងវណ្ណកម្មនេះណាស់ ហេតុនេះហើយបានជាគេតែងប្រទះឃើញក្នុងប្រវត្តិសាស្ត្រ ជាហូរ

ថែមថា ព្រះអង្គទ្រង់បានទទួលក្តីខាងផ្នែកនេះ មិនដែលឈប់ខាន ព្រោះក្នុងកព្យណាក៏ដោយ យើងតែងប្រទះឃើញមានកវីបណ្ឌិត ខ្លះ ក៏ជាច្រើនទៅជិតខាងព្រះអង្គជាធម្មតា ។ ពេលដែលទ្រង់យាងទៅណាមកណា ឬ យាងក្រសាលទីណាមួយ កវីបណ្ឌិតតែងរែកតាមដង្ហែផ្តល់ព្រះកជាជានិច្ច ។ ដូច្នេះឯង ទើបយើងនៅសល់កេរ្តិ៍ដំណែលជាស្នាដៃកវីបុរាណជាច្រើន ដែលមានគារម្មកជាប្រាប់យើងថា៖ កាលគ្រាដែលលោករៀបរៀងរឿងនេះឡើងនៅក្នុងព្រះកដូបត្តូ នៃព្រះមហាក្សត្រ ។ សរុបសេចក្តីដែលយើងអធិប្បាយខាងលើនេះ បញ្ជាក់ឲ្យយើងឃើញប្រភពនៃការបង្កើតវណ្ណកម្មសម័យនោះ ។

បន្ទាប់ទៅទៀតយើងស្រាវជ្រាវពីអានុភាពរបស់វណ្ណកម្មនេះម្តង ។ ប្រជាជាតិខ្មែរយើងមានមតិកមួយយ៉ាងសំខាន់ខាងផ្នែកអក្សរសាស្ត្រ គឺសាស្ត្រារឿងតាំងឡាយ, បើយើងហៅតាមភាសាធម្មតាគឺជារឿងប្រលោមលោក, ដែលសុទ្ធសឹងតុប

តែងឡើងដោយសារស្នាដៃកវីខ្មែរយើងពីព្រេងនាយ ៗ ហេតុដែលនាំឲ្យមានភាព រឿងក្នុងសាស្ត្រាទាំងនេះបានបាចសាចចូលជោគជាំក្នុងសន្តានចិត្តប្រជាពលរដ្ឋយើង គ្មានបន្លោះជនណាមួយឡើយនោះ ព្រោះរឿងទាំងនេះ សុទ្ធសឹងជារឿងបំពេញចិត្ត, បំពេញអារម្មណ៍របស់ជនទូទៅ សូម្បីតែជននោះមិនចេះអក្សរមួយតួសោះ ក៏ចេះចូលចិត្តជាប់សតិក្នុងរឿងទាំងនោះដែរ ។ ឯលំនាំគំនិតក្នុងរឿងនោះសោតទៀត អ្នកនិពន្ធច្រើនទាញយកគោលការណ៍ នៃទ្រឹស្តីលទ្ធិសាសនាមកលាតត្រដាងផង ដែលជាគំនិតមួយដែលបណ្ដាជនខ្មែរនិយមគោរពកប់អានមកហើយស្រាប់ ។

ត្រង់នេះនាំឲ្យយើងធ្លុះមើលឃើញថា កវីបុរាណទាំងនេះ សុទ្ធតែជាអ្នកគោរពព្រះពុទ្ធសាសនា, ដោយលើកទ្រឹស្តីព្រះពុទ្ធមកធ្វើជាគោលក្នុងរឿង គឺកម្មផលដែលនឹងតាមជួយជ្រោមជ្រែង ឬ តាមផ្ដន្ទាដល់អ្នកដែលបានប្រព្រឹត្តរួចមកហើយ ៗ សរុបគោលគំនិតទៅ ឃើញថាកវីពុទ្ធសាសនា

ទាំងនោះបញ្ជាក់ឲ្យច្បាស់លាស់ថា «អធម៌» តែងចាញ់ «ធម៌» ជាដរាប ។ ប៉ុន្តែមុននឹងចាញ់ «អធម៌» បានធ្វើទុក្ខបុកម្នេញ «ធម៌» ឲ្យលំបិនលំបាកតោកយ៉ាកជាយូរខែយូរថ្ងៃណាស់ដែរ ។ គ្រង់ដែលការគ្រោងនិពន្ធញអំពើអាក្រក់បីដូចជាចង់ទាញសតិអារម្មណ៍អ្នកអានឲ្យជួយស្អប់, ជួយខឹង ជួយថ្កោលទោសត្រូវលើរូបតួសុចរិត នឹងទុច្ចរិតនេះហើយដែលធ្វើឲ្យផ្ទៃរឿងបានវែង ទំនងបានជាគ្រឿងលួងលោមផងានុផនឲ្យអណ្ដែតសោកទៅតាមខ្លួន ។ ប៉ុន្តែបើយើងសង្កេតឲ្យល្អិតល្អន់ទៅ ឃើញថា ផ្ទៃរឿងទាំងនោះមិនសុទ្ធតែត្រូវហើយល្អវិសេសទេ គឺគេអាចរិះគន់បានជាច្រើនណាស់ដែរ ដូចជាការប្រើពាក្យហួសវិស័យប្រាសចាកទេស នៃការសរសេរជាដើម ។ តែទោះជាយ៉ាងណាក៏ដោយ យើងត្រូវតែទទួលស្គាល់ថា សាស្ត្រាទាំងនេះពិតជាវណ្ណកម្មគ្រាលមួយ ដែលបានសាបព្រោះពូជជាអក្សរសាស្ត្រ ឲ្យដុះដាល

ពេញវាលពេញកាលក្នុងប្រទេសយើង ព្រោះតែបានមកដល់យើងកាលគ្រាក្នុងសម័យនេះ ។

បើយើងពោលពី លក្ខណៈអក្សរសាស្ត្រ របស់រឿងទាំងនេះវិញ យើងមិនសូវមានការរិះគន់ទេ ព្រោះកវីបុរាណលោកច្រើនសរសេរ សុទ្ធតែជាពាក្យដែលមានចុងជួនល្អគ្នាយ៉ាងល្អល្អាយប្លែកពីអក្សរសាស្ត្ររបស់ជាតិនានា ។ ក្នុងផ្នែករឿងទៀត គឺសុទ្ធតែលេងសំនួនពោហារយ៉ាងណែនណាន់គួរឲ្យសរសើរ គឺមានការដាក់ស្គន់, ការប្រៀបធៀប, ការស្រមៃហើរហោះ សមទៅតាមផ្នែករឿងគ្មានខ្ចោះ ។

ចំពោះពាក្យពេចន៍ដែលប្រើក្នុងរឿងទាំងនេះ សុទ្ធតែជាពាក្យមានគុណភាពខ្ពស់ គឺច្រើនជាពាក្យចេញមកពីបាលី-សំស្ក្រឹតមិនសូវមានពាក្យសាមញ្ញទេ ។ បានជាសរសេរយ៉ាងនេះ ប្រហែលជាបុព្វបុរសយើងនឹកឃើញថា ស្នាដៃទាំងនេះ គាត់បំរុងទុកឲ្យមានតម្លៃរហូតរាប់ពាន់ឆ្នាំដូចការពិតដែលយើងប្រទះសព្វថ្ងៃនេះដែរ ឬ ក៏ ? « ព្រោះពាក្យ ទីថ្លៃថ្នូរ

បែបនេះមិនងាយសាបរលាបទេ ឯពាក្យសាមញ្ញវិញ តែង
តាប់អស់អាយុ ព្រោះក៏ត្តិប្រែទៅតាមកាលៈទេសៈជាញឹក
ញាប់ ។

រឿងទាំងនេះ មិនត្រឹមតែជារឿងប្រលោមលោកមាន
ការទុកក្នុងសាស្ត្រាប៉ុណ្ណោះទេ អ្នកប្រាជ្ញសម័យដើមបាន
ប្រឌិតយកទៅធ្វើជារឿងល្ខោនបានទៀត ឥតប្រកាន់ថារឿង
ណាជារឿងណាឡើយបានដូច ៗ គ្នា ។ ព្រោះខ្មែរយើងជា
ជាតិមួយមានសិល្បៈប៉ាំមុនគេបំផុតនៅជ្រោយសុវណ្ណភូមិ ។
ជាភស្តុតាង គឺរឿងកុមារកេរ្តិ៍ ដែលសរសេរឡើងជាបទល្ខោន
សុទ្ធ ៗ លាយបំរុះទាំងក្បាច់កាព្យក្នុងនោះផង ។ រឿង
កុមារកេរ្តិ៍ គេអាចស្មានបានថារឿងនេះមិនមែនមានកំណើត
ក្រោយសម័យអង្គរទេ ពិតជាកើតឡើងមុនពេលកសាងអង្គរ
ទៅទៀត ព្រោះពាក្យពេចន៍ក្នុងនោះសុទ្ធតែជាពាក្យខ្មែរ
បុរាណវែងឆ្ងាយ ខឹងប្រឡូកដោយពាក្យសំស្រ្កឹតផង ព្រោះ
សម័យមុនអង្គរជាសម័យស៊ីវិល័យសំស្រ្កឹត គឺគ្រាដែលលទ្ធិ

ព្រហ្មសាសនា និងពុទ្ធសាសនាមហាយាន នៅមានឫទ្ធិលើ ដែនខ្មែរនៅឡើយ ។ ក្រោយពីនេះ មានចំឡាក់នៅជញ្ជាំង ថែអង្គរវត្តជាភស្តុតាងទៀត ព្រោះលក្ខណៈរបស់រឿងក្នុង ចំឡាក់នោះពិតជាដូចរឿងក្នុងសាស្ត្រាដែរ ហើយរឿងរាមកេរ្តិ៍ ខ្មែរនេះ មិនមែនដូចសុទ្ធសាធនឹងរឿងរាមាយណៈឥណ្ឌាទេ គ្រាន់តែមានការប្រែឌិត ១ ប៉ុណ្ណោះ ឯសាច់រឿងគឺតុបតែង ជាបែបស្នាដៃខ្មែរពិតប្រាកដ ។ ដូចយើងបានពោលមក ហើយថា មិនត្រឹមតែរឿងរាមកេរ្តិ៍ដែលសរសេរជាបែបល្ខោន ប៉ុណ្ណោះទេ សូម្បីរឿងដទៃ ១ ទៀត ដូចរឿងសង្ខសិល្បជ័យ ជាដើម ក៏ខ្មែរប្រែឌិតយកទៅលេងជាល្ខោនបានដែរ ។ គឺរឿង ល្ខោនទាំងនោះហើយ ដែលនាំយកអក្សរសាស្ត្រខ្មែរដែលផ្តិត ជាប់ក្នុងរឿងទាំងនោះ ទៅផ្សាយនៅគ្រប់ទិសទីក្នុងអាណា ចក្រខ្មែរ ។

សរុបសេចក្តីទៅ គឺរឿងប្រលោមលោកខ្មែរនេះហើយ ដែលជាច្រកផ្សព្វផ្សាយនូវអក្សរសាស្ត្រ, របស់ជាតិឲ្យបានសុស

សាយខ្លួនទៅក្នុងចិត្តបណ្ដាជនខ្មែរយើង ។ ដោយមានសេចក្ដី ពិស្ដារដូចពោលមកខាងលើនេះឯង ទើបយើងពោលថាអក្សរ សាស្ត្រខ្មែរ ផ្ដិតជាប់ក្នុងរឿងប្រលោមលោកនិងរឿងល្ខោន ។

## ឃ_ អក្សរសាស្ត្រសិលាចារឹក

យើងឃើញហើយ សិលាចារឹកមិនត្រឹមតែជាគោល ចារឹកកត់ត្រាពត៌មាន ទុកឲ្យយើងដឹងដានពីប្រវត្តិសាស្ត្ររបស់ ជាតិជាអង្វែងមកហើយប៉ុណ្ណោះទេ ។ សិលាចារឹកជាប្រភព អក្សរសាស្ត្រមួយយ៉ាងសំខាន់បំផុត ។ សម័យដែលខ្មែរ កសាងអារ្យធម៌ជាដំបូង តាំងពីសតវត្សទី ១ នៃគ្រិស្ដសករាជ គេអាចដឹងបានដោយសារសិលាចារឹកអក្សរខ្មែរ ដែលនៅ សល់ពាសពេញក្នុងអាណាចក្រខ្មែរបុរាណ តែឥឡូវត្រូវបែក ខ្ញែកទៅឯប្រទេសជិតខាងខ្លះទៅហើយ ដូចជាសិលាចារឹក ខ្មែរនៅលពបុរី ( ប្រទេសថៃ ) និងនៅ មីសឺន-ញាត្រាំង (ប្រទេសវៀតណាម) ជាដើម ។ លក្ខណ៍គោលតាំងនេះ

ខ្លួនតែសរសេរជាអក្សរខ្មែរបុរាណពិត ៗ មិនដែលទៅខ្ចី ឬ
ចអក្សររបស់ជាតិណាមកចារភ្ជាប់នឹងផ្ទាំងនោះឡើយ ។
សិលាចារឹក ជាឃ្លាំងមួយផ្ទុកនូវកំណប់អក្សរសាស្ត្រខ្មែរ
ាំងពីកើតមានការប្រឌិតមក ហើយកំណប់នេះជាកំណប់
ខ្ចួសាធតតមាននរណាកាត់ថ្លៃបានឡើយ ។ នៅក្នុងផ្ទាំង
មួយ ៗ សុទ្ធសឹងវិចិត្រទៅដោយពាក្យពេចន៍ស្រស់ចំណាន
ដែលកើតឡើងដោយស្នាដៃកវីខ្មែរពីព្រេងនាយ ។ ប៉ុន្តែពាក្យ
ទាំងនោះ ច្រើនតែជាពាក្យសំស្ក្រឹតសុទ្ធ ៗ ព្រោះសម័យនោះ
ជាសម័យស៊ីវិល័យសំស្ក្រឹត គេប្រើភាសាសំស្ក្រឹតជាផ្លូវការ
រាប់ប្រទេស ។ មួយទៀត ភាសាសំស្ក្រឹតនេះជាភាសា
រាប់អ្នកប្រាជ្ញឬអ្នកមានយសសក្តិខ្ពស់ បានសេចក្តីថា ជា
ភាសារុងរឿងរបស់ជាតិយើងកាលយុគនោះ ។ ពិតមែន
ហើយតែអក្សរសាស្ត្រ ដែលផ្តិតជាប់ក្នុងសិលាចារឹកនេះ
មិនសូវមានគុណភាពជ្រួតជ្រាបចូលទៅជ្រៀតសព្វសាយក្នុង
សន្តានចិត្តបណ្តាជនខ្មែរ ដូចសាស្ត្រារឿងប្រលោមលោក ឬ

រឿងព្រេងខែមរ តែក៏បានជាកេរ្តិ៍ដំណែល ធៀបដូចជាកញ្ច
មួយទុកសំរាប់ឲ្យផងជាតិយើង ជាន់ក្រោយឆ្លុះមើលគតិមា
ឬព្រឹត្តិការណ៍ផ្សេង ៗ ដែលកើតមានឡើងក្នុងគ្រាអតីតកា
ដ៏យូរអង្វែង ៗ ក្រៅពីនេះទៀត សិលាចារឹកជាគ្រាំងវិសេ
មួយ ដែលជួនការយើងចេះរិះរកឃើញពិធីផ្ចាញ់ពេលវេល
គឺធ្វើឲ្យបានគង់វង្សរូបភាពអក្ខរៈសម័យ បន្តគ្នា ជាលំដាប់ហូ
ហែ ទុកសំរាប់ឲ្យយើងដឹងស្គាល់ពីរបៀបសរសេរអក្សរខ្មែ
គាំងពីសតវត្សទី ៣ មក ជាប្រយោជន៍យ៉ាងសំខាន់ដល់យើ
ដែលត្រូវការសិក្សាពីកំណើតអក្សរសាស្ត្រ និងពីវិធីស្រាវជ្រា
ខាងវេយ្យាករណ៍ ៗ បើយើងពិនិត្យឃើញមួយកូត អក្ស
ដែលចារលើថ្មតាំងនេះហាក់ដូចជាតិចតួចមិនសំខាន់ប៉ុន្មាន
តែបើសង្កេតឲ្យវែងឆ្ងាយទៅ ទើបយល់ថា៖ ពាក្យតិចតួ
នេះឯង « ជាខ្លឹម » ដ៏សំខាន់ គាបឲ្យអ្នកផងបកស្រាយបា
ជាសេចក្តីវែងទូលំទូលាយក្រៃលែង គឺអាស្រ័យការទទួ
ជោគជ័យ ឈ្នះពេលវេលារបស់ថ្មតាំងនេះហើយ ដែល

ស្រាវជ្រាវក្នុងគ្រាបច្ចុប្បន្ន អាចបកស្រាយបរិយាយបាន វហាពីអក្សរសាស្ត្រ, ប្រវត្តិសាស្ត្រ និងការប្រឌិតរឿង ស់ជាតិយើងពីព្រេងនាយ ។ អាស្រ័យលើហេតុផល ពេលមកនេះឯង ទើបយើងហ៊ានឲ្យឈ្មោះថា «អក្សរ-ស្ត្រផ្តិតជាប់នឹងសិលាចារឹក» ។

## ង_ អក្សរសាស្ត្រខាងបច្ចេកទេស

ពាក្យថាបច្ចេកទេសក្នុងទីនេះ ពោលសំដៅស្នាដៃណា លស្តីពីវិជ្ជាឯកទេសដោយឡែកពីគេ ។ យើងនឹងបក ហយពន្យល់សេចក្ដីដូចតទៅ៖ ច្បាប់ទំលាប់ទាំងឡាយជា បញ្ញត្តិផ្សេងៗ សំរាប់របៀបគ្រប់គ្រងរដ្ឋ ជាអក្សរសាស្ត្រ កេទពាក្យកយ ហើយជាផ្នែកបច្ចេកទេសផង ដែលជា ណ្ណកម្មជាន់ខ្ពស់ តែមិនសូវបានផ្សាយទូទៅគ្រប់ទិសដំបន់ ចរឿងប្រលោមលោក, រឿងល្ខោន ឬ រឿងព្រេងទេ ។ ផ្នែកនៃវណ្ណកម្មនេះ ច្រើនពោរពេញទៅដោយពាក្យ

បច្ចេកទេសខាងច្បាប់សំរាប់ស្រុក ដែលយោលទៅតាមទម្
របស់ភាសាអ្នកស្រុក បាននិយាយបន្ត ១ តាំងពីសង្វែងកា
មក ៗ អក្សរសាស្ត្រប្រាកដនេះ មិនមែនមានមកតាំងពីប
យូរហើយទេ ព្រោះគេមិនប្រទះឃើញមានក្រាំង ឬ ចារឹក
គោលសំខាន់នៅក្នុងសិលាចារឹក ឬ គម្ពីរសាស្ត្រាឯណា តាំ
មុនសម័យអង្គរ ឬ ត្រឹមអង្គរទេ គឺគេឃើញមានតែច្បាប់ដ
សរសេរលើក្រដាស ដែលរៀបចំក្រងត្រឹមពេលមុនសម័
ទុក្ខ ឬ ត្រឹមសម័យទុក្ខប៉ុណ្ណោះ ។ ច្បាប់ដើមទាំងនេ
មាននៅក្នុងទ្រង់ហ្លួងសព្វថ្ងៃ ដែលក្រុមពុទ្ធសាសនបណ្ឌិ
បានថែទាំទុកយ៉ាងមធ្យ័ត ដែលគេឲ្យឈ្មោះថា « ព្រះរា
ក្រិត្យក្រមផ្សេង ១ » មានទាំងអស់ ២៤ ក្រម គឺមានក្រមទទេ
ក្រមចែកពល, ក្រមទសករិយា ជាដើម ។ ឯសេចក្ដីបរិយា
របស់ក្រិត្យក្រមទាំងនេះ ចែកដោយឡែក ១ ពីគ្នា គឺមា
និយាយពីច្បាប់ទម្លាប់របស់គង់យោធា, ពីច្បាប់កាត់ក្ដីផ្សេង
និងរបៀបការពារជាតិដាក់យ៉ាំងកងការជាដើម ។ ស្នាដៃទាំ

ៈ ប្រទិតទៀតដោយអ្នកប្រាជ្ញខាងច្បាប់បុរាណជាច្រើនរូប
ដោយមានព្រះមហាក្សត្រនៅសម័យនោះទ្រង់ជាមគ្គុទ្ទេសក៍
ការរៀបរៀងនេះផង គឺចាប់តាំងពីរជ្ជកាលព្រះបាទជ័យ-
ជ្ជាមក ៗ យើងគួរសរសើរម្យ៉ាងទៀតចំពោះស្នាដៃទាំងនេះ
ព្រះបុព្វបុរសយើងសម័យនោះនឹកឃើញគំនិតមាំទាំ បាន
ងប្រែងរៀបចំច្បាប់ទម្លាប់ សំរាប់ស្រុកទេស តាំងទុកជា
គ្គុណ៌គោល កុំឲ្យនាម៉ឺនសព្វមុខមន្ត្រីទាំងឡាយព្រួយពិបាក
រិះដោយមតិខ្លួនឯងផង ទំនងឲ្យមានឯកភាពក្នុងការអនុវត្តន៍
ាប់សំរាប់រដ្ឋផង ៗ សេចក្តីពិនិត្យសង្កេតទាំងនេះឯងហើយ
ែលយើងសំគាល់ថាៈ ជាអក្សរសាស្ត្របច្ចេកទេស ៗ

## ប–អក្សរសាស្ត្រខាងចម្រៀង

នៅវគ្គចុងបំផុត យើងត្រូវបរិយាយពីអក្សរសាស្ត្រជាប់
ងចម្រៀង ៗ

ចំរៀងខ្មែរបុរាណ សុទ្ធសឹងប្លែក ៗ ពីគ្នាជាច្រើនបែប

ច្រើនយ៉ាង គឺមានចម្រៀងបំពេកូន, ចម្រៀងការងា
ចម្រៀងល្ងួងលោម នឹងចម្រៀងបនស្រន់ ៗ តទៅនេះយើ
សូមលើកយកមួយផ្នែក ៗ មកធ្វើអត្ថាធិប្បាយជាបន្ត ៗ គ្នា

១– ចម្រៀងបំពេកូន .– ចំរៀងនេះច្រើនប្រក
ដោយបទបែបយ៉ាងស្រទ្ធូតស្រងាក់ នឹងពាក្យពេចន៍ទន់ភ្ល
ដំណាងសំដីផ្ទាក់ផ្ទួមរបស់មាតាដែលពោរពេញទៅដោយ
សម្បូរសយ៉ាងក្រៃលែង ៗ គេសង្កេតឃើញ ចម្រៀងប្រភ
នេះមោះមុតជាជាងចម្រៀងនានា ព្រោះរេះធ្វើឲ្យនារីខ្មែរដែ
ស្រគត់ស្រគំតាមការឃុំគ្រងរបស់ប្រពៃណីជាតិ ជាចំប្អ
ការកាត់សេចក្តីខ្វាសអៀន ហាមាត់ស្រែកច្រៀងបំពេកា
ឬ កុមារតូច ពត់សំឡេងទៅតាមបទយ៉ាងពិរោះលន្ទ
លន្លោច ៗ ឯការហាមាត់ច្រៀងនេះ នាងនារីពុំដែលបា
ហាត់ពីមុនមកម្តងសោះ ប៉ុន្តែហាក់ដូចចម្រៀងនោះ ជាទេព
កោសល្យផុះផុលជាស្រេចក្នុងសន្តានចិត្តរបស់នាង ជាយូ
មកហើយ ៗ ឯចំនុករសាតក៏ជិតជាប់នូវលក្ខណៈអក្សរសា

នល់អៀន គឺត្រូវតាមគន្លងចង្វាក់ពាក្យហ្វានខ្វះ ទំនង
បស់បំព្រងដោយសំនួនវោហារពាក្យពេចន៍ឥតខ្ចោះផង ។
ក្សរសាស្ត្រប្រភេទនេះឯង បានជ្រាបចូលក្នុងសន្តានចិត្តនៃ
នខ្លួនមុនគេបំផុត គឺតាំងពីពេលនៅជាទារកនៅឡើយ ។
ានសេចក្ដីថា កាលនោះទារកចេះបាត់មាត់ស្ងៀមប្រុងស្ដាប់
ឡើង ទំនងសំដីរបស់មាតាច្រៀងបំពេរ គឺទារកបានក្រេប
ញ្ញាក់ខ្លួរសជាតិឆ្ងាញ់ពិសា នៃអក្សរសាស្ត្រក្នុងចម្រៀង
តាំងពីក្រេះក្រវៀបរបស់មាតា ។

២– ចម្រៀងការងារ.– ចម្រៀងប្រភេទនេះជា
ណាងជីវភាពរបស់អ្នកស្រុកពិត ៗ ។ គេច្រៀងចម្រៀងនេះ
នៅក្នុងពេលធ្វើការដូចជាពេលស្ទូងស្រូវ, ពេលបែនស្រូវ
ពេលសំរាកក្នុងការងារអ្វីមួយ ។ ក្នុងពេលដែលប្រកបការ
ាញក់ឡាំងហាលកំដៅព្រះអាទិត្យ, ហាលខ្យល់ព្យុះ ឬ
ណ្ដាលធាតុត្រជាក់ គ្មានអ្វីក្រៅពីចម្រៀងនេះទេ ដែល
ាចមកជួយបំពេ ឬ មករុំស្រោបបេះដូងកសិករយើង ឲ្យបាន

ធូរស្រាលលំហែកាយទូលាយចិត្តបានមួយផងមួយកាល ឯសេចក្តីទំនុកសោក ហើយតែងប្រទះឃើញ សុទ្ធ ជាពាក្យប្រកបការដូចជាថ្លែងពីការស្ទូងដក, ការបោកបែ ដើម្បីយកផលសំរាប់គ្រួសារជាដើម ។ ឯពាក្យពេចន៍តាំងពេ មានក៏លក្ខណៈជាអក្សរសាស្ត្រស្រស់បំព្រងដែរ ។

៣– ចម្រៀងលំលួងលោម.– ចម្រៀងនេះប្រើន ពាក្យផ្ដោះផ្ដងគ្នារវាងកំលោះក្រមុំ ប៉ុន្តែពាក្យផ្ដោះផ្ដងនេះសុ តែប្រកបដោយកិរិយាថ្លៃថ្នូរ មានចម្រៀងប្រហែលនឹងចម្រៀ ពោលល្បួងជាដើម ។ គេនិយមចម្រៀងនេះនៅពេលណា ដែលផុតពីការងារ ដូចជាពេលផុតរដូវច្រូតកាត់ដែលគេបា ផលស្រូវដាក់ជង្រុកហើយ, គេក៏នាំគ្នាធ្វើបុណ្យធ្វើទានផ្ទា ការងារ ។ ពុំនោះទេ នៅឱកាសបុណ្យចូលឆ្នាំ ឬ បុណ្ ភ្ជុំបិណ្ឌជាដើម ។ គ្រាណាគេបើកឱកាសលេងចម្រៀងនេ យុវ-យុវតីទាំងឡាយបានសប្បាយលើសលែង ព្រោះគេបើ សេរីភាព ឲ្យផុតពីប្រពៃណីតឹងតែងបានមួយពេល ។

ចំណែកខាង-បិតាវិញ ក៏បានសប្បាយរីករាយជាមួយកូន ដោះទៅដែរ ។ ចំរៀងផ្តាំផ្ញើនេះ មានសេចក្តីលំបាយ តាមលក្ខណៈអក្សរសាស្ត្រដែរ ព្រោះមានល្បិចកល និង សំនួនពាក្យពេចន៍យ៉ាងថ្លៃថ្នូរ ។

៦–ចំរៀងបងស្រង់ . ចំរៀងប្រភេទនេះ សម្តែងឡើងជាដំណាងចិត្តអស់សង្ឃឹម ដែលផុតវិស័យ នឹងទុកចិត្តបាន គឺដាច់ចិត្តពោលពាក្យទន់ខ្សោយអង្វរគេ ឬ អំពាវនាវរកវត្ថុសក្តិសិទ្ធទាំងឡាយ ឲ្យជួយរំលែកទុក្ខ, ឲ្យ ធ្វើជាសាក្សី នៃសេចក្តីអស់សង្ឃឹម និងឲ្យជួយសំរាលសេចក្តី ឈឺចាប់ដោយប្រការណាមួយ ។ ចំរៀងនេះមិនសូវបាន ទទួលសេចក្តីនិយមពីជនគ្រប់មជ្ឈដ្ឋានទេ គឺមានតែអ្នកកាន់ គំនិតទន់ខ្សោយប៉ុណ្ណោះដែលចូលចិត្តកាន់ជាងគេ ប៉ុន្តែ សេចក្តីបងស្រង់នោះក៏ផ្អែមល្ហែម ផ្តេកទៅលើលក្ខណៈអក្សរ-សាស្ត្រប្រភេទទន់ភ្លន់ គួរគេណាចិត្តណាស់ដែរ ។

៨–ចំរៀងប្រពៃណី .– ចំរៀងប្រពៃណីគេ

និយមតាមពេលតាមវេលា គឺនៅគ្រាណាដែលគេរៀបធ្វើពិធី
អ្វីតាមទំនៀមទំលាប់ ដូចជាពេលរៀបការពាហ៍ពិពាហ៍, ពេល
បុណ្យអុំទូកទឹង ពេលបុណ្យឡើងអ្នកតាជាដើម ។ ចម្រៀង
ប្រភេទនេះ ជាចម្រៀងពិសេសដែលតម្រូវតាមតន្ត្រីប្រពៃណី
សំរាប់ស្រុកហើយច្រើនមានគ្រាំងចងទុកជាក្បួនខ្នាតគួរនៅ
ថែមទៀតផង បង្ហាញឲ្យឃើញថា៖ ចម្រៀងបែបនេះគេគាប
ទុកជាចម្រៀងផ្លូវការ ។ ការចារឹកទុកជាក្បួនយ៉ាងនេះ រឹតតែ
នាំឲ្យយើងឃើញច្បាស់លាស់ ថាពិតជាមានលក្ខណៈអក្សរ-
សាស្ត្រមាំទាំបរិបូណ៌លើសចម្រៀងមុនៗ ទៅទៀត ។

សេចក្ដីអធិប្បាយរបស់យើង យ៉ាងហូរហែខាងលើនេះ
ជាគ្រឿងបញ្ជាក់បង្ហាញលោកអ្នកអាន ពីជម្រៅអក្សរសាស្ត្រ
យើង ដែលមានប្រភពជាច្រើនបានផ្សាយឲ្យហៀរហូរ ពេញ
ទិសដំបន់តាំងពីបូរាណមក ។





## ជំពូកទី២

# ចលនាអក្សរសាស្ត្រខ្មែរ

ក្នុងអក្សរសាស្ត្ររបស់ជាតិនីមួយ ៗ តែងតែមានចលនាពិសេស ៗ ពីគ្នា អាស្រ័យទៅតាមពេលវេលា ដែលជំនឿ ឬការចូលចិត្តរបស់អ្នកស្រុកផ្តេកទៅលើទ្រឹស្តី ឬ គោលគំនិតណាមួយ ៗ អក្សរសាស្ត្រខ្មែរក៏មានចលនាផ្សេង ៗ គ្នាដែរ ព្រោះខ្មែរជាជនជាតិមួយ មានជំនឿនិងប្រកាន់នូវគោលគំនិតទៅលើទ្រឹស្តីអ្វី ៗ ដែលយល់ឃើញថាមានប្រយោជន៍សំខាន់ ឬដែលខ្លួនចូលចិត្ត ។ យើងល្បងសង្កេតរកប្រភពនៃចលនាទាំងនោះដូចតទៅ ៖

- ចលនាព្រហ្មនិយម ,
- ចលនាពុទ្ធនិយម

ចលនាខេមរនិយម ,

ចលនាបរទេសនិយម ,

ដើម្បីឱ្យស្គាល់ច្បាស់អំពីចលនា នៃអក្សរសាស្ត្រយើង ទាំង៤ប្រភេទដែលកប់មកខាងលើនេះ យើងធ្វើការអធិប្បាយ វែកញែកឱ្យច្បាស់លាស់ទៅខាងក្រោម ព្រោះចលនានិមួយៗ រមែងមានខន្តិនាការអំពីអ្វីប្លែកៗ គួរឱ្យអ្នកសិក្សាកត់សំគាល់៖

## ១_ ចលនាអក្សរសាស្ត្រ ព្រហ្មនិយម

ដែលហៅថាអក្សរសាស្ត្រព្រហ្មនិយម ក្នុងទីនេះ គឺ សំដៅដល់វណ្ណកម្មទាំងឡាយណា ដែលផ្អែកគោលគំនិត ទាំងស្រុងទៅលើលទ្ធិព្រហ្មញ្ញសាសនា ។ លទ្ធិនេះ បាន សន្មតយកតួអង្គព្រះព្រហ្ម, ព្រះឥសូរ និង ព្រះនារាយណ៍ ធ្វើជាវត្ថុស័ក្តិសិទ្ធិ, ជាទីគោរពសក្ការៈ ។

ក្រោយដែលជនជាតិឥណ្ឌា បានចូលមកយកជោគជ័យ នៅលើដែនដីខ្មែរ (សម័យហ្វូណន) ហើយអ្នកអន្តោប្រវេសន៍

តាំងនោះ បានតាំងនាំយកលទ្ធិសាសនាដែលជាមេគំនិតមកជាមួយផង ហើយបានតាំងគ្នាសាបព្រោះជំនឿសាសនានេះពេញលើផែនដីកម្ពុជាយើង ។ ហេតុនេះហើយបានជាយើងឃើញអត្ថបទនៅក្នុងសិលាចារឹកក្តី នៅក្នុងរឿងបុរាណក្តី រមែងតែងសរសេរជាភាសាសំស្ក្រឹត ដែលជាភាសាផ្លូវការសំរាប់សាសនាព្រាហ្ម ព្រមទាំងពោលពីឫទ្ធិបារមីចេស្តារបស់អង្គអវតារនៃសាសនានេះផង ។ ដើម្បីឲ្យមានភស្តុតាងច្បាស់លាស់ យើងលើកយកន័យរបស់សិលាចារឹកខ្លះមកធ្វើជាគំរូយ៉ាងនៅខាងក្រោម សំរាប់ឲ្យអ្នកសិក្សាស្គាល់ជំរៅនៃចិន្តាការរបស់ជំនឿនិមួយ ៗ ដែលជ្រាបចូលក្នុងអក្សរ-សាស្ត្រយើង៖

« ...ទ្រង់យានធ្វើកាត់សមុទ្រនៃគុណ មានចិន្តាកែកាយ ទីង

« ទ្រទ្រង់ផែនដី ព្រះអង្គបីបមលក្ស្មីជានិច្ច ដូចជាព្រះវិស្ណុ

« មានព្រះហស្ត ៤ ។

(សិលាចារឹកប្រាសាទករណាលដើម)

“... សូមព្រះសិរៈដ៏មានជដាធំ ហើយដែលមានបាត
“ធ្ងន់លើសលែង, អាចជាន់កណ្ដាលសមុទ្រឲ្យជ្រួរំពងអាកាស
“បាន, មកជួយព្យាបាលនូវសម្បត្តិរបស់អ្នក ។

(សិលាចារឹកភ្នំបាយ័ន)

“... កាលយល់ព្រះអង្គទ្រង់ធ្វើតយ៉ាងតឹង បីដូចព្រះសិរៈ
“នៅត្រីបុរន្ត, ពួកបច្ចាមិត្រ ក៏ដឹងជាក់នូវសេចក្ដីវិនាសរបស់
“ខ្លួន ។

(សិលាចារឹកប្រាសាទខ្នា)

អត្ថបទខាងលើនេះ យើងឃើញអ្នកនិពន្ធបានលើកយកព្រះនាមព្រះវិស្ណុ ព្រះសិរៈដ៏ជាទីគោរពរបស់គេមកធ្វើជាគំរូ ។ ក្រៅពីនេះ យើងប្រទះគុណវណ្ណកម្មជារឿងកំរផ្សេងទៀត ដូចជារឿងមហាភារៈដែលមានពួកអសុរនិងពពួកទេវតា នាំគ្នាយកនាគធ្វើព្រ័ត្រ ទាញល្បងកំឡាំងគ្នាល់យកសមុទ្រទឹកដោះ ។ កាលនោះ ពួកយក្សយកបានខាងក្បាលនាគ ដែលនាំឲ្យមានកំឡាំងកាន់តែខ្លាំងឡើងទៀត ។

ឃល់ច្បាស់ថាពួកទេវតាចាញ់កលយក្សហើយ ព្រះនារាយណ៍
ក៏បានបែងភាគ ចុះមកជួយយកសាសនាពួកទេវតាដែលជា
និមិត្តរូបនៃសេចក្ដីសប្បុរស ។

នៅក្នុងរឿងរាមកេរ្តិ៍និទានពី ព្រះរាមជាអវតារនៃព្រះ
នារាយណ៍ ដែលបែងភាគចុះមកជួយរកយុត្តិធម៌ របស់សត្វ
រងកតទាំងបី គឺស្ថានសួគ៌, ស្ថានមនុស្ស និងស្ថាននរក ។
ដូចនេះឯង ទើបគេឃើញក្នុងរឿងរាមកេរ្តិ៍ មានតួសម្ដែងរឿង
ដណាងកតទាំងបីចូលគ្នា ដូចជាទេវតា, ព្រះឥន្ទ្រ ព្រះព្រហ្ម
លែងរឿងចូលគ្នាជាមួយមនុស្សនិងសត្វតិរច្ឆានផ្សេងៗមានស្វា
និងត្រីជាដើម។ ឯតួអង្គព្រះរាមសោតទៀត ក៏ពុំមានពៀរវេរា
ម្នាឡើយ ទោះបីជាបានប្រហារជីវិតយក្សក្របម៉ុនសែនឬកក់ក
ភាសពេញដីយ៉ាងណាក៏ដោយ ព្រោះលោកជាម្ចាស់នៃអំពើ
បាបបុណ្យទាំងអស់ ។ នេះឯងជាលទ្ធិសាសនាព្រាហ្មណ៍ ។

គេប្រទះឃើញអក្សរសាស្ត្រខ្មែរ ផ្ដើតទៅតាមទ្រឹស្ដី
ព្រហ្មនិយម ចាប់មានកំណើតពីការផ្ដើមដំបូងបង្អស់នៃអក្សរ-

សាស្ត្រយើង រហូតដល់សតវត្សទី ១៦ នៃគ្រិស្តសករាជ ផ
គ្រាដែលខ្មែរបានលះបង់ទ្រឹស្តី ឬ លទ្ធិសាសនានេះ ហើយ
នាំគ្នាត្រឡប់បែរទៅគោរពព្រះពុទ្ធសាសនាវិញ ។

## ២– ចលនាអក្សរសាស្ត្រពុទ្ធនិយម

អក្សរសាស្ត្រក្នុងចលនាពុទ្ធនិយម ចាប់ផ្ដើមមានឡើង
ក្នុងសម័យដែលខ្មែរនាំគ្នា គោរពពុទ្ធសាសនា តាំងពីសត-
វត្ស ទី ១៦ គឺនៅភាគខាងចុងនៃសម័យអង្គរ ។ កាលនោះ
បណ្ដាជនខ្មែរ ទាំងព្រះមហាក្សត្រ ទាំងរាស្ត្រ មន្ត្រីគ្រប់ជាន
ថ្នាក់បានហ្វឹកហ្វឺនកាយវាចាចិត្ត ទៅតាមគន្លងទ្រឹស្តី នៃពាក្យ
ប្រៀនប្រដៅរបស់ព្រះពុទ្ធគ្រប់ៗគ្នា ។ ក្នុងទ្រឹស្តីនេះ មាន
លើកយកកម្មនិងផលធ្វើជាធំ ។ បានសេចក្តីថា បើនរណា
ប្រព្រឹត្តអំពើល្អ ពិតជានឹងបានសោយផលល្អទៅខាងក្រោយ
តែបើនរណាប្រព្រឹត្តនូវកម្មអាក្រក់ ក៏ប្រាកដជានឹងទទួល

ម្អកុសល់ពាក្រកវិញជាក្រោយពុំមានឡើយ ៗ និន្ទាការ
ទុនិយមនេះ ជ្រាបចូលទៅក្នុងសន្តានចិត្តបណ្ដាជនខ្មែរយ៉ាង
ថ់ហើសណាស់ ព្រោះកាលនោះ ខ្មែរកំពុងកើតសង្គ្រាម
លិយុត្តក្នុងប្រទេស ហេតុផលមានការបកដ៏យដកខ្ទុនថយ
កពេលទ័ក្រុងអង្គរ ដែលជាទីនគរលើកក្រលែងថែមទៀតៗ
ក្លុះហើយសេចក្ដីគោកយ៉ាក កំចូលមកទន្ទ្រានក្នុងសតិកា-
ណ៍របស់អ្នកស្រុក ៗ ទទួលទ្រឹស្ដីពុទ្ធនិយម ជាទ្រឹស្ដី
រន្តិកាពមិនបៀតបៀនយាយីតាផង ក៏តែតែគាប់ចិត្តអ្នកស្រុក
ណាស់ទៅទៀត ទើបនាំគ្នាប្រសិទ្ធ បន់ស្រន់កល់ៗថៃ
ល់គុណបុណ្យព្រះរតនត្រ័យ សុំសេចក្ដីសុខសប្បាយកែកាយ
ឡើងវិញ ៗ

រឿងកាក្នុងទ្រឹស្ដីនេះ សុទ្ធតែនិយាយអំពីអង្គពោធិសត្វ
វេលតែងត្រេចរង្គាត់ ក្នុងកលវដ្ដសង្សារ ដើម្បីសន្សំយកពោធិ-
ម្ភាននឹងប្រាជ្ញាបារមីទៅអនាគត ៗ វណ្ណកម្មខ្មែរដែលមាន
ន្ទាការពុទ្ធនិយមទាំងប៉ុន្មាន ករឿអ្នកនិពន្ធតែងប្រារព្ធថា ជា

សេចក្ដីប្រែចេញពីគម្ពីរពុទ្ធសាសនា (១) ដែលអ្នកប្រាជ្ញពុ
សាសនាបានតែងឡើងជាមធ្យោបាយឲ្យអ្នកផងនិយមតាម
ស្នាដៃផ្នែកពុទ្ធនិយមនេះ   មាននៅសល់តែក្ដីដំណាលរឿ
ដល់យើងសព្វថ្ងៃច្រើនណាស់  ដូចជារឿង  ក្រុងសុភមិត្រ
សព្វសិទ្ធ,  គោតកុលកុមារ,  ស័ក្តិសិល្បជ័យ,  ចៅស្រ
ចេក  និង មរណមាតា ជាដើម  ។

យើងល្បងយកឧទាហរណ៍ក្នុងរឿងទាំងនេះ  មកលា
ត្រដាងជាសក្ខីភាព ចំពោះសំដីដែលបញ្ជាក់ថា ពិតជាផ្អែក
លើពុទ្ធនិយមមែន ៖

« ...ស្ដេចលោមព្រះប្អូន   ហឫទ័យសោះសូន្យ  ចា
« ប្អូនអើយ   វេរាពៀរព្រេង   កម្មឯងដល់ហើយ   ព្រលឹ
« អូនអើយ   កុំសោយសោក   ។

(ក្រុងសុភមិត្រ)

---

១– គម្ពីរនេះយើងនឹងបរិយាយក្នុងជំពូកទី ៨ ។

« ...ហេតុបុណ្យបារមីពន្លឺពោធិ៍ បានសាងអំពីអតីត

ផល់ថ្ងៃនោះឯងជាអស្ចារ្យ សារិកាកៀណាក្ស័យ

ប្រល័យផង ។ (សព្វសិទ្ធ)

« ...ហេតុតែបុណ្យបារមី ពន្លឺពោធិសត្វប្រាសព្យង

អស់ចាំងទេវតាផង ចុះមកជួនរមរក្សា ។

(ស័ង្ខសិល្បជ័យ)

«...បងសូមលាឆាង ចេញទៅកសាង សន្សំសីលទាន

តទៀតទៅមុខ ទៀនចុកជាយាន នាំសត្វលងស្ពាន

វដ្ដសង្សារ ។ (ស្រទបចេក)

យើងសំគាល់បានដោយងាយថា រឿងក៏ផ្អែកទៅលើ

ស្ដីនេះ អ្នកនិពន្ធសុទ្ធតែវិនិច្ឆ័យទោសលើតួអង្គគុណរឿងទៅ

មដំណើរកម្មផលជាត្រីមុខ ទាំងមានការអះអាងលជាតិថែម

ៀតផង ។ ទស្សនគតិនៃអ្នកនិពន្ធប្រភេទនេះ គឺចង់យក

ហានបណ្ដាជនខ្មែរ ឲ្យលុះទៅដោយសេចក្ដីស្រោចស្រង់នៃ

ះធ្មាត ។

## ៣- ចលនាអក្សរសាស្ត្រខេមរនិយម

ចលនាអក្សរសាស្ត្រខេមរនិយម មានលក្ខណៈពិសេ ប្លែកពីចលនាព្រហ្មនិយម និង ពុទ្ធនិយម ដែលតែងលើកយ អង្គអវតារនៃអង្គព្រះពោធិសត្វធ្វើតួអង្គសំខាន់នៃរឿង ។ ចល នាទី៣ នេះ ផុសចេញមកពីការរស់នៅរបស់ខ្មែរពិតប្រាកដ បានសេចក្ដីថា ចលនានេះឯងពុំមានផ្អែកគោលគំនិតពឹងព្រ ស្រ័យទៅលើព្រះអាទិទេព ឬ វត្ថុសក្ដិសិទ្ធនានា ឬ កម្មផល ឡើយ ប្រាកដជាផ្ដិតលំនាំតាមជីវភាពបណ្ដាជនក្នុងសង្គម យើងក្នុងសម័យនីមួយៗ ។ ប្រសិនណាជារឿងនោះកើតឡើ ក្នុងសម័យណា, ស្រុកទេសមានព្រឹត្តិការណ៍ដូចម្ដេចៗ, រឿងក៏មានបែបផែនចាំងស្រង់ទៅតាមព្រឹត្តិការណ៍ ឬ របៀ របបរស់នៅរបស់ជនជាតិយើង ដូចក្នុងគ្រានោះដែរ ។

ប្រលោមលោក ឬ រឿងប្រឌិតរបស់ខ្មែរដែលកប់បញ្ចូ បានក្នុងចលនាអក្សរសាស្ត្រចំពូកនេះគឺ ៖

រឿងទុំទាវ, តាឡៅ, ធនញ្ជ័យ, កុលាបប៉ៃលិន,
ស្រពោន, សូផាត, . . . ។ល។

យើងសូមសិក្សាល្បើអំពីគោលគំនិត ក្នុងរឿងខ្លះដែល
នកប់ឈ្មោះខាងលើនេះ សំរាប់ជាការបញ្ជាក់ឲ្យឃើញ
ភាពជាក់លាក់របស់ចលនាមួយៗ ក្នុងអក្សរសាស្ត្រខ្មែរ ។

រឿងទុំទាវអ្នកនិពន្ធប្រឌិតតាមបែបរឿងជាក់ស្តែង ក្នុង
តវត្សទី ១៥ គ្រាដែលខ្មែរមានរាជធានីនៅលង្វែក ។ តួអង្គ
ខាន់ៗ ក្នុងរឿងនេះមានទុំ និង ទាវ ជាដើម មិនមែនជាអង្គ
តាដែលព្រះនារាយណ៍បែងភាគឲ្យមកកើតនោះទេ ហើយ
មិនមែនជាអង្គព្រះពោធិសត្វ ឬ ព្រះនាងកខៃស្រពេជ ដែល
ចាប់ផ្លាស់ខ្លួនតម្កល់ស័យ ពោលគឺការកើតស្លាប់ក្នុងវដ្ត-
សង្សារ ដើម្បីប្រមូលកបារមី ឬ សាងសន្សំពោធិសម្ភារ
ឡើយ ។ ហេតុនេះហើយ បានជាទុំនិងទាវរមែងបានទទួល
ទុក្ខសោក ក្នុងជីវភាពខ្លួនដូចមនុស្សធម្មតា ពុំមានព្រះព្រហ្ម
ព្រះឥសូរ, ព្រះឥន្ទ្រ ឬ ទេវតាណា តាមជួយតាមគាំពារឡើយ ។

កស្តុតាងជាក់ស្តែង ដូចគ្រង់គេនាំខ្ញុំទៅសំឡាប់ ៗ ប្រសិនខ្ញុំ
អវតារ ឬ ជាពោធិសត្វ ប្រាកដជាមានព្រះឥន្ទ ព្រះព
តាមជួយយកអាសាមិនខាន ៗ តែនេះ ខ្ញុំត្រូវស្លាប់ស្លូកត
អំពើលោភរបស់អាជូនទៅក្រោមដើមពោធិ ៗ មួយទៀ
ដំណើរតួរអង្គតាំងនេះ ក៏សុទ្ធតែជាគុនរបស់អ្នកស្រែអ្នកចំក
ក្នុងស្រុកខ្មែរ ដែលមាននាមស្រុកតាំងនោះប្រាកដរហូតដ
សព្វថ្ងៃ ៗ

មួយចំណែកទៀតក្នុងរឿងផ្កាស្រពោន គ្រង់នាងដែ
កើតទុក្ខដ្បិតព្រាត់គូកំណាន់ចិត្ត ហើយអង្គុយបន់ព្រះ
ប្រសិននាងជាកែឲ្យសពេជ្ជ ជាក់ជាវត្ថុសក្តិសិទ្ធណាមួយ
ផ្តាលទីងបំណាននាងមិនខាន ៗ ហើយចុងបំផុត ប្រាក
ជានាងមិនស្លាប់ខ្លួន ទុកឲ្យ ប៊ុនធឿន សោកសង្រេងដូ
មនុស្សធម្មតាឡើយ ពោះបើជាសោកខ្លះក៏គង់ដល់ទីបំផុត ប្រ
តែបានជួបជុំគ្នាវិញជាពុំខានឡើយ ៗ

## ៤_ចលនាអក្សរសាស្ត្របរទេសនិយម

ចលនាទីបួននេះ ជាចលនាចំឡែកដែលយើងពុំដែល
ឃើញមានក្នុងអក្សរសាស្ត្របូកណាទេ ទើបតែនៅគ្រាដែល
ប្រទេសយើងធ្លាក់ខ្លួននៅក្នុងក្រញាំពួកបស្ចិមប្រទេស ចំនួន
គមួយសតវត្សរ៍ ទើបមានចលនានេះ ជ្រាបចូលមកក្នុង
ត្តានចិត្តបណ្ដាជនខ្មែរ ដែលពុំទាន់មានមូលដ្ឋានស៊ប់ក្នុង
ធម៌ជាតិដែលធ្លាប់មានដម្កល់តាំងពីដើមមក ។ ចំពោះខ្មែរ
កមានសតិអារម្មណ៍ល្អ មានគំនិតជាខ្មែរពិតប្រាកដ ពុំមាន
ភ្លឹតភ្លើនចិត្ត ទៅតាមចលនាចំណូលថ្មីនេះឡើយ ។

ចលនានេះ ស្ថិតនៅក្នុងសៀវភៅរឿងទាំងឡាយណា
ដលសរសេរហួសពីទំលាប់របស់ជាតិ ដែលធ្លាប់មានមក
កំពុងតែបោះជំហានជឿនលឿនទៅមុខ រៀងរាល់ពេល ។
ាមសេចក្ដីថាជា ចលនាអក្សរសាស្ត្រសម័យថ្មីម្យ៉ាង ដែល
ពាលតែពីសេចក្ដីសប្បាយភ្លេចខ្លួន គឺសប្បាយក្នុងការកំរែក,

ស៊ីផឹកតាមទៀមសុក, ល្បក់កៃកើដោយកាមកិលេសគ្រប់បែ
គ្រប់យ៉ាង ហើយក្នុងនោះពុំមាននិយាយពីសេចក្ដីរលឹកដល់
គៀនវិញឡើយ គិតធ្វើយ៉ាងណាឲ្យតែឃើញថាការសប្បា
នោះសប្បាយមែន គ្មានបញ្ហាគ្រោះថ្នាក់សោះ ។

ចលនាតាក្រក់នេះ ចូលមករកកន្លងអក្សរសាស្រ
យើងគស់រយៈកាលដ៏ខ្លីមួយដែរ ប៉ុន្តែត្រូវមតិអ្នកគាន ធា
សតិសម្បជញ្ញៈទប់ទល់យ៉ាងខ្លាំងក្លា ទល់តែអន្តរធានទៅវិញ
ក្នុងឆ្នាំ ១៩៥៨ ។

យើងសូមបញ្ជាក់ថា បានជាដាក់ថា ចលនាបរទេស
និយម ព្រោះការនិយមគំនិតក្នុងនេះ ពិតជាផុះឡើងដោយ
សារអ្នកបរទេសសាបព្រោះពូជក្នុងស្រុកយើង គឺយើងនិយាយ
សំដៅតែខាងគំនិត តាក្រក់ល្បក់ក្នុងកាមកិលេស ឥតហេ
ផលប៉ុណ្ណោះ ពុំមែននិយាយដល់បច្ចេកទេសទំនើបយ៉ា
ល្អ ៗ ដែលបរទេសផ្ដល់មកឲ្យយើងនោះឡើយ ។



## ជំពូកទីមួយ

# សោភ័ណនៃអក្សរសាស្ត្រខ្មែរ

ដែលនឹងរាប់បាន ថាជាអក្សរសាស្ត្រមួយប្រកបដោយលក្ខណៈគ្រប់គ្រាន់ លុះត្រាតែក្នុងអក្សរសាស្ត្រនោះមានលំអ គួរជាការពិនិត្យយ៉ាងជាប់ចិត្តផង ។ អក្សរសាស្ត្រខ្មែរយើង មានសោភ័ណច្រើនយ៉ាងណាស់ ដែលបន្ទាប់ទៅនេះយើងគ្រាន់តែលើកយកគោលសោភ័ណខ្លះ ១ ជាគំរូមកបញ្ជាក់ បង្ហាញអ្នកសិក្សារបស់យើងឲ្យបានយល់ ហើយបង្កើតបានជាសេចក្ដីពេញចិត្តនឹងអក្សរសាស្ត្រខ្លួនគេទៅ ។

### ១– សោភ័ណខាងសូរសំឡេង

វិធីតានរបស់ខ្មែរយើង មានលក្ខណៈប្លែកជាងវិធីតាន

របស់ជនជាតិនានា ៗ ក្រៅពីពាក្យពេចន៍ដែលខ្មែរបានយក
លំនាំតាមការសន្ធានគ្នាជាធម្មតា បុព្វបុរសយើងបានបង្កើតជា
បទបែបផ្សេង ៗ គ្នា សំរាប់ឲ្យយើងអានក្នុងវណ្ណកម្មរបស់
លោក បានគ្រប់ដូចកាយវិការនៃតួទាំងឡាយ ដែលកំពុងតែ
មានសកម្មភាពនោះថែមទៀត ៗ ដូចនេះ កំណាព្យខ្មែរ
យើងមិនត្រឹមតែប្ដូរត្រង់ការចាប់ចួន ច្រើនមាត់ប៉ុណ្ណោះទេ
ថែមទាំងពត់សំឡេងសូរសំនៀង ឲ្យក្រោកដួលទៅស្របនឹង
កាយវិការផង ៗ ឧបមាថា បើយើងអានក្នុងពេលដែលតួរឿង
កំពុងកើតទុក្ខ យើងក៏ត្រូវធ្វើបទជំអួញជំណាងសេចក្ដីទុក្ខ
នោះ ៗ បើយើងអានក្នុងរឿងសប្បាយ សំឡេងយើង
ក៏ពត់បែរទៅតាមភាពសប្បាយនោះដែរ ៗ ត្រង់ហ្នឹងហើយ
ដែលចិត្តកវីខ្មែរ បានកសាងបទបែបច្រើនឲ្យមានលក្ខណៈ
ប្លែក ៗ ពីគ្នាដូចការសិក្សាតទៅនេះ ៖

ក- បទពំនោល.- បទពំនោលជាបទចាស់បុរាណ
ជាងគេ ៗ យើងប្រទះឃើញបទនេះមានមកតាំងពីសម័យ

អន្តរ ពាក្យឈ្មោះបទនេះសោត ក៏ជាពាក្យខ្មែរសុទ្ធ មានន័យថាជាសេចក្ដីពោល គឺជាសេចក្ដីបើកបទ ដែលយើងធ្លាប់ឃើញមានពោលក្នុងការសម្ដែងរបាំព្រះរាជទ្រព្យ ឬ ក្នុងល្ខោនខោល ។ ចំណោតមក អ្នកប្រាជ្ញបានទុកជាក់មកនេះ សំរាប់ប្រើក្នុងគ្រាមានកលិយុគ គឺមានការចលាចលរញ្ជួយរញ្ជួយ ដូចជាការផេរប្រទេច, ចំបាំងកាំងផល់, ព្យុះខ្យល់បោកបក់ ឬ ពាក្យតំហាកកំហែងជាដើម ព្រោះបទនេះមានសូរសន្ធាប់ខ្លាំង ៗ ។

១– បទព្រហ្មគីតិ.–ព្រហ្មគីតិជាភាសាបាលី ប្រែថាព្រះព្រហ្មច្រៀង ឬ ចម្រៀងព្រះព្រហ្ម ។ បទនេះមានសូរសំនៀងលន្លង់លន្លោចណាស់ ព្រោះជាបទដំណាងសេចក្ដីទុក្ខសោក, ការព្រាត់ប្រាសនិរាស ឬ ការថ្ងូរទុក្ខតាម-ទស្សនៈមួយ ។ ដូចកាលយើងឃើញបទនេះក្នុងសាស្ត្រាច្បាប់ទូន្មានខ្មែរ នេះច្រែហលជាអ្នកនិពន្ធ ចង់ឲ្យអ្នក

អាចធ្វើបទទំនួញ ដំណាលនូវសំដីចុងបំផុតរបស់លោកដែលផ្ដាំទូន្មានដល់កូនចៅ មុនគ្រាដែលអស់ជីវិតទៅ ។

ក– ប ទ កា ក គ តិ.– កាកគតិ ប្រែថា ដំណើរក្អែក ឬក្អែកដើរ ។ សូរសំនៀងនៃបទនេះ មានចង្វាក់ស្មើ ៗ សំ-នៀងមិនលើកមិនដាក់ តែរន្ធើន ៗ មានចំនង់ដូចក្អែកដើរ ។ បុកណាប្រើបទនេះ ក្នុងការសន្ទនាគ្នាធម្មតា, ក្នុងសេចក្ដីក៏យក៏បពតិមានផ្សេង ៗ ឬ ក្នុងសេចក្ដីផ្ដើមរឿងនិមួយ ៗ ។ យើងប្រទះច្បាប់ទូន្មានជាច្រើនដែលសរសេរជាបទកាកគតិ ។

ឃ– ប ទ ភុ ជ ង្គ លី លា.– ភុជង្គលីលា បានសេចក្ដីថា នាគដើរ ឬ នាគលូន ៗ បើយើងសង្កេតចំពោះសូរសំនៀងនៃបទនេះ មិនខុសពីឈ្មោះខាងលើនេះទេ ព្រោះសំនៀងបទភុជង្គទន់ភ្លន់អែនអន ផ្អែមល្ហែមណាស់ ចំនង់ដូចជាពស់លូន ឬ នាគដើរមែន ៗ បុកណាច្រើនប្រើបទនេះ ក្នុងការសប្បាយរីករាយ ដូចជាក្នុងការកប់រៀបព្រៃព្រឹក្សាលតាវល្លិ៍, សរសើរពីសំរស់នៃសួនច្បារ, ទឹកសមុទ្រ ឬ ធម្មជាតិដទៃ ៗ ទៀត ។

ង- បទបន្ទោលកាក.- ពាក្យបន្ទោលកាកនេះ ក្លាយមកពីពាក្យ មណ្ឌុកគតិ ដែលប្រែថា ដំណើរកង្កែប ឬ កង្កែបលោត ។ សំនៀងនៃបទនេះ យាវៗ ហើយ កញ្ឆក់ម្ដងៗ មានទំនងដូចកង្កែបលោត ហើយឈប់, ឈប់ ហើយលោតយ៉ាងនោះដែរ ។ បទនេះ សំរាប់ប្រើក្នុងសេចក្ដី ត្អើយធ្ងន់ធ្ងរកំប្លែងរកគ្នាក្រមាប់ក្រមើមចាំងឡាយ ៗ យើង សង្កេតឃើញច្រើនជាគួសក្ត ។

ច- បទពាក្យ ៧, ពាក្យ ៨, ពាក្យ ៩ - បទ ចាំងនេះ មិនឃើញមានក្នុងវណ្ណកម្មបុរាណ តាំងពីសម័យអង្គរ ឬ ខាងដើមសម័យកណ្ដាលឡើយ គេទើបតែឃើញមាននៅ ចុងបំផុតនៃសម័យកណ្ដាល គឺគ្រាដែលរាជធានីយើងនៅឧត្តុង្គ នឹងគ្រាលើកទីក្រុងពីឧត្តុង្គមកភ្នំពេញ ។ សូរសំនៀងបទ ចាំងនេះ មិនមានឯកភាពតែមួយទេ ច្រើនដេកជួលទៅតាម អ្នកអានដែលទំបំពត់សំឡេងឲ្យតិះកេះក្រចៃប្លែកៗពីគ្នា ។ ដំបូង យើងឃើញកំណាព្យពាក្យ ៧, ពាក្យ ៨ នឹងពាក្យ ៩ នេះ

ច្រើនមាននៅក្នុងបទចម្រៀង មានបទសេកកំចិជាដើម ។ ប៉ុន្តែក្រោយមក ដោយចិត្តករយើងប្រាថ្នាឲ្យវណ្ណកម្មនៃលោក ពិរោះពិសាដូចជាចំរៀងដែរ ទើបលោកយកបទទាំងនេះ មកប្រើក្នុងស្នាដៃជារឿងរ៉ាវផ្សេង ៗ

## ២ – សោភ័ណខាងសំនួនវោហារ

របៀបលេងសំនួនវោហារវិញ គឺបុព្វបុរសយើងប្រសប់ខាងធ្វើឲ្យអ្នកអានជក់ចិត្តណាស់ ដោយប្រើល្បិចផ្សេង ៗ ច្រើនបែបច្រើនយ៉ាងក្នុងសេចក្ដីរាប់រៀបពីទិដ្ឋភាព ឬ សេចក្ដីសន្ទនារវាងគ្នាមួយនឹងគ្នាមួយក្នុងអក្សរសាស្ត្រ ដែលយើងនឹងលើកយកលំអខ្លះ មកធ្វើជាឧទាហរណ៍ខាងក្រោមនេះ ៖

១ – ការរាប់រៀបទិដ្ឋភាពមាឌកាយវិការ

– រមាំងរមាំងមៀង – មើលកាល់កៀងគូក្រកាល
ធំស្មើនៅកណ្ដាល – ពលក្រោមម្ដង ១ ពោមួយ ៗ

( ព្រះឃ្លាំង-៤៦ )

– គជសារដើរដល់　　មៀនមើលទៅយល់
ព្រះពន្សព្ធា　　ឮខបក់ផន្ដជួញ
កន្ដួញហត្ថា　　ក្រោមគ្រុឧសិរសា
ផញ្ចួចឥតអាក់ ។

( កោសាធិបតី-កៅ )

– ស្ដេចក្រោយកៅចណ្ណាសរសេត្តិ　រូមណ្ណាលចក្រ
រំកាយព្រះករសោក ។

( ភមកេ្ល )

– សន្ទឹកផ្ដរត្រាំ　　ពាញដៃមកផ្ដាំ　　ក្រោមកេនរខេះ
បងផ្ដាំរួចហើយ បងទៀនផាយសេះ តាកកេនរខេះ
សេរស្រុខលៀនលច់ ។

( ចំរៀងខ្មែរ )

៤ – លំអត្ថន៏ការប្រៀបធៀប

– ខ្លួនប្អូនដូចឈើជាបន្ដង
ខ្លួនអ្នកប្រុសឈ្លងដូចឃ្មុំផង
មកទំផ្ញើសាំហើរជាមួង

ឈើសោតសៅហ្មងអសារទៅ
ខ្ញុំជាខ្លួនបងដូចដី
ខ្លួនប្អូនស្រស់ស្រីដូចអំពៅ
ដីបានផ្អែមមិនផលទៅ
ឆ្ងាយពីអំពៅទេខ្លួនណា ៗ

(ព្រះភិក្ខុសោម)

— ទុក្ខខ្ញុំទុក្ខរស់ទុក្ខវេរកម្ម
កប់ទុកកប់ផ្ទាំតែងវិតក្ក
រស់នៅជាមនុស្សមិនពេញមុខ
នេះទើបហៅទុក្ខជានិកក្រើ ៗ
កក្រើកើតទុក្ខទុក្ខសល់សែន
ទុក្ខមែនប៉ុន្តែទុក្ខនោះទ្វី
ទុក្ខខ្ញុំដល់អស់ផុតផែនដី
ដល់លាលោកក្តីមិនអស់ទុក្ខ ៗ

(ព្រះអង្គម្ចាស់ក្សត្រី ល.ន.)

៣- លំអក្នុងស្នូរសំនៀងរណ្តំគ្នា

– ពពេចពង់មៅពពាលខែ

ហើយហិចហើរហៅគ្នាគ្រសង

ពាំផ្កាពពាយកយរុះល្អង

ពពូលយំគងប៉ប៉ុកដី ។

ផ្ចិតកលកាយបានប្រាណមូលម៉ត់

ខែបង់ត្បាពកៅនាប្រិមប្រិយ

ស្រីស្រស់ស្រួចស្រេចដាប់លោកិយ

បានបង់ចមប៉ីហើយបែកបែរ ។

ម៉ុនភក្តីអក្សរ-គង់

– ចរបូលគតាំង ខល់ចំពាក់ផង យក្សយង់មោហា

វ័នខែខង់កយកំត គាប់កាត់យក្សា យក្សសោគមរណា

ឃ្លាតខ្ទុនខ្លាត់ខ្លាយ ។

(សន្ធរម៉ុក)

### ៤- លំអក្នុងការបង្ហាញតួអង្គ.-

លំអក្នុងការបង្ហាញតួអង្គ ក្នុងអក្សរសាស្ត្រខ្មែរយើ

ឃើញមានរបៀប ៣ យ៉ាងប្លែកពីគ្នាគឺ ៖

## ក_ អ្នកនិពន្ធជាអ្នកបង្ហាញ:

.... ស្ដេចមានមហេសី នាមកែវកាកី ល្អល្អ

«ឥតហ្មង់ ឥតមានស្រីណា សោភាដូចម៉ង់ សមសព្វគ្រ

«គេឡោមអស់ស្រី ។

(ព្រះបាទអង្គឌួង)

## ១_ តួអង្គមួយជាអ្នកបង្ហាញ:

.... ចាំទៅដល់ផ្ទះប្រាប់តាគ្រប់

តារនៅក្នុងមួប់សមស្រណោះ

ខានជាម្ដាយតារមានរបស់

កូនស្រស់រូបស្រេចជាប់ស្រីផង ។

(ព្រះភិក្ខុសោម)

គ_ តួអង្គបង្ហាញខ្លួនឯង:

– ខ្ញុំនេះជាក្សត្រសោយរាជ្យ
នាមព្រះព្រហ្មទត្តមានឫទ្ធិផង
មានតាំងប្រាសាទស្អាតកន្លង
ជាច្បងលើសលប់គតមនុស្ស ។

( អ្នកស្រី ស៊ិទ្ធិ )

- លំអក្នុងពាក្យកាំប្លែង -

. . . – រឿយនែអាបិតតាមួយគាត់
អាពិតកន្ត្រាក់បានសាច់ខ្លៃ
ទាញទាត់អោបខ្ទប់សាប់ញោបដៃ
រឿយៗលែងជាប់ប្រញាប់ឆាន ។

(សន្ធរ ម៉ុក)

. . . . – ខ្ញុំពោះម៉ាយ ស្ដាយមិត្តគិតទោបនាគ
ឯមេម៉ាយស្ដាយកន្ទេបខ្ទោបអ្នក

កាអាណោចខ្មោចយោយកយមាយក្បាក់
យាយញ័រញាក់ទឹក ខ្លាចផល់ខ្មោចកា ។

(ឧកញ៉ា នូ - កន)

-- កំពក់កំពីងលៅ      ទាំបំបះខ្នោះកន្ទៀតក្ដៅ
ទាំហើយហែលឆ្ពោះទៅ      បេះស្មឹកអំពៅធ្វើជាចាំ ។

(អាលប៊ូណ៍–ប៉ែន)

## ៣– សោភ័ណខាងគំនិត _

ក្រៅពីសោភ័ណខាងសូរសំនៀង និង សោភ័ណខា
សំនួនវោហារមក យើងឃើញមានក្នុងអក្សរសាស្ត្រខ្មែរមា
សោភ័ណខាងគំនិតទៀត ។

យើងលើកយកគោលខ្លះ ៗ មកបញ្ជាក់ក្នុងទីនេះដូច
ក្រងនិក្ខេបបទរបស់អ្នកនិពន្ធនិមួយ ៗ ដែលខ្លួនប្រកាន់យ
គ្រង់ណាហើយ លោកប្រឹងលាតត្រដាងយោបល់នោះ ល
គ្រាតែអ្នកអានបានយល់ច្បាស់ទើបលោកសុខចិត្ត ។ ...

ណ៍ដូចជារឿងក្នុងពុទ្ធនិយម ដែលលោកលើកយកកម្ម
រធ្វើជាធំ ៗ លោកមិនភ្លេចសោះទេត្រង់កម្មពៀរវេនអកុ-
ល ដែលតែងតាមដាន់ឲ្យលំបាកវេទនានៅទីបំផុត ឯផល
អំពើល្អវិញ លោកតែងលាតត្រដាងពីផលដ៏ល្អត្រកាល
ៅទីបំផុតដែរ ៗ

មានតួដែលប្រកបដោយលក្ខណៈប្លែកពីគ្នា តាមបរិយា
ស់ខ្លួន ដូចជាតួស្តេចមនុស្ស, ទេវតា តែងតំណាង
ភាវៈល្អ ៗ ឯតួយក្ស សត្វសាហាវ ឬ ចោរកំណាច ជា
ណាងសភាវៈអាក្រក់ កាចឃោរឃៅគ្មានធម៌មេត្តាក្នុងខ្លួន
ឡើយ ៗ ដូចនេះ យើងឃើញជាក់ថា ការដែលអ្នកនិពន្ធ
មសរសេរមានយក្សក្នុងតួអង្គអក្សរសាស្ត្រនោះ គ្រាន់តែ
តំណាងសភាវៈកាច, អាក្រក់, អ្នកគ្មានមេត្តាធម៌ប៉ុណ្ណោះ
មែនជារូបមានមែនជាក់ប្រាកដឡើយ ៗ ដូចនេះហើយ
បអ្នកនិពន្ធរាប់រៀបពីរូបរាងយក្សនោះអាក្រក់ក្រៃលែង ទាំង
ងកាយ ទាំងចរិតការសំដីរោហារ ៗ

លំអមួយផ្នែកទៀត គ្រង់មានការប្រដៅខ្លួនដល់មនុ
មានទ្រព្យច្រើនហើយកាចអធម៌ ច្រើនមើលងាយមនុ
ថោកទាបជាងខ្លួន នឹងប្រើការលោភលើជនប្រភេទ
ជាដើម ។ លោកបានលាត្រដាងនៃរឿងគ្រង់កន្លែង
ឲ្យឃើញថា កាលណាមនុស្សប្រកាន់យកបុគ្គល ធ្វើ
មើលងាយគេនេះ ប្រាកដជាត្រូវអំពើសប្បុរស — យុត្តិ
មានជ័យជំនះលើជាមិនខាន ។

ដូចជារឿងសន្ធិសិល្បជ័យ គ្រង់កូនស្តេចចិត្តកំណា
ទាំង ៥ នាក់ទៅបោកបញ្ឆោតសន្ធិសិល្បជ័យឲ្យស្លាប់បង់ជី
នឹងយកកេរសម្បត្តិ ។ តែដល់ទីបំផុតត្រូវសន្ធិសិល្បជ័យល្បួ
វិញ ក៏ចាប់យកមនុស្សកំណាចទាំងនោះមកផ្តាញ់ផ្គាល ។

រឿងស្រទបចេក គ្រង់សេដ្ឋីធ្វើបាបស្រទបចេកនឹងម្តា
ឲ្យចាល់តែម្តាយនោះស្លាប់ ។ ដល់ទីបំផុតស្រទបចេកបា
គ្រងរាជ្យ បានទាំងកូនសេដ្ឋីធ្វើប្រពន្ធទៀត ក៏ចាប់សេ
មកធ្វើទោសឲ្យកន្ធាល ។

រឿងព្រះចិនវង្ស ត្រង់ព្រះបាទសាមលមើលឆាយព្រះ
នវង្សដែលក្លែងខ្លួនជាមនុស្សឃ្លង់ ។ លុះដល់ឆ្លើយប្រស្នា
ះឥន្ទមិនរួច ក៏ត្រូវតែពឹងដល់មនុស្សឃ្លង់នោះវិញ ។

ឧទាហរណ៍ទាំងប៉ុន្មានខាងលើនេះ បញ្ជាក់ឲ្យដឹងថា
អក្សរសាស្ត្រយើង ពិតជាចេះបំពួនគោលគំនិតរបស់
ហាគុណក្នុងរឿងទាំងនោះជាច្រើន ពុំមែនគ្រាន់តែជារឿងបំ
អារម្មណ៍ទេ គឺមានបញ្ហាសំរប់ជួយដោះស្រាយគតិការក្រក់
របស់មនុស្សជាច្រើនអន្លើដែរ ។





## ជំពូកទីប្រាំ

# អក្សរសាស្ត្រចែកជាសម័យ

ដើម្បីឲ្យងាយសិក្សាពីប្រវត្តិហូរហែវែងឆ្ងាយ នៃអក្ស
សាស្ត្រ តាំងពីពេលកើតបានជារូបការហូតដល់គ្រាបច្ចុប្ប
នេះ យើងចែកសម័យធំ ៗ ជា ៥ សម័យគឺ ៖

១– សម័យមុនអង្គរ,

២– សម័យអង្គរ,

៣– សម័យកណ្ដាល,

៤– សម័យអាណាព្យាបាល,

៥– សម័យបច្ចុប្បន្ន,

## ១_ សម័យមុនអង្គរ

សម័យមុនអង្គរ កប់តាំងពីប្រទេសខ្មែរ ចាប់កសាងអារ្យធម៌របស់ខ្លួន គឺពេលដែលចាប់ផ្តើមមានប្រវត្តិសាស្ត្រជាដំបូងតាំងពីសតវត្សទី ១ នៃគ្រិស្តសករាជ រហូតដល់ចុងសតវត្សទី ៨ ។ គ្រានោះព្រះបឋមក្សត្រខ្មែរ គឺព្រះបាទកៅណ្ឌិន្យ ទ្រង់បានដឹកនាំអារ្យធម៌ឥណ្ឌាផ្នែកខាងត្បូង មកសាបព្រោះលើប្រទេសយើង ដែលមានអក្សរសាស្ត្រជាអាទិ ហើយទ្រង់បណ្តុះបណ្តាលនូវពូជពារទាំងនោះ ឲ្យកើតកាលកលគុត្ត សាយភាយទៅគ្រប់និគមជនបទ នៅក្នុងដែនដីយើង ។ មិនតែប៉ុណ្ណោះ ទ្រង់បានបន្តនូវព្រះរាជសន្តតិវង្ស ដើម្បីពង្រីកនូវអារ្យធម៌ទាំងនេះ មានរស្មីកាន់តែភ្លឺស្វាងឡើងសំរាប់ជនខាងក្រោយទៀត ។ បានសេចក្តីថា៖ កាលនោះអក្សរសាស្ត្រខ្មែរ ស្ថិតនៅក្នុងពេលកសាងនៅឡើយ តែតែងបានគព្ភប្រទះនឹងភ័ព្វសនាល្អ គឺសេចក្តីចំរើនជាលំដាប់ ។ ប៉ុន្តែអក្សរសាស្ត្រខ្មែរជំនាន់នោះ មាននិន្នាការសំស្ក្រឹតគ្រប

ផណ្ដប់ជានិច្ច ព្រោះលទ្ធិព្រហ្មញ្ញសាសនានិងពុទ្ធសាសនាបែប
មហាយានកំពុងលាតសន្ធឹងអានុភាពនៅក្នុងប្រទេសយើង ។
លទ្ធិទាំងនោះ សុទ្ធតែមានសំស្ក្រឹតជាមូលដ្ឋាន ។

## ២_ សម័យអង្គរ

ដែលហៅថាសម័យអង្គរក្នុងទីនេះ គិតចាប់តាំងពីសត
វត្សទី ៩ ដែលព្រះបាទជ័យវរ្ម័នទី ២ បានចាប់កសាងទីក្រុង
ថ្មីនៅអង្គរ ក្នុងភូមិភាគខាងជើងបឹងទន្លេសាប រហូតដល់ចុង
សតវត្សទី ១៤ គ្រាដែលព្រះបាទស្រីសុរិយោពណ៌ទី ២ ទៅ
ពញាយ៉ាត លើកទីក្រុងពីអង្គរមកកសាងនៅទន្លេបួនមុខវិញ ។
សម័យនេះ អក្សរសាស្ត្រខ្មែរក៏បានចំរើនលូតលាស់ទូលការ
រុងរឿងយ៉ាងខ្ពស់បំផុត ព្រោះបុព្វបារមីរបស់ប្រទេសកំពុងស្ថិត
ក្នុងជោគជ័យដ៏ថ្កុំថ្កើង ។ អាណាចក្របានរីកទូលាយ ជា
គ្រឿងបើកអំណាច ឲ្យអក្សរសាស្ត្របានហូរហៀរពេញពោ
ផ្សាយគ្រប់ទិសទីក្នុងបូរីនិងស្រុកតូចតាច ព្រមទាំងប្រទេស
ចំណុះខ្លះផង ។ ឯអ្នកប្រាជ្ញកវីបណ្ឌិត ក៏កើតមានឡើង

ជាច្រើន ព្រោះតែបានទទួលការនិយម រាប់អានពីគ្រប់មជ្ឈដ្ឋាន ហេតុតាំងពីរាស្ត្រប្រជា ដល់នាម៉ឺនសព្វមុខមន្ត្រីដែលមានឋានៈខ្ពស់ៗ ជាពិសេសគឺព្រះមហាក្សត្រដែលព្រះអង្គតែងសព្វព្រះរាជហឫទ័យ សន្តោសប្រោសប្រាណរាប់អ្នកប្រាជ្ញសព្វមុខវិជ្ជា មានវិជ្ជាអក្សរសាស្ត្រជាដើមៗ ហើយព្រះអង្គតែងប្រោសមេត្តា តែងតាំងអ្នកប្រាជ្ញអក្សរសាស្ត្រទាំងនោះ ឲ្យមានគោរមងារ ឬឋានៈខ្ពង់ខ្ពស់ សំរាប់ចេញចូលគាល់ហៅព្រះអង្គ គ្រប់ពេលដែលទ្រង់ត្រូវការផងៗ នៅខាងដើមនៃសម័យនេះ អក្សរសាស្ត្រខ្មែរ ត្រូវនៅក្នុងឥទ្ធិពលនៃភាសាសំស្ក្រឹតដូចសម័យមុនអង្គរដែរ ប៉ុន្តែមកដល់ផ្នែកខាងចុង ទើបភាសាបាលីមានអានុភាពលាតសន្ធឹងក្នុងអក្សរសាស្ត្រយើងវិញ ដ្បិតសម័យនេះ ព្រះមហាក្សត្រគឺឯបណ្ដាជនទាំងឡាយបានវិលមកគោរព លទ្ធិពុទ្ធសាសនាបែបហីនយានវិញហើយ ហើយលទ្ធិពុទ្ធសាសនាបែបហីនយាននេះ សុទ្ធតែមានគោលចារិកជាភាសាបាលីទាំងអស់

ដូចយើងឃើញកើតមានដំណាលនៅសល់ហូតដល់សព្វថ្ងៃនេះ ។

## ៣_ សម័យកណ្ដាល

សម័យនេះមានរយៈកាលវែងឆ្ងាយណាស់ កប់តាំងពីសត
វត្សទី១៥ គឺបន្តពីពេលបាក់បោលក្រុងអង្គរ ហូតដល់សតវត្ស
ទី១៩ នៅគ្រាដែលហៀបនឹងបាក់បោលក្រុងចតុមុខ ។ មានព្រះ
មហាក្សត្រជាច្រើនអង្គ បានគ្រប់គ្រងកដសម្បត្តិនៅកដ់ង
ជាច្រើនកន្លែង ដូចជានៅ ស្រីសឈរ, ល្វាឯម, កោះឃ្លោក,
ចតុមុខមានជ័យទីងលង្វែកជាដើម ដែលមានករបណ្ដាក់ជាច្រើន
កើតឡើងបន្ទាប់គ្នា តាមលំដាប់កាលជាហូរហែ គឺលើកពីក្រុង
មួយទៅក្រុងមួយនាំយកតាំងពូជជាទីងមូលដ្ឋានអក្សរសាស្ត្រ
ទៅផ្សាយតាមទីកន្លែងទាំងនោះ ឲ្យប្រជាពលរដ្ឋដក់ចិត្តដក់
គំនិតក្នុងស្នេហណ្ហកយ នៃអក្សរសាស្ត្រតាំងពីគ្រានោះមក ។
កស្តុតាងជាក់ស្តែងជាស្នាដៃអក្សរសាស្ត្រក្នុងសម័យនេះ ទុក
កើតឲ្យយើងជាច្រើនអនេកគឺសាស្ត្រារឿងកាំ ឬ ច្បាប់ទំលាប់

ផ្សេងៗ សុទ្ធតែកើតឡើងក្នុងពេលនេះ ដោយសារកវីបណ្ឌិត
ច្រើនរូប ហើយជាសំខាន់បំផុត មានព្រះរាជាច្រើនព្រះអង្គ
បានយកព្រះរាជហឫទ័យទុកដាក់ជួយឧបត្ថម្ភពេញព្រះកាយ-
ពលទាំងមានស្នាព្រះហស្តទុកកេរ្តិ៍ឲ្យយើង ដូចជាព្រះបាទ
ជ័យជេដ្ឋា, ព្រះស្រីធម្មរាជាព្រះរាជសម្ភារ, ព្រះបាទអង្គចន្ទ
ទាំងព្រះបាទសម្ដេចហរិរក្សរាមាធិបតីព្រះអង្គឌួងជាដើម ។ ក្នុង
ពេលនោះប្រទេសយើង បានចាក់ឫស លទ្ធិពុទ្ធសាសនាបែប
ហីនយានយ៉ាងមាំមួនហើយ ។ បណ្ដាជនគ្រប់ប្រភេទសឹង
តែគោរពលទ្ធិនេះតែមួយគ្រប់ ៗ គ្នា ។ ព្រះរាជាគ្រប់ព្រះអង្គទ្រង់
តែគោរពលទ្ធិសាសនាព្រះពុទ្ធតាមបែបតែមួយ ហើយទ្រង់តែង
ជួយឧបត្ថម្ភដល់ព្រះសង្ឃទាំងវត្តអារាមទាំងឡាយ ឲ្យកាន់តែ
មានច្រើនឡើង ៗ ។ សម័យព្រះសង្ឃទាំងនោះ ជាអ្នកគ្រូ
ហាត់វិជ្ជាអក្សរសាស្ត្រយ៉ាងជិតដល់ណាស់ផង វណ្ណកម្ម
របស់ពុទ្ធបុរសយើងក៏កាន់តែមានសិរីភាពមាំទាំ សំរប់បំពេញ
កិច្ចក្រៃការ របស់ជនខ្លួនទៅក្នុងប្រទេស ។ បើយើងសង្កេតឲ្យ

ច្បាស់លាស់ទៅ ព្រោះនោះមានតែវត្តអារាមនេះឯង ជាសាលាទិសាបាមោក្ខ គឺជាទីប្រជុំនៃចំណេះវិជ្ជា គ្រប់បែបគ្រប់យ៉ាង ។ អ្នកណាចង់មានចំណេះជាក់ខ្លួន ឬចង់កសាងខ្លួនឲ្យទៅជាមនុស្សចេះដឹង ត្រូវតែទៅនៅជ្រករៀនសូត្រជាមួយព្រះសង្ឃតាមវត្តអារាមទាំងនោះជានិច្ច ។ ព្រោះគម្ពីរសាស្ត្រទាំងឡាយដែលជាមូលដ្ឋានរបស់វិជ្ជា សុទ្ធតែមានដំកល់ទុកនៅវត្តអារាមនោះឯង ។ ដោយហេតុសម័យនោះមានការសិក្សាជាឯកភាពដូច ៗ គ្នាពាសពេញប្រទេស ព្រោះមានគោលចារិកតែមួយផ្សាយចេញទូទៅទូរស្មើជាយូរអង្វែងឆ្នាំ ដូចពោលមកខាងលើនេះហើយ ទើបប្រទេសយើងបានចំរើនលូតលាស់ខាងអក្សរសាស្ត្រលើសសម័យមុន ៗ ព្រោះអក្សរសាស្ត្រ គេត្រូវរៀនជាបឋម គឺជាកាតព្វកិច្ចមួយសំរាប់ឲ្យគេមានមូលដ្ឋានខាងចំណេះប្រាជ្ញា ដើម្បីនឹងបន្តវិជ្ជាទៅកាន់ទីខ្ពង់ខ្ពស់ថែមទៀត ។

## ៤_ សម័យអាណាព្យាបាល

សម័យនេះជាសម័យខ្លីបំផុត គឺវែងជាង ៨០ ឆ្នាំប៉ុណ្ណោះ ។

គារនោះប្រទេសយើង ស្ថិតនៅក្នុងអាណាព្យាបាលរបស់ពួក
ស្ចិមប្រទេស ។ អក្សរសាស្ត្រនិងវប្បធម៌យើងសម័យ
នះ មិនសូវបានរីកសាយតាមចំណង់ដូចពីមុនមកទេ ព្រោះ
ណាចវប្បធម៌របស់បស្ចិមប្រទេសមានអានុភាពជាង បាន
លមកគ្របដណ្តប់វប្បធម៌យើងឲ្យនៅស្ងប់ស្ងាត់មួយពេល ។
តែការស្ងប់ស្ងាត់នេះ មិនមែននៅឈឹងស្ងួនទេ មានកវី
បណ្ឌិតជាច្រើនរូប បានប្រឹងប្រែងឆ្លៀតពេលតុបតែងរឿងក៏វ
ជាស្នាដៃល្អ ៗ ទុកឲ្យយើង បានន័យថា លោកបានចិញ្ចឹម
អក្សរសាស្ត្រ ដែលធ្លាប់មានមកតាំងពីព្រេងនាយឲ្យនៅ
គង់វង់ដរិតតទៅទៀត កុំឲ្យសាបសូន្យតាមការដែលគេគ្រ-
ឲ្យកមើលដោយឥតពិចារណានោះឡើយ ។ ចំណែកព្រះ
សង្ឃដែលជាមេឃ្លាំងវិជ្ជានេះ ក៏ប្រឹងរក្សាម៉ឹងម៉ាត់មិនព្រម
ឲ្យក្បួនខ្នាតតាំងនោះខ្ចាត់ខ្ចាត់ទៅណាបានឡើយ ទោះបីជា
បានទទួលការនិយមក្តី ឬមិនបានទទួលក្តី ក៏លោកនៅតែ
ប្រឹងរក្សាដដែល បានសេចក្តីថា ទោះបីជាអក្សរសាស្ត្រនេះ

មិនបានលេចឡើងក្នុងមជ្ឈដ្ឋានជាផ្លូវការក៏ដោយ · ព្រះសង្
នៅតែថែទាំ និងផ្សាយបានខ្លះៗ តាមដោយអ្នកស្រុកជិតខា
ដែលជាសិស្សគណរបស់លោក ៗ ចាប់តាំងពីពាក់កណ្ដាល
សម័យនេះយើងប្រទះឃើញ មានការបោះពុម្ពផ្សាយសៀ
នៅផ្នែកពុទ្ធសាសនាជាច្រើនក្បាល និងផ្នែកស្រាវជ្រាវអក្ស
សាស្ត្រជាច្រើនណាស់ដែរ ព្រោះសម័យនេះគេបង្កើតឲ្យមាន
ជាអក្សរពុម្ពសំរាប់ប្រើប្រាស់តាមបែបសម័យនិយម ៗ ដែ
ទោះបីជាមានពុម្ពអក្សរនិងការប្រមូលប្រជុំអ្នកប្រាជ្ញរាជបណ្ឌិ
ខ្លះហើយ ប៉ុន្តែលក្ខណសម្បត្តិរបស់អក្សរយើង នៅតែ
មិនបានស្ថិតនៅក្នុងមជ្ឈដ្ឋានផ្លូវការនៅឡើយ ដូច្នេះក៏មិន
បានជាកាតព្វកិច្ចម៉ឺងម៉ាត់ឡើយ ៗ នៅចុងសម័យនេះ
យើងបានទទួលដោយល្អមួយយ៉ាងសំខាន់ គឺយើងកើតបាន
«វចនានុក្រម» ដែលជាមេពាក្យធ្វើជាគោលចារិកនៃពាក្យ
ទាំងឡាយ សំរាប់ឲ្យយើងចេះសរសេរ ឬ ដឹងរបៀបសរសេរ
ឲ្យត្រឹមត្រូវតាមអក្ខរាវិរុទ្ធ ជៀសវាងពីការកាំងក្លាក់ដែលធ្លាប់

នមកពីមុន ៗ ក្រោយពីនេះមានការប្រជុំបណ្ដាអ្នកប្រាជ្ញ
ងអក្សរទើងខាងពុទ្ធសាសនា ធ្វើជាក្រុមមួយសំរាប់តាក់តែង
ស្រាវជ្រាវទើងរៀងផ្ដាក់ក្បួនច្បាប់ ព្រមទាំងបានបោះពុម្ព
យខ្លះផង ៗ

## ៥_ សម័យបច្ចុប្បន្ន

ដែលហៅថាសម័យបច្ចុប្បន្នកាលគ្រានេះ គឺសម័យដែល
ទេសយើងបានដកខ្លួនចេញពីអាណាព្យាបាល នៃបស្ចិម
ទេស ៗ តាំងពីពេលនោះរហូតមកដល់សព្វថ្ងៃនេះ ប្រទេស
ើងបានលូតលាស់ខាងការផ្សាយសៀវភៅគ្រប់ជំពូក តែ
ច្រើនជាងគេបំផុត គឺសៀវភៅប្រលោមលោក ៗ មានអ្នក
ាន្តជាច្រើនឈ្មោះ ប្រឹងចំណាយពេលរៀបចំចងក្រងរឿង
ងក៏ថ្មី ៗ ដែលប្រឌិតឡើងដោយផ្ទាល់ខ្លួនសំរាប់បំពេញ
អ្នកអាន ៗ ទោះបីជាមិនសូវបានបរិបូណ៌ខាងផ្លូវគំនិត
ខាងរបៀបសរសេរក៏ដោយ អ្នកនិពន្ធនីមួយ ៗ សុទ្ធតែ

គេស្មោះនោះទេ លោកបាននាំគ្នាប្រឹងកែប្រែបន្តិចម្តងៗ
មានសណ្ឋានមួយដែលជាពិសេសសំរាប់ជាតិរបស់ខ្លួនៗ គឺ
មានលក្ខណៈជាតិសេស អាចឲ្យជនទូទៅស្គាល់បានថា
ពិតជារបស់ខ្មែរមែនៗ [illegible]
មកហើយៗ កើតដំណែលសម័យនោះ យើងយ
ស្គាល់បានដោយសារមានចារនៅលើផ្ទាំងសិលា ដែលជា
ហារៈមួយគង់ទ្រង់នៅបានយ៉ាងយូរៗ ពាក្យពេចន៍ គឺសំ
ប្រើប្រាស់របស់ជនជាតិយើងសម័យនោះ ច្រើនលំអ
តាមទំនោរភាសាសំស្ក្រឹត ព្រោះកាលនោះភាសាសំស្ក្រឹ
បានលាតសន្ធឹងអំណាចពាសពេញដែនដីយើង ផ្សេងកា
នេះផ្តិតជាប់នៅក្នុងលទ្ធិសាសនាព្រាហ្មណ៍ និងពុទ្ធសាសនា
បែបមហាយានៗ ខ្មែរយើងកាលនោះ សុទ្ធសឹងតែគោរ
លទ្ធិសាសនាព្រាហ្មណ៍ជាភាគច្រើន និងពុទ្ធសាសនាមហា
យានខ្លះៗ ព្រោះជនជាតិឥណ្ឌាត្រកូលកោណ្ឌិញ្ញ ដែលបា
មកបោះជំរុំយ៉ាងស៊ប់សួនលើដែនដីគោកធ្លកនោះ សុទ្ធតែ

...ការពេទឹងទិយេមសាសនាទាំងពីរខាងលើនេះទាំងអស់គ្នា ។

តទៅនេះ  យើងសូមជូនសេចក្ដីដកស្រង់ពីសិលាចារឹក ...ណាមួយជាភាសាសំស្ក្រឹតតែប្រែជាភាសាខ្មែរ  សំរាប់ជា ...ការប្រៀបធៀបកំពស់អក្សរសាស្ត្រសម័យមុនអង្គរ និងសម័យ ...យើងក្នុងបច្ចុប្បន្ន ។  សេចក្ដីដកស្រង់នោះយើងបានស្រង់ ...ចេញពីសៀវភៅ «ពុទ្ធសាសនា ២៥០០» ជាសេចក្ដីប្រែរបស់ ...ព្រះភិក្ខុប៉ាង-ខាត់  ដែលបោះពុម្ពផ្សាយក្នុងឱកាសបុណ្យ ...ស ២៥០០ មានសេចក្ដីដូចខាងក្រោម ៖

... . ព្រះរាជាទ្រង់បានប្រកាសក្នុងកងសភាថា បុរប្រ- ...ជាជនក្រេបផឹកនូវទឹកអម្រឹត គោលគឺព្រះបន្ទូលព្រះពុទ្ធ ...ជាវង្សនៃព្រះពុទ្ធស្រីមារៈ  ទ្រង់បានជាកិត្តិយសនៃរាជវង្ស ស្រីមារៈ  ទ្រង់បានប្រកាសក្នុងកណ្ដាលជំនុំជននូវព្រះរាជ បន្ទូលសូរសីហនាទជាប្រយោជន៍ដល់ប្រជាជនទាំងឡាយ ទ្រង់ជាករុណាទាំងពីរដ៏ប្រសើរ  ទ្រង់ប្រចាំលើសិង្ហាសនៈ ហើយទ្រង់ឈ្វេងយល់នូវគតាគតិ  គឺការអន្ទោលស្លាប់កើត

„ នៃមនុស្សលោក ទើបត្រាស់ថា „កាលបើកូនខ្ញុំ បន្ទ
„ ខ្ញុំក៏ មិនមែនអ្នកកន្ទៀតទេ បានសម្រេចបំណងអ្នកហើ
. ខ្ញុំសូមឱ្យបែកសព្វគ្រប់ទាំងអស់ ព្រោះមាស សង្ហ
„ អសង្ខារមគ្គ នោះប្រើជាគ្រឿងសក់បជាទីគោរព ខ្ទង់
„ ប្រយោជន៍ដល់សត្វលោកទាំងឡាយ ។ នេះជាសេច
„ បញ្ជាក់របស់ខ្ញុំ ។ សូមព្រះរាជាទាំងឡាយនៅក្នុងអនាគ
„ ប្រតិបត្តិតាមបញ្ជាខ្ញុំនេះកុំបីខាន ។

. . . . . . . . . . . . . . . .

សេចក្ដីដកស្រង់របស់យើងខាងលើនេះ ជាស្នាព្រះហ
របស់ព្រះរាជាខ្មែរមួយអង្គកាលពីក្នុងសតវត្សទី ៣ នៃគ្រិស្ត
សករាជ គឺព្រះបាទ „ស្រីមារៈ„ ដូចភស្តុតាងបញ្ជាក់ព្រះខា
ព្រះអង្គក្នុងអត្ថបទខាងលើស្រាប់ ។ សិលាចារឹកនេះគេប្រ
ឃើញនៅឯវ៉ូកាញ់ ក្នុងខេត្តញ៉ាត្រាំង (ប្រទេសវៀតណាម
ដែលពីដើមទីនោះជាការណាខេត្តខ្មែរមួយដែរ ។ សេច
បរិយាយរបស់សិលាចារឹកនេះ ជាព្រះរាជបន្ទូលរបស់ព្រះបា

រីមារៈ គឺព្រះបាទហ្វាន់-ម៉ែន ដែលឯកសារចិនបានថ្វាយ
ះនាមព្រះអង្គតាមសំនួលភាសាចិនថា „ហ្វាន់-ចេម៉ែន„ ។ គង់
ដែលព្រះអង្គបានឡើងគ្រងរាជ្យហើយ គឺបាត់ចែងរៀប
ហង់សិលាចារឹកនេះ ទុកជាដំណាងព្រះរាជឧត្តមគតិរបស់
ះអង្គ ។ បានសេចក្តីថា៖ ព្រះបាទស្រីមារៈជាបឋមវង្សនៃ
ត្រខ្មែរ មានព្រះរាជហឫទ័យព្រះថ្លាទ្រង់តែងសន្តោសដល់
ជាពលរដ្ឋទូទៅគ្រប់ប្រភេទ ដោយទ្រង់យល់ច្បាស់នូវធំ-
ភីរ គតាគតិ ការវិលកើតវិលស្លាប់របស់មនុស្សក្នុងកាល
សង្គ្រា ។ ទ្រង់បានបរិច្ចាគព្រះរាជទ្រព្យធ្វើជាទានដល់
ធារណជន ។ មិនតែប៉ុណ្ណោះ ទ្រង់បានត្រាស់ផ្តាំផ្ញើដល់
ះរាជាជាជំនាន់ក្រោយៗមក សូមឲ្យទ្រង់មានព្រះមេត្តាធម៌
ព្រះអង្គដែរ ។ ដើម្បីនឹងទុកជាសក្ខីភាពនូវព្រះរាជបំណង
ប្តថ្លារបស់ព្រះអង្គ ទើបព្រះបាទស្រីមារៈ បានចាត់ចែង
សិលាចារឹកនេះឡើង ទុកជាកេរ្តិ៍ដំណែលរហូតដល់រាប់
ន់ឆ្នាំក្រោយមក ក៏យើងនៅស្គាល់បានយ៉ាងច្បាស់ប្រាកដ

នូវព្រះរាជកាយវិការ ដ៏ប្រសើររបស់ព្រះរាជអង្គនេះ

ប្រយោជន៍សំខាន់មួយទៀត សិលាចារឹកនេះមិនប្រ
តែកត់ត្រាទុកនូវព្រះរាជបំណងរបស់ព្រះអគ្គមហាក្សត្រ
ប៉ុណ្ណោះទេ អាចកប់បានជាវណ្ណកម្មមួយសំរាប់ឲ្យយើងយើ
ជាក់ច្បាស់ពីការប្រើប្រាស់តួអក្សរ និងសំនួនពាក្យពេចន៍
ភាសាខ្មែរសម័យនោះផង ។ គឺថា ពតិមានផ្សេង ១ ៗ
អក្សរសាស្ត្រខ្មែរដែលយើងស្គាល់បានអំពីស្នាដៃសម័យដ
គឺសម័យមុនអង្គរនោះ ក៏ដោយសារតែផ្អែកសិលាចារឹកទ
នោះឯង ។ ប៉ុន្តែយើងស្តាយជាបំផុត ព្រោះពេលវេ
ពុំអាចបើកឱកាសឲ្យយើងដកស្រង់ស្នាដៃឯទៀត ១ ដែលគ
ក្នុងសម័យជាមួយ ១ គ្នា មកបញ្ជាក់ឲ្យបានសព្វគ្រប់ សមគ
បំណាន់ឡើយ ព្រោះឯកសារទាំងនោះនៅស្ងួចស្តើងតិច
ពេក ។ ដូចនេះហើយ បានជាយើងព្យាយាមសំរាំងយ
តែស្នាដៃណាដែលងាយស្តាប់ងាយយល់ និងប្រកបដោ
លក្ខណៈអក្សរសាស្ត្រ ពិត ៗ មកធ្វើការពិភាក្សាជាមួយអ

លោកអ្នកឲ្យបានឃើញជាក់ច្បាស់ល្អិតអំពីបញ្ហាទាំងនេះ គឺពិតជាបញ្ហានៅក្នុងសភាពស្មុគស្មាញនៅឡើយ ។

សរុបសេចក្ដីទៅ សម័យទីមួយនៃអក្សរសាស្ត្រយើង គឺជាសម័យដែលបុព្វបុរសខ្មែរខិតខំព្រាងបង្កើត បានជារូបជា គន្លៃតួអក្សរទើបប្រឹងរកមធ្យោបាយផ្សាយនូវអក្សរនេះ ឲ្យជនគ្រប់គ្នាបានចេះបានយល់សំរាប់ជាប្រទីបមួយ ជួយបំភ្លឺផ្លូវឲ្យយើងដើរគ្រេចទៅកាន់ត្រើយវឌ្ឍនធម៌ ។ ប៉ុន្តែ សម័យមុនអង្គរនេះ ទីក្រុងខ្មែរ មិនបានតាំងទីនៅកន្លែងមួយជាប់លាប់ទេ គឺចេះតែមានការប្ដូរផ្លាស់ជាញឹកញយ ដូចជាប្ដូរពីវ្យាធបុរៈ ទៅឥសានបុរៈ រួចទៅ មហិន្ទ្របុរៈ ជាដើម ។ អ្នកប្រវត្តិសាស្ត្របានសន្និដ្ឋានសម័យដំបូងនេះ ហៅថាសម័យ «នគរភ្នំ» ត្រូវនឹងអ្នកកត់ត្រាជាតិចិនហៅថា ហ្វូណាម ដែលក្លាយមកដល់យើងថា «ហ្វូណន» ។ ព្រោះហេតុតែមានការតាំងទីក្រុងមិនស្ថិតស្ថេរដូចនេះហើយ ទើបសិលាចារឹកខ្មែរចេះតែលេចឃើញមាននៅនេះមួយ នៅនោះមួយ សឹងតែពាស

ពេញអំណាចគេ ។ ក្រោយពីសិលាចារឹកចុងនេះ យើងពុំមានប្រទះឃើញស្នាដៃអ្វី ជាដុំកំភួនល្មមយកជាការបានទេ ព្រោះពេលវេលាពីនោះមកដល់ឥឡូវនេះ ជាយូរអង្វែងណាស់ផង ក្រៅពីដុំថ្មមិនអាចមានអ្វីនៅគង់វង្សបានយូរឡើយ ។

សម័យមុនអង្គរ របស់អក្សរសាស្ត្រយើងបានចប់ត្រឹមចុងបំផុតនៃសតវត្សទី ៨ នៃគ្រិស្តសករាជ គឺនៅគ្រាដែលព្រះបាទជ័យវរ្ម័នទី ២ បានលើកទីក្រុងទៅតាំងនៅអង្គរ ។





ចង្ក្រានប្រាំពីរ

# អក្សរសាស្ត្រសម័យអង្គរ

សម័យអង្គរ កប់តាំងពី គ.ស ៨០២ គឺគ្រាដែលព្រះបាទជ័យវរ្ម័នទី ២ បានចាប់កសាងនគរជាថ្មីនៅឯអង្គរ មានកំពូលខ្ពង់ខ្ពស់បំផុត រហូតដល់ គ.ស. ១៤៥២(១) ដែលព្រះបាទស្រីសុរិយោពណ៌ពញាយ៉ាត បានលើកទីក្រុងចាកចោលអង្គរមកតាំងនៅចតុមុខវិញ ។ រយៈកាលខាងដើមនៃសម័យនេះ ប្រជាជនខ្មែរជាប់ចិត្តយកតែនឹកពីសប្បាយសុខនៅក្នុងលំនៅដ្ឋានស្ងប់ស្ងាត់ និងពុទ្ធសាសនាមហាយាន ។ ហេតុនេះហើយ ទើបភាសាសំស្ក្រឹតជាមូលដ្ឋាននៃលទ្ធិតាំងពីរនោះ បានទទួលកិត្តិយសជាភាសាផ្លូវការ សរសេរកិច្ចការផ្សេង

១– តាម M. A. LECLÈRE, Histoire du Cambodge, ឆ្នាំ ១៣៨៨ ។

ខុសផ្សេងៗ ក្នុងផ្ទៃអាណាចក្រទាំងមូល ។ ពាក្យពេចន៍សំណ
ប្រើប្រាស់ទាំងឡាយ ទោះជាខាងវណ្ណកម្មក្តី ខាងភាសា
និយាយធម្មតាក្តី ក៏សុទ្ធតែលាយច្របល់ដោយភាសា
សំស្រ្កឹតទាំងអស់ ។ ដូចនេះហើយ ទើបភាសាយើងក្នុងគ្រា
បច្ចុប្បន្ននេះ ក៏នៅមានលាយច្របូកច្របល់ភាសាសំស្រ្កឹត
នៅឡើយ ។ ហេតុដែលនាំឲ្យយើងហ៊ានពោលថា អក្សរ-
សាស្រ្តយើងទោះផ្នែកវណ្ណកម្មក្តី ផ្នែកភាសាធម្មតាក្តី សុទ្ធ
តែលាយលុកគ្នានឹងភាសាសំស្រ្កឹតនោះ ព្រោះយើងឃើញ
ពាក្យខ្មែរសព្វថ្ងៃជាច្រើនម៉ាត់, ច្រើនពាក្យ ដែលប្រជាជនទាំ
គ្នានិយាយធ្លុងធ្លើយរៀងរាល់ថ្ងៃ គឺពិតជាពាក្យក្លាយចេញពី
ជាពាក្យសំស្រ្កឹតសុទ្ធៗ ថែម ដូចជាពាក្យថា: មិត្រ, ពិចិត្រ,
សួស្តី ធម៌, គតិ, ពណ៌, កាវ្យធម៌, ព្រះ, ប្រព្រឹត្ត, គោ,
សក្សី. ក្សា, សង្គ្រោះ, [illegible]... ជាដើម ។ ពាក្យ
ទាំងនេះ ជនជាតិខ្មែរយើងប្រើប្រាស់តែមាត់តាំងពីមនុស្ស
ចាស់ រហូតដល់ក្មេងតូច ហាក់ដូចជាក្លាយខ្លួនស្ទើរឈឹ

ថាពាក្យទាំងនេះ ខ្មែរបានប្រឌិតយកពីភាសាសំស្ក្រឹត តាំងពីអតីតកាលយូរអង្វែងណាស់មកហើយ ៗ ពាក្យទាំងនេះបានក្លាយទៅជាពាក្យខ្មែរសុទ្ធ ។ អស់ទៅហើយក្នុងគ្រាឥឡូវនេះ ប៉ុន្តែអ្នកស្រាវជ្រាវនៅតែទទួលស្គាល់គ្រប់គ្នាថា: ពាក្យទាំងនោះ ពិតជាខ្មែរប្រឌិតយកពីភាសាសំស្ក្រឹតមែន ។

ចំពោះវណ្ណកម្មវិញ យើងឃើញជាភស្តុតាងហេតុផលសព្វថ្ងៃនេះនូវរឿងរ៉ាវ ដែលខ្មែរបុរាណសរសេរសម័យនោះព្រមទាំងសិលាចារឹកទាំងឡាយ ដែលស្ថាបនាឡើងនៅគ្រាជាមួយគ្នាដែរ មានសុទ្ធតែពាក្យពេចន៍ ឬ សំនួនវោហារល្អឥតខ្ចោះ លាយច្របល់ដោយពាក្យខ្មែរបុរាណនិងសំស្ក្រឹត ដូចជាសិលាចារឹកនៅបាយ័ន, នៅព្រះខ័ន, នៅបន្ទាយឆ្មា, នៅភ្នំជីសូរ និងប្រាសាទនានាដែលកើតដំណាលគ្នា ឬ ជានៅក្នុងរឿងរាមកេរ្តិ៍ ជាដើម ៗ ដូចជាយើងបានពោលរួចមកហើយ ថារឿងរាមកេរ្តិ៍ខ្មែរមិនមែនប្រែត្រង់ ។ ពីរឿងរាមាយណៈ ឥណ្ឌៀសុទ្ធសាធទេ គឺខ្មែរគ្រាន់តែប្រឌិតបែប

ពិនិត្យបញ្ជាក់ថា តើរឿងនេះពិតជាលាយភាសាសំស្ក្រឹត ចឹងនៅក្នុងរឿងរបៀបខ្មែរឬទេ ។

សេចក្ដីដកស្រង់នេះ យើងស្រង់តាមសៀវភៅបោះពុម្ព ដែលផ្សាយចេញពីក្រុមពុទ្ធសាសនបណ្ឌិត្យ ក្នុងសៀវភៅ ភាគទី ១ មានសេចក្ដីដូចតទៅ ៖

. . . . . . . . . . .

.. ព្រះរាមស្ដេចមើលអស់គុ-ណលើកម្ទេចធនូ ក៏ត្រើស
.. ព្រះភក្ត្រប្រិមប្រិយ៍ ។ ស្ដេចចូលលងបន្ទំដ៏ពិធី អស់ទេព
.. ឥសី ក្សត្រទាំងមានគុណពេចេស្ដា ។ ព្រះរាមរឹងធ្នូមហិមា
.. ស្ដែងស្ដេចចេស្ដា-ធិការគុណលើសក្រៃ ។ ស្ដេចលើកកោ-
.. ទណ្ឌសរជ័យ អស់ទេពមនុស្សញ ដ៏មានកំឡាំងលោកធាតុ ។
.. សឹងថ្វាយសព្ទសាធុការសាទរ ព្រះបរមនាថ ឬអំណាច
.. យល់ច្រើន ។ ខ្លួចវាឥតកៅឡូជីចុំទទៀង គោះសរសក្ដិ
.. ច្រើន សរម្គង់ខួរគេប្រាប់ក្ស ។ ស្ដេចក្រោយកោទណ្ឌ-
.. សរសក្ដិ រូមណ្ឌលចក្រ រំកាយព្រះទរសោភា ។ ដងនោះ

"ព្រះបាទមិថិលា ស្តេចយល់ដឹងបុញ្ញា - នុភាពព្រះរាមលើស
"ក្រៃ ស្តេចត្រេកអរឲ្យតាំងជ័យ ដំយោជ័យក្រៃ សំរិទ្ធិរាម
"មហិមា ៗ ស្តេចយកកែកែទឹកជសីតា ប្រកបនូវលក្ខណា
"ក៏ថ្វាយព្រះរាមកិកខ្វង ៗ អស់ទាំងមុខមន្ត្រីផង ប្រើទូត
"ទៅចង មេត្រីព្រះបាទទសរថ ៗ ស្តេចផ្តាំទូតទៅបីកណត់
"ថ្កានព្រះទសរថ បីលុះបូរីអយុធ្យា ៗ

. . . . . . . . . . . . . . . .

អត្ថបទដែលជាសេចក្តីដកស្រង់របស់យើង ខាងលើនេះ ពណ៌នាកាលដែលព្រះចៅមិថិលា រើសបាន នាងសីតាពីក្នុងផ្កាឈូក ហើយទ្រង់ប្រកាសអំពាវនាវថា បើនរណាមានរិទ្ធិគេជង់ដៃ អាចលើកធ្នូរបស់ព្រះអង្គរួច នោះព្រះអង្គនឹងអភិសេកព្រះនាងសីតាឲ្យជាមហេសី ៗ កាលនោះមានព្រះឥន្ទ្រ, ព្រះព្រហ្ម ព្រះឥសូរ, ព្រះនារាយណ៍ និងទេវតាដ៏ច្រើនបានមកល្បងឫទ្ធិ ប៉ុន្តែមិនបានសំរេចប្រាថ្នាសោះ ៗ កាលទ្រង់ជ្រាបពតិមាននេះ ព្រះរាមក៏ទ្រង់យាងជាមួយព្រះលក្ស្មណ៍

ដទៅដល់ក្រុងមិថិលា ហើយស្បែកលើកធ្នូបេស្តានោះបាន
រេចដូចព្រះបំណង ។ ក្នុងអត្ថបទនេះនិយាយថា៖ ព្រះរាម
ំលើកធ្នូទ្ធី ដោយព្រះភក្រ្តប្រឹមប្រិយ សឹងមានទេពការ
ថ្វាយតគ្រប់គ្នា ។ ត្រង់ឃ្លាមួយចំកណ្តាលអត្ថបទ
ាក់ប្រាប់យើងពីមហិទ្ធិឫទ្ធិនៃព្រះរាម ដែលសឹងស្រស់
ាងដោយពាក្យឥតខ្ចោះគួរគាប់ចិត្ត គឺត្រង់ឃ្លាថា៖ «ស្តេច
យកៅទំណុសសេក្តិ រូមណ្ឌលចក្រ កាយព្រះករ
ាគា ។» ឃ្លានេះបានសេចក្តីថា៖ ព្រះរាមទ្រង់ចាប់យក
ះហើយគ្រវីកាច់កែព្រះកាយរបស់ព្រះអង្គ វែងធ្នូដែល
ទៅដោយសារកម្លាំងព្រះហស្តរបស់ព្រះអង្គនោះ ឃើញ
ណ្ឌាខបដូចជារង្វង់កង់អ៊ីមួយ គួរឲ្យគយគន់កោតក្រៃលែង
យទ្រង់សាយចុងព្រះហស្ត ប្រកបដោយព្រះកាយវិការ
មរម្យឥតខ្ចោះ ។ ទីបំផុត ព្រះចៅជនកមិថិលាក៏សព្វ
រាជហឫទ័យថ្វាយព្រះនាងសីតា ដែលប្រកបដោយរូប
មប្រិមប្រិយទៅព្រះរាមបេស្តា ។ ហើយស្តេចទ្រង់ចាក់

ឲ្យរាជទូតទៅតាមដង្ហែព្រះបាទទសរថ ជាព្រះវរបិតាព្រះ
មកឋានទតព្រះអង្គដើម្បីរៀបអភិសេកព្រះរាជបុត្រទាំងពួ
កាលប្រកបដោយសុភមង្គលនេះ ។

រឿងរាមកេរ្តិ៍ អាចចាត់ទុកជាវណ្ណកម្មមួយយ៉ាងវិសេ
ហើយរឿងនេះ តែងបានទទួលការនិយមពីសំណាក់បណ្ដា
គ្រប់ប្រភេទ ។ អានុភាពរឿងនេះ បានហូរស្រោប
ទៅក្នុងដួងចិត្ត, ដួងថ្លើម នៃប្រជាពលរដ្ឋគ្រប់និគមជនប
រៀងរាល់ពេលវេលា ។ ឯមធ្យោបាយផ្សាយសោភ,
តាមការស្រាវជ្រាវរបស់អ្នកប្រាជ្ញជាច្រើនរូប, គេអាចប្រម
បានមកសំខាន់ៗដូចតទៅនេះ ៖

ក- គេផ្សាយដោយចងក្រងជាក្រាំង **សិលាចារឹក**
ទៅជាយូរឆ្នាំ គឺទុកជាលក្ខណ៍គោលត្រឹមត្រូវ ។

ខ- គេផ្សាយដោយសារក្រុមល្ខោន ឬក្រុមចាំផ្ស
ដែលតែងតែលេងរឿងនេះ នៅចំពោះមុខសាធារណជន
ស្រុក, តាមភូមិជិតឆ្ងាយ ។

គ. គេផ្សាយដោយសារអ្នកចាំរឿង ឬ អ្នកនិទានរឿង ដែលតែងតែនាំយករឿងនេះ ទៅនិទានក្នុងទីប្រជុំជន ទៅ កាសបុណ្យអ្វីមួយ ។

ឃ. គេផ្សាយតាមរូបចម្លាក់ និងគំនូរតាមជញ្ជាំងសាលា ឆាន់និងវត្តអារាមនានាក្នុងប្រទេសយើង ។

មធ្យោបាយទាំងនេះ នៅមានអានុភាពពេញទីក្នុងស្រុក យើងគ្រាបច្ចុប្បន្ននេះនៅឡើយ ព្រោះយើងតែងប្រទះឃើញ កចាំរឿងនេះជាច្រើនរូប ទោះបីជាចាំតែបន្តិចបន្តួចក្ដីគេ ទៀតបរិយាយប្រាប់គ្នាដើម្បីជាគ្រឿងកែអផ្សុក ឬ ជាពាក្យ អែងអន់ក៏សាទ្ធពិត ។ ហេតុដែលនាំឲ្យមានការនិយមដល់ នេះ ព្រោះរឿងកម្រគេក្ដីមានលំអពាក្យពេចន៍ និងកិច្ចកល នរឿងបែបចម្បាំងក្ដី, បែបស្នេហាក្ដី, បែបសោកសង្រេងក្ដី បែបពិពណ៌នាក្ដី សុទ្ធតែល្អស្រស់បំព្រងដូចៗគ្នា គ្រាន់ តរឿងនេះ មានផ្លូវរឿងផ្ដេកទៅតាមលទ្ធិព្រាហ្មណ៍សាសនា ណ្ណាះ ។

នៅក្នុងសម័យអង្គរនេះ ខ្មែរនាំគ្នាលើកស្ទួយភាសាសំ
ស្រ្កឹតឲ្យបានឡើងដល់ឋានៈខ្ពស់បំផុត ។ សិលាចារឹកខា
ដែលកើតឡើងដោយការឧបត្ថម្ភនៃព្រះរាជា ឬ ជនដែលមា
ឋានៈខ្ពង់ខ្ពស់ណាមួយ សុទ្ធតែសរសេរជាភាសាសំស្រ្កឹ
ចាំងអស់ ។ ហើយនៅក្នុងនោះ ប្រកបដោយសំនួនពេចន៍
លែបខាយវិចិត្រដោយពាក្យសំស្រ្កឹតសុទ្ធ ៗ ផង ។ យើ
ស្ដាយដាច់ផុត ព្រោះពុំអាចលើកសិលាចារឹកជាភា
សំស្រ្កឹតសុទ្ធមកលាតត្រដាងបាន ព្រោះហេតុការណ៍ម
បើកឱកាសឲ្យយើងផង ហើយមួយទៀត ភាសានេះជ
ពាក់ជាភាសាស្លាប់មិនសូវមានអ្នកនិយមផង ។ ហេតុ
យើងធៀតស្រង់ សេចក្ដីប្រែសំរួលពីសិលាចារឹកក្នុងសម័
អង្គរមកបញ្ចាក់ជាភស្តុតាងខ្លះបង្ហាញឲ្យឃើញថា ពេលនេ
ពិតជាមានហេតុការណ៍ដូចយើងពណ៌នាមែន ។ ប្រយោ
ទាំងឡាយខាងក្រោមនេះ ជាសេចក្ដីដកស្រង់ចេញពីស្លា
សិលាចារឹកនៅក្នុងសម័យអង្គរ ដែលមាននាមអ្នកនិពន្ធ

ត្ថបទនោះជាប់ជាមួយផង ។ ដើម្បីឲ្យសមរម្យត្រូវតាម
បៀបសិក្សាអក្សរសាស្ត្រ យើងនាំយកនូវនាមនិងជីវប្រវត្តិ
ង្ខេប ៗ របស់អ្នកនិពន្ធសម័យនោះ ព្រមទាំងស្នាដៃមកធ្វើ
ាសេចក្ដីអត្ថាធិប្បាយក្នុងវេលានេះ ដើម្បីបង្ហាញលោកអ្នក
ការបញ្ជាក់ផង និងជាគ្រឿងជំនួយ ស្មារតីមួយដល់អ្នក
ក្សាអក្សរសាស្ត្រខ្មែរយើងផង ។

ក្នុងសម័យអង្គរនេះ គេស្គាល់ឈ្មោះអ្នកនិពន្ធសិលាចា-
ប្រាំមួយរូប ដែលមាននាមជាក់ប្រាកដទុកកេរ្ដិ៍ដំណែលដល់
ើងគ្រប់គ្នា គឺបណ្ឌិតទិវាករ, បណ្ឌិតយតិអមរកោ, បណ្ឌិត
ន្ទ្រៈ , បណ្ឌិតកវីន្ទ្រៈ , បណ្ឌិតសិវសោម និង ព្រះនាង
ន្ទ្រទេវី ។

ស្នាដៃដែលយើងលើកយកមកបង្ហាញខាងក្រោមនេះ
ងបានដកស្រង់ធ្វើជាសេចក្ដីប្រែសំរួល (១) និង ធ្វើជា
េចក្ដីអធិប្បាយបន្ថែមពីជីវប្រវត្តិ តាមលំដាប់មុនក្រោយ

---

១– សេចក្ដីដកស្រង់នេះយើងសម្រួលពីសៀវភៅ Inscriptions du
mbodge, របស់ G. Cœdès.

សំរាប់ជាឯកសារដល់អ្នកត្រូវការសិក្សាអក្សរសាស្ត្រដូចតទៅ

១- បណ្ឌិតសិរីសោម.— បណ្ឌិតនេះជាអ្នកប
ស្ទាត់នូវក្បួនច្បាប់ទាំងឡាយខាងផ្នែកអក្សរសាស្ត្រ និងមន្តវិ
គាថាផ្សេង ៗ លោកបានចងក្រងជារឿងកាព្យនិងក្បួនខ្ន
ជាច្រើន មានរឿងមហាការេត:, ក្បួនវេយ្យាករណ៍ជាដើម
លោកបានទទួលប្រោសប្រាណពីសំណាក់ព្រះមហាក្ស
ខ្មែរសម័យនោះ និងជាកវីគ្រូផ្ទាល់របស់ព្រះបាទឥន្ទ្រវ៉ែន
ស្នាដៃរបស់លោក បានគង់នៅ និងសិលាចារឹកប្រាសា
កណ្ដាលដើម ដែលយើងស្រង់សេចក្ដីបន្តិចដូចខាងក្រោម

. . . . . . . . . . . . . . . . . . . .

“ . . . . . សូម្បីបើលាក់ខ្លួនពួនគាត់ក្នុងព្រៃស្មា
“ ដោយ កុជសត្រូវក្ដីស្វាងដោយប្រថែបជ័យជំនះរបស់ព្រះអ
“ តែចូលមកជ្រកក្រោមព្រះបាទ ហាក់ដូចជាត្នោតព្រៃ
“ ព្រះអង្គចាប់បានជាថ្មីទៀត ៗ . . . . . .”

ពាក្យយ៉ាងខ្លាំងលើនេះ អ្នកនិពន្ធសិវសោម សរសើរ
ះបារមីនៃព្រះបាទឥន្ទ្រវរ្ម័ន ដែលមានបុណ្យានុភាពនាំឲ្យ
សត្រូវនៅគ្រប់ទិសទីសុខចិត្តនាំគ្នាមកបុះញ៉មក្រោមព្រះ
ស្តារបស់ព្រះអង្គ ។

២. បណ្ឌិតយតិអមរការៈ ជាអ្នកប្រាជ្ញឯកក្នុ
កាលព្រះបាទយសោវរ្ម័ន ដែលព្រះអង្គទ្រង់ប្រោសព្រះកជ
នុហានន្ទសេក្តិ ជាអធិបតីលើចំណោមបណ្ឌិតទាំងឡាយ
ងសម័យនោះ ព្រមទាំងជាសង្ឃរាជលើវត្តឥន្ទ្រាស្រមដែល
មជ្ឈមណ្ឌលខាងលទ្ធិសាសនាព្រាហ្មណ៍ ។ លោក
ស្លាដែកក្នុងសិលាចារឹកនៅក្នុបាយ័ក្ត ដែលយើងស្រង់យក
បចក្តីបន្តិចដូចតទៅ ៖

. . . . . . . . . . . . . .

« ... សូមព្រះសិរៈដ៏មានជតាធំ ហើយដែលមានព្រះបាទ
ខ្ទន់ជាន់កវែណសមុទ្រឲ្យស្រែកថ្ងូរទ្រហឹងពេញអាកាស
ដោយសេចក្តីលើពាប់, ថែរក្សានូវសម្បត្តិរបស់អ្នក ។ . . »

ប្រយោគខាងលើនេះ បណ្ឌិតយតិអមរកោរ: សុំ
ព្រះឥសូរដែលមានឫទ្ធិអំណាចគាបនឹងជាន់លើកយក្សក
ដែលមានមុខដប់ឲ្យស្រែកថ្ងូរដោយចាញ់បារមីបាននោះ ស
ឲ្យមកជួយថែរក្សានូវសេចក្ដីសុខចំរើនរបស់ប្រជានុក
តាំងឲ្យយកុំបីខានឡើយ ។ នេះឯងជាសេចក្ដីអំពា
របស់សិលាចារឹក កើតឡើងដោយព្រះរាជបន្ទូលនៃព្រះ
យសោវរ្ម័ន គឺជាព្រះមហាក្សត្រក្លៀវក្លាមួយអង្គក្នុងសតវត្ស
ដែលបានរៀបចំកសាងប្រាសាទអង្គរធំ ។

៣–បណ្ឌិតធិវាករ:– [1] ជាកវីនិពន្ធយ៉ាងឯកដ
រជ្ជកាលនៃព្រះបាទរាជេន្ទ្រវរ្ម័ន ។ លោកចេះស្ទាត់
វិជ្ជាត្រៃយវេទ គាប់សែកមន្តគាថាធ្វើទំពសត្រូវឲ្យវិនា
ភ្ញាក់ខ្លាយបាន ។ បណ្ឌិតនេះ បានទទួលសេចក្ដីប្រ
ប្រាណពីព្រះរាជាយ៉ាងគាប់ចិត្តក្រៃលែង គឺព្រះអង្គប
ប្រទាននូវបុត្រីមួយអង្គព្រះនាម «ឥន្ទ្រលក្ស្មី» ឲ្យធ្វើជាភរិ

(1) - G. Cœdès Insc. du Cambodge I, p 37.

បណ្ឌិតទិភករ ។ ស្នាដៃលោកលាតត្រដាងនៅក្នុងផ្ទាំងសិលាចារឹកប្រាសាទកំពីស ដែលយើងដកស្រង់សេចក្ដីខ្លះ ៗ ដូចតទៅ ៖

“. . . . នេះកេលកលដោយព្រួញពិព្យរបស់ព្រះអង្គមហារាជនៃពួកសត្រូវលែងលួតលាស់ឡើងវិញ សូម្បីបើស្រោចស្រប់ដោយទឹកភ្នែកពួកទីប្រឹក្សាក៏ដោយ ។ . . . .”

ក្នុងឃ្លាឃ្លាំងខាងលើនេះ អ្នកនិពន្ធទិភករ បានសរសើរឫទ្ធិបារមី នៃព្រះបាទជ័យវរ្ម័នទី-៤ ដែលជាក្សត្រប្រកបដោយបារមីក្លៀវក្លា បង្ក្រាបអស់ពួកសត្រូវដែលមាននៅគ្រប់ទិសដំបន់ដែលអ្នកនិពន្ធ បានប្រៀបប្រដូចនឹងមហារាជឲ្យស្ងប់ស្ងាត់ឈឹងស្ងួន ទោះបីជាមានពួកទីប្រឹក្សាប្រឹងដាស់តឿនរំលឹកយ៉ាងណាក៏ដោយ ។

៤— បណ្ឌិតគាវីន្ទ្រ :— ជាអ្នកនិពន្ធយ៉ាងឆើតមួយរូបក្នុងរជ្ជកាលនៃព្រះបាទសូរ្យវរ្ម័ន ។ លោកបានរៀនចេះស្ទាត់ខាងគម្ពីរក្បួនខ្នាតផ្សេង ៗ ហើយជាអ្នកមានប្រាជ្ញាវាងវៃ

បំផុត អាចនឹងដោះស្រាយទូវបញ្ហាអ្វី ៗ យ៉ាងពិបាកបានយ៉ាងឆាប់រហ័ស ។ ហេតុនេះហើយ ទើបព្រះកជាសព្វព្រះទ័យតែងតាំងជាទីប្រឹក្សារបស់ព្រះអង្គ ។ ស្នាដៃលោកមានពិស្តារក្នុងសិលាចារឹកប្រាសាទខ្នារ ដែលយើងស្រង់សេចក្តីមួយប្រយោគមកដាក់បន្តទៅនេះ ៖

«. . . ក្នុងសង្គ្រាម គ្រឿងអាវុធដែលបច្ចាមិត្តពាក់មកយ៉ាងធ្ងន់លើព្រះអង្គដោយពេញទំហឹង ហាក់ដូចជាសត្វតូចមួយចិច ឬ ស្រីក្រទៅប៉ុណ្ណោះ ។ . . . .»

ក្នុងប្រយោគនេះ អ្នកនិពន្ធកវីទ្រ: បានបង្ហាញនូវចេស្តានៃព្រះបាទសុរ្យវរ្ម័ន ក្នុងគ្រាដែលយាងចេញគយុទ្ធក្នុងរណភូមិ ។ អ្នកនិពន្ធបានពោលថា កាលបើសត្រូវប្រហារនូវសស្ត្រាវុធមកលើព្រះអង្គ ព្រះបាទសុរ្យវរ្ម័នឥតមានទ្រង់ញញើតឡើយ ព្រោះឥតមានឈឺចាប់ដល់ព្រះកាយបន្តិចសោះ គ្រាន់តែសៅហ្មងបន្តិចទុកដូចជាសត្វតូចមួយចិច ឬ ដូចជាស្រីក្រទៅប៉ុណ្ណោះ ។

៥- បណ្ឌិតកួបទ្រ្ទៈ - បណ្ឌិតកួបទ្រ្ទៈ ជាអ្នកប្រាជ្ញមួយរូបក្នុងសម័យព្រះបាទជ័យវរ្ម័នទី-៧ ។ លោកជាអធិបតីលើគណៈអ្នកប្រាជ្ញទាំងឡាយ ដែលជាទីប្រឹក្សារបស់ព្រះរាជា ហើយលោកជាចៅក្រមយ៉ាងល្បីល្បាញផង ព្រោះជាអ្នកមានស្មារតីទូលំទូលាយខាងផ្លូវច្បាប់[1] ។

យើងដកស្រង់ស្នាដៃរបស់លោកពីក្នុងសិលាចារឹកប្រាសាទខេ ដែលមានសេចក្ដីដូចតទៅ ៖

« ... ទ្រង់ជ្រាបថា ផែនដីព្រះអង្គដែលទ្រង់បានកសាងឲ្យក្លាយទៅជាស្ថានសួគ៌ដោយព្រះប្រាជ្ញាញាណ, ត្រូវមរណៈព្យាបាទហើយ ទ្រង់ដឹកនាំឲ្យយកទឹកអម្រឹតធ្វើជាភេសជ្ជៈដើម្បីញុំាងសត្វដែលត្រូវស្លាប់ កុំឲ្យស្លាប់ទៀត ។ . . . »

ប្រយោគខាងលើនេះ បង្ហាញពីសម្រស់ពាក្យពេចន៍ជាស្នាដៃរបស់អ្នកនិពន្ធឈ្មោះកួបទ្រ្ទៈ ដែលសរសើរព្រះកិត្តិគុណរបស់ព្រះបាទជ័យវរ្ម័នទី-៧ ដ្បិតព្រះចៅអង្គនេះ ទ្រង់មាន

(1) G. Cœdès, Insc. du Cambodge, I. p. 228,

ព្រះមេត្តាធម៌ក្រៃលែង ទ្រង់បានចាត់ចែងបង្កើតជាពេទ្យ-
បាលកេតសំរាប់ប្រជាជនជាច្រើនកន្លែង ទើបសេចក្តីផ្តើមនៃ
សិលាចារិកនេះនិយាយថា៖ ព្រះអង្គទ្រង់យល់ថា ផែន
ដីដែលព្រះអង្គទឹកសាង ឲ្យមានសុខសាន្តសម្បូណ៌សប្បាយ
ដូចជាស្ថានសួគ៌នោះ ត្រូវតែកែតាញពុធមករកពេញញ៉ា
ហើយ, ទើបព្រះអង្គណែនាំខូះប្រជាជនដ៏ជាទីសព្វព្រះទ័យ
ឲ្យកសាងខ្លួនតាមផ្លូវល្អ គោលគឺឲ្យដឹកនូវទឹកអម្រឹតរសជាតិ
សីលធម៌ព្រះពុទ្ធសាសនា ទីនីកែកេតជនទាំងនោះ ដោយ
បង្កើតឲ្យមានក្រុមពេទ្យបាលដម៏ដោយទសថផ្សេង ៗ

៦– ព្រះនាង ឥន្ទ្រទេវី.– ព្រះនាងឥន្ទ្រទេវីជា
អគ្គមហេសីទី ២ នៃព្រះបាទជ័យវរ្ម័នទី ៧ គឺព្រះនាងទ្រង់បាន
ទទួលរាជាភិសេកជាមួយព្រះចៅផែនដី ក្រោយដែលព្រះ
មហេសីដើមជាព្រះកនិដ្ឋាបង្កើតរបស់ព្រះនាងទទួលទិវង្គត
ហើយ ។ ព្រះនាងឥន្ទ្រទេវីទ្រង់បានណែនាំព្រះកជាឲ្យ
មានព្រះទ័យជ្រះថ្លាក្នុងពុទ្ធសាសនា និង ការកសាងវប្បធម៌

ជាតិ ដូចជាការបង្កើតឲ្យមានសាលាជាន់ខ្ពស់សំរាប់បង្រៀនក្បួនទៅខ្មែរ និង បង្កើតរង់ល្ខោនសម្រាប់សម្តែងសិល្បៈខ្មែរជាដើម ។

ស្នាព្រះហស្ត គឺនៅនេះ យើងស្រង់ចេញពីសិលាចារឹកប្រាសាទភិមានអាកាស[1] ៖

« ... ដោយមានភក្តីចំពោះព្រះស្វាមីលុះព្រះនិព្វាន ,ព្រះនាងទ្រង់ទទួលរង់ចាំឲ្យឃើញថា ព្រះកជាទ្រង់ថ្វាយព្រះអង្គសិប់កង្កុកទសិន ទើបព្រះនាងចូលកាន់និព្វានជាក្រោយ ... ។

ប្រយោគខាងនេះ ព្រះនាងឥន្ទ្រទេវី ទ្រង់ចារឹកទុកអំពីទឹកព្រះទ័យនៃព្រះនាងជយរាជទេវី ជាព្រះកនិដ្ឋា និង ជាមហេសីដើមនៃស្វាមីព្រះនាង កាលមុននឹងចូលទិវង្គត ។

សរុបសេចក្តីទៅ សិលាចារឹកទាំងនោះឯង បង្ហាញយើងឲ្យឃើញខ្លួនការប្រធម៌ខ្មែរបុរាណ ជាពិសេសគឺអក្សរសាស្ត្ររបស់យើងកាលពីសម័យអង្គរ ។ សេចក្តីបកស្រាយ

ទីន កិច្ចការស្រាវជ្រាវតាំងពីជំនាន់នោះលើនេះសុទ្ធសឹងតែហ្វ៊ូ
ចេញមកពីស៊ីវិល័យសំស្ក្រឹត ព្រោះដូចយើងពោលមកខា
ដើមរួចហើយថា សម័យនោះសំស្ក្រឹតជាយានភាសារបស
ជនជាតិអាស៊ី ដែលទុកកេរ្តិ៍ដំណែលមកបានជាយូរអង្វែង
លុះចំណេរតមកមានភាសាបាលីបានមកផ្លាស់វេនម្តងក៏បង្កើត
មូលដ្ឋានអក្សរសាស្ត្រ បន្ថែមលើមូលដ្ឋានសំស្ក្រឹត ពីបុរ
បុរាណមកទៀត ។ សន្និបសេចក្តីទៅ យើងស្គាល់បានថា
ភាសាសំស្ក្រឹត និង ភាសាបាលី ជាមូលដ្ឋាននៃអំបូរភាសា
របស់ជនជាតិអាស៊ី ដូចគ្នានឹងភាសាឡាតាំង និងក្រេក ដែល
ជាមូលដ្ឋាននៃភាសាអឺរ៉ុបដែរ ។





ជំពូកទី ប្រាំបី

# អក្សរសាស្ត្រសម័យកណ្ដាល

សម័យកណ្ដាល ជាសម័យមួយយ៉ាងវែងឆ្ងាយក្នុងប្រវត្តិអក្សរសាស្ត្រយើង ។ សតវត្សទី ១៤ បានកន្លងផុតទៅ, ប្រទេសជិតខាងយើង បេះតែមានកើត ហេតុកេតនព្រំដែនទៅផ្នែកខាងលិច នាំឲ្យព្រះមហាក្សត្រខ្មែរ ទ្រង់ព្រះតំរិះលើករាជធានីពីក្រុងអង្គរ មកតាំងនៅចំទន្លេចតុមុខវិញ ។ ថ្ងៃមួយជាពេលនក្ខត្តឫក្សជោគជ័យនៅក្នុង គ.ស. ១៤៣២ ព្រះបាទស្រីសុរិយោពណ៌ ចៅពញាយ៉ាត បានយាងមួយអន្លើដោយព្រះរាជបរិពារ ទាំងនាហ្មឺនសព្វមុខមន្ត្រីគ្រប់ក្រសួងចាកចេញ

ពីទីក្រុងអង្គរ មកតាំងរាជធានីថ្មី គឺទន្លេបួនមុខដែលជាទីក្រុងភ្នំពេញសព្វថ្ងៃនេះ(១) ។

ចាប់តាំងពីនោះមក អក្សរសាស្ត្រយើងបានដកមូលដ្ឋានចេញពីក្រុងអង្គរមកតាមរាជធានីថ្មីដែរ ។ អ្នកប្រាជ្ញរាជបណ្ឌិតទាំងឡាយបានតាមដង្ហែព្រះរាជា មកបង្កើតជាមជ្ឈមណ្ឌលនៅទីក្រុងថ្មី ដើម្បីផ្សាយនូវឥទ្ធិពលអក្សរសាស្ត្របន្តទៅទៀត ។ វេលានេះយើងអាចរកឃើញឈ្មោះនិងស្នាដៃខាងអក្សរសាស្ត្រជាច្រើន ដែលនៅសល់គង់ដល់យើងរហូតសព្វថ្ងៃ ។ ប៉ុន្តែសម័យនេះ អំបូរភាសាខ្មែរបានមកជួបប្រទះនឹងមូលដ្ឋានថ្មីមួយទៀត គឺភាសាបាលី ឬ មគធភាសា ដែលចូលមកបោះគោលនៅក្នុងប្រទេសយើង តាមរយៈលទ្ធិពុទ្ធសាសនាហីនយាន ព្រោះខ្មែរគ្រប់គ្នាងាកបែរចោលបែបមហាយាន និងព្រហ្មញ្ញសាសនាអស់ហើយ នៅសល់ខ្លះ

---

១– តាម Histoire du Cambodge, A. Leclère ជាក្រុងនោះនៅស្រីសឈរ (ស្រីសន្ធរ) ។

តែជាចំនៀមចំណាប់ប៉ុណ្ណោះ មិនមែនជាលក្ខណ៍គោល
ាន់សក់បរគោរពបូជាទូទៅទេ ។ គាថាភាសា
លីក្នុងវេលានេះ ក៏ត្រូវគេមោះមុតដូចគាថាភាសាសំស្ក្រឹត
សម័យមុនដែរ ។ ហេតុនេះឯងបានជាយើងឃើញគម្ពីរ
ាស្ត្រផ្សេងៗ ដែលសរសេរជាភាសាបាលីសុទ្ធនៅគង់ច្រើន
ួកសព្វថ្ងៃនេះយ៉ាងច្រើនក្រៃលែង ។ មិនតែប៉ុណ្ណោះ ក៏
ជាច្រើន បានការប្រែភាសាបាលីធ្វើជាពាក្យកាព្យដូចជា
សាខ្មែរដែរ បង្ហាញនូវការប៉ិនប្រសប់ខាងរចនាពាក្យពេចន៍
លី ឲ្យបានដូនរណ្ដំគ្នាតាមបង្អាក់កាព្យ ដែលយើងធ្លាប់
ទះឃើញនៅបទដើមនៃសាស្ត្ររឿងផ្សេងៗ ។ កសនា
ក្យសាស្ត្រយើងសម័យដំរៀងឆ្ងាយនេះ គួរណាស់តែបាន
រឿងបំផុតហើយ ព្រោះមានមធ្យោបាយនូវការទទួលជួយ
បត្ថម្ភគ្រប់វិធី រហូតដល់ព្រះមហាក្សត្រក៏ព្រះអង្គតែងយកព្រះ
យទុកដាក់លើវិជ្ជាដ៏ពូកែនេះខ្លាំងណាស់ដែរ ។ ផ្សិតវិជ្ជានេះ
សិល្បៈមួយយ៉ាងខ្ពង់ខ្ពស់។ ប៉ុន្តែបែរជាពុំសូវមានដំហររីក

ប៉ុន្មានប៉ុន្មាន ព្រោះតាំងពីសតវត្សទី-១៩មក ប្រទេសយើ
មានកើតចំបាំងរាំងរាល់ជាច្រើន ដូចច្បាំងជាមួយបរទេស
ជួនកាលទៀត ដោយមានវិប្បដិបត្តិក្នុងស្រុកជាញឹ
ញាប់ណាស់ ។ ទោះបីយ៉ាងនេះក៏ដោយ យើងនៅ
តែឃើញស្នាដៃជាមតិកដ៏វិសេសជាច្រើនឈ្មោះ បានសេសេ
ទុកបង្ហាញយើងឲ្យឃើញកំពស់វប្បធម៌ខ្មែរសម័យនោះ
មានអ្នកនិពន្ធជាច្រើននាក់ ដែលមានឋានៈគ្រប់ជាន់គ្រប់ថ្នា
បានប្រឹងប្រែង រៀបរៀងជារៀងរាល់ទុក សំរាប់ជាហិតប្រ
យោជន៍ដល់ជនានុជនរួមជាតិ មានទាំងព្រះសង្ឃខ្លះ គ្រហស្ថ
ខ្លះ ជាអ្នកធំខ្លះ ជាជនសាមញ្ញខ្លះ ដែលយើងនឹងឃើ
ឈ្មោះលោកនៅក្នុងបញ្ជីខាងក្រោមនេះ ។ ជាពិសេសបំផុ
យើងសង្កេតឃើញព្រះមហាក្សត្រខ្មែរជាច្រើនអង្គ, ព្រះអ
ក៏ជាមហាបណ្ឌិតខាងអក្សរសាស្ត្រដែរ ដូចជាព្រះបាទស្រ
ធម្មរាជាព្រះរាជសំភារ, ព្រះបាទជ័យជេដ្ឋា, ព្រះបាទសម្ដ
ព្រះហរិរក្សរាមាធិបតីព្រះអង្គឌួង ជាដើម ។

ជាបន្ទាប់ទៅនេះ យើងសូមធ្វើជាបញ្ជីមួយភយឈ្មោះ
ងជាស្នាដៃ, ឈ្មោះអ្នកនិពន្ធ និង កាលបរិច្ឆេទ ដែលរៀប
ងរឿងនោះ ៖

ក– ប្រភេទកាព្យកាព្យ

១– សិលាចារឹកអង្គរវត្ត រៀបរៀងដោយបណ្ឌិត
ប-ឧទ្ធ ( កាតកាងចុង ) ពីសតវត្សទី ១៦ ។

២– ល្បើកអង្គរ ជាស្នាដៃរបស់អ្នកនិពន្ធនាមអ្នកប៉ាង
បរៀងពីឆ្នាំ ១៨៩៨ ។

៣– សរសើរហោមត្ត, កាព្យនិរាស, ប្បាប់ព្រះរាជ-
ភារ ជាស្នាព្រះហស្តព្រះបាទស្រីធម្មរាជាព្រះកវសម្ភារ
ងនិពន្ធ ពី គ.ស. ១៦៣៤ ។

៤– រឿងខ្យងសង្ខ អ្នកនិពន្ធមិនស្គាល់ឈ្មោះ រៀបរៀង
ចុងសតវត្សទី ១៧ ។

៦- រឿងក្រុងសុភមិត្រ ជាស្នាដៃ ឧកញ៉ាកោសាធិបតី
នៅ ពី គ.ស. ១៧៩៨ ។

៧- ច្បាប់សុភាសិត ជាស្នាដៃ ឧកញ៉ាព្រះឃ្លាំង ន
ពី គ.ស ១៧៩០ ។

៨- លោកនេយ្យជាតក ព្រះឃ្លាំងនង ពី គ.ស.១៧៩

៩- រឿងបុញ្ញសារសិរសា „ „ ១៧៩

១០- „ រឿងភោគកុលកុមារ „ „ „ ១៨០

១១- „ រឿងវរនេត្រវរនុជ „ „ „ ១៨០

១២- „ រឿងព្រះសមុទ្ទ „ „ „ ១៨០

១៣- „ រឿងនាងកាកី „ ជាស្នាព្រះហស្ត ព្រះបា
អង្គឌួង ទ្រង់និពន្ធ ពី គ.ស. ១៨១៣ ។

១៤- រឿងបម្រាប្រោង (មិនទាន់ជាក់) រៀបរៀ
ពី គ.ស. ១៨១៦ ។

១៥_ រឿងរបាក្សត្រ ស្នាដៃរបស់ព្រះបទុមបារមីពេជ្រ

គ.ស. ១៨១៨ ។

១៦_ ល្បើកជេតពន ស្នាដៃ ឧកញ៉ាសោមសវែក

គ.ស. ១៨១៥ ។

១៧_ រឿងមុជលិន ជាស្នាដៃ បណ្ឌិតសំអាត

គ.ស. ១៨៣៣ ។

១៨ រឿងដាវរឿង ស្នាដៃ ឧកញ៉ាចក្រី-កែរ

គ.ស. ១៧៤១ ។

១៩_ រឿងព្រះជិនវង្ស ស្នាដៃ អារិយតាមុខ-គីន

គ.ស. ១៨៥៦ ។

២០_ រឿងពេជតា ស្នាដៃរបស់ ធម្មបញ្ញា-ម៉ែន

ពី គ.ស. ១៨៥៧ ។

២១_ រឿងវិមានបគ្ន ស្នាដៃ ឧកញ៉ាធិបតី-យ៉ែម

គ.ស. ១៨៥៨ ។

២២– ល្បើកស្រីជ័យ ស្នាដៃ ពញាវិជិត្រ - ព្រ

ពី គ.ស.១៨០៨ ។

២៣– រឿងទេវ័ត្ត, ល្បើកបបក ស្នាដៃ១កញ៉ាសន្ធរ-ម៉ុ

ពី គ.ស.១៨៥៩ ។

២៤– រឿងទុំទាវ (ជំបូងជាស្នាដៃសន្ធរម៉ុក) ក្រោយម

រៀបរៀងជាថ្មីដោយព្រះបទុមថេរសោម ពីគ.ស.១៩១

១– ប្រភេទពាក្យរាយ

១– សិលាចារឹកអង្គរវត្ត (កាតមានដើមមិនឃើញឈ្មោ

ពីសតវត្សទី១៦ ។

២– ព្រះរាជក្រឹត្យក្រមផ្សេងៗ សរសេរក្នុងរាជព្រះបា

ជ័យជេដ្ឋាទី២ ពីសតវត្សទី១៦ ។

៣– មហាវេស្សន្តរជាតក (ព្រះបាទអង្គឌួង មិនទាន់ជា

កែសម្រួលបោះពុម្ពដោយលោក ញ៉ុក-ថែម ។

ក្រៅពីនេះយើងគេឃើញរឿងជាច្រើនទៀត ដែលមិនឃើញមានចារឹកនាមអ្នកនិពន្ធ និងពេលវេលាដែលសរសេររឿងនោះ តែយើងអាចសន្និដ្ឋានបានថា រឿងទាំងនេះក៏កើតរឿងក្នុងសម័យជាមួយគ្នានេះដែរ ព្រោះមានលំនាំពាក្យពចន៍និងរបៀបតែងកាព្យឃ្លាងស្រដៀងគ្នា និងស្នាដៃទាំងព្វយដែលយើងរៀបរាប់ខាងលើ ៗ រីឯផ្ទៃរឿងសោត ក៏ប្រហាក់គ្នាណាស់ដែរ ដូចជារឿងលិនថោង, សុវណ្ណវង្ស, សុវណ្ណផលា, រឿងកិនរវង្ស, រឿងហង្សយន្ត, រឿងសុវណ្ណកាមស, រឿងព្រះសង្ខ, រឿងព្រះចិន្តកុមារ, រឿងស្តេចក្មេង, រឿងព្រះបាទកងកប, ព្រះបាទពិមា, ព្រះបាទធរ័ន, រឿងមត្តលិផល, រឿងទុំកក្កាក់, រឿងក្បួនមាលិយ, រឿងព្រះសុភោគជាដើម ៗ មានរឿងខ្លី ១ ជាច្រើនទៀតណាហៅថារឿងល្បើក ដែលមិនសូវជាពិសេសពិសាប៉ុន្មានដល់ជាអ្នកនិពន្ធសរសេរក្នុងការល្បែងនៅឡើយ ព្រោះផ្ទៃរឿងនិងសាច់រឿងក៏មិនសូវច្បាស់ តែប្រកបដោយគោលគំនិត

ជាខ្ទឹមសារច្រើនណាស់ដែរ គ្រាន់បានជាគតិសម្រាប់
ដំបូន្មានល្អ ៗ ដល់អ្នកអាន ៗ រឿងទាំងនេះយើងអាចសន្និដ្ឋ
បានថា ពិតជាកើតឡើងដំណាលៗគ្នាមែន ព្រោះឈ្មោះតួ
រឿងក្តី ទីន គតិរឿង គឺឧត្តមគតិរបស់អ្នកនិពន្ធក្តី សុទ្ធសឹង
ប្រហាក់ប្រហែលគ្នាមិនឆ្ងាយពីគ្នាឡើយ ៗ ហើយរឿងទាំ
នោះ ច្រើនតែមានយក្សកំណាចដ៏សាហាវៗតាមផ្តួនាមនុស្ស
ឯមនុស្សច្រើនជាអ្នកយុត្តិធម៌ តែងតែងទូវអំពើឃោរឃៅរប
ពពួកទុច្ចរិតជាដរាប ៗ ប៉ុន្តែកម្មផលរបស់មនុស្សទុច្ចរិតទាំ
នោះមិនបានយូរឡើយ ព្រោះទ្រឹស្តីនៃព្រះពុទ្ធសាសនា តែ
តែដាក់កំហុសទៅលើមនុស្សអធម៌ សមនឹងច្បាប់ធម្មជាតិដែ
តម្រូវឲ្យមនុស្សប្រព្រឹត្តផ្លូវល្អ ត្រូវចេះយោគយល់ដល់គ្នានឹ
ដើម្បីរក្សាសេចក្តីសុខនៅក្នុងជីវភាពរបស់ខ្លួន ៗ ចំពោះរប
សរសេរ ឃើញថាមិនទាន់បានសមស្របតាមទំនងរឿងរ៉ាវ
ឡើយទេ ព្រោះសម្បូណ៌ដោយពាក្យស្ទួនៗគ្នា ទៀតច្រើ
បន្ទាយនាំឲ្យវែងឥតប្រយោជន៍ ឯសំដីឆ្លើយឆ្លងគ្នារបស់តួរ

ទឹង សំដីរបស់អ្នកនិពន្ធ ច្រើននៅច្របូកច្របល់គ្នាទាំងឲ្យពិបាកយល់ ។

ចំណែកពាក្យសំដីសោត ច្រើនតែមានពាក្យពិបាក ៗ ដូចជាពាក្យបាលី-សំស្ក្រឹតលាយចំរុះគ្នាជាដើម បណ្តាលឲ្យជនសាមញ្ញ ឬ ជនដែលមានចំណេះតិចមិនគាប់ឈោងចាប់បាននូវសំដីទាំងនោះដោយងាយ ៗ ឡើយ ។ មានតែអ្នកបានរៀនសូត្រខ្ពង់ខ្ពស់ ឬ អ្នកសព្វព្រហ៍ស្តាប់រឿងកំណាព្យញាប់ប៉ុណ្ណោះ ទើបងាយស្តាប់ងាយយល់បាន ។ ក្រៅពីនេះទៀតអ្នកនិពន្ធច្រើនបណ្តែតសតិបញ្ញា ឲ្យហោះហើរទៅអាកាសហួសពីកំរិតធម្មជាតិ ដូចជាធ្វើឲ្យមនុស្សចេះហោះហើរដើរលើអាកាស, ច្បាំងប្រយុទ្ធគ្នាដោយមន្តគាថា ថ្វៃសរបង្កើតបានជាកងចក្រ, ជាវត្ថុផ្សេងៗ, ក្រុងយក្សមានមុខដប់ដៃម្ភៃចេះបែងកាយចេះប្រោសពលដែលស្លាប់ឲ្យរស់ឡើងវិញ, ចេះដបឲ្យកើតកងទ័ពជាដើម ។ មិនតែប៉ុណ្ណោះ អ្នកនិពន្ធច្រើនទុកតួឯកក្នុងរឿង ជាអ្នកមានភ័ព្វសំណាងបានជាក្សត្រគ្រង

កជ្ស តែមុននឹងដល់កំរិតកំពូលសនា យ៉ាងខ្ពស់នេះ តែងត្រូវ
រងអំពើលំបិនលំបាកគោកយ៉ាកយ៉ាងយូរ ដែលប្រកបដោយ
អាការទន់ខ្សោយក្រៃលែង តិតនោះឯងច្រើនតាមបុគ្គលិក-
លក្ខណៈផ្ទាល់ខ្លួនឲ្យសមស្រេះសោះ បែរជាត្រូវពឹងកំឡាំងអ្នក
ដទៃមកជួយយកអាសាទៅវិញ ដូចយ៉ាងមានព្រះឥន្ទ្រទេព-
តាចុះមកជួយ ឬមានមហាឫសីមកជួយសង្គ្រោះជាដើម ។

ពោះបីមានការផ្តុំផ្គងយ៉ាងនេះក៏ដោយ ស្នាដៃបុព្វបុរស
យើងគង់មានគុណភាពពិសេសជាច្រើនបែបណាស់ដែរ ជា
សំខាន់បំផុត គ្រង់ដែលបេះពត់ចិត្តបណ្ដាជនគ្រប់និគមជន-
បទ ឲ្យបេះប្រឹងក្រេបជញ្ជក់រសជាតិអក្សរសាស្ត្រឲ្យបានយូរ
អង្វែងរហូតដល់បច្ចុប្បន្នកាលនេះ ។ ផ្សេងទៅទៀត រឿង
ទាំងនោះអាចប្រៀបបានទីងប្រទីបមួយ ដែលជួយព្រោលបំភ្លឺ
យើងឲ្យស្គាល់របៀបសរសេរ របៀបប្រើពាក្យ និងទំនៀម
របស់ស្រុកយើងខ្លះពីសម័យនោះ ដែលអ្នកសិក្សាទាំងឡាយ

តវការស្វែងរកស្រាវជ្រាវ ទុកជាប្រដាប់ចំរើនសតិបញ្ញា ស្មារតីនឹងធ្វើជាក្បួនច្បាប់សំរាប់សិក្សាថែមទៀត ។



ជាយូរមកហើយ មានខ្មែរយើង គាត់ខ្លះនៅមិនព្រមទទួលជឿថា៖ រឿងរ៉ាវតំណនោះ ជារឿងប្រឌិតកើតឡើង ដោយគំនិតអ្នកនិពន្ធបុរាណសោះ ៗ គេនៅតែនាំគ្នាជឿថា រឿងតំណនេះពិតជារឿងជាតក ដែលព្រះពុទ្ធអង្គ បានត្រេចត្រាត់ក្នុងកាលវដ្តសង្សារ ហើយបានទៅយានយកកំណើត កើតជាតួរឿងតំណនោះម្ដង ៗ ហេតុនេះហើយទើបអ្នកស្ដាប់រឿងតំណឡាយ តែងប្រឹងប្រតិប្រៀប ប្រុងស្មារតី ផ្ទៀងស្ដាប់

នូវរឿងទាំងនោះ មិនឲ្យតក់មួយម៉ាត់ណាឡើយ ព្រមទាំង
ជួយសោកសាច្រើន ក្នុងគ្រាណាគួរនោះកំសត់គេកយាក
សប្បាយរីករាយ នៅវេលាណាគួរនោះបានជួបនឹងក៏ពួកស
ល្អ ៗ ជំនឿនេះបាននៅជាប់ឫសជាប់លាប់ ក្នុងសន្តានប
បណ្តាជនខ្មែរនៅតាមនិគមជនបទនៅឡើយ ៗ ប៉ុន្តែយ
អាចបញ្ជាក់យោបល់ទៀងទាត់ក្រៅផ្សេងពីនេះបាន ដោ
ពឹងផ្អែកលើគោលសេចក្តី ដែលមានចារជាប់នៅខាងដើម
សាស្ត្រារឿងទាំងនោះ ទុកជាអារម្ភកថារបស់អ្នកនិពន្ធដែ
ពណ៌នាហូរហែពីមូលហេតុដែលបណ្តាលឲ្យលោករៀបរៀ
ងរឿងនោះឡើង ៗ មិនតែប៉ុណ្ណោះ អ្នកនិពន្ធបានទាំងប
រីកនូវនាមរបស់ខ្លួនព្រមទាំងកាលបរិច្ឆេទ ដែលតុបតែងរឿ
នោះ ទុកថែមទៀតផង ៗ ជាពិសេស លោកបានធ្វើប
នមស្សការ ដល់គុណព្រះរតនត្រ័យ និង ធ្វើជាសេចក្តីប្រា
ផ្សេង ៗ ដោយសារអានុភាពកុសលដែលកើតឡើងពីក
កសាងរឿងរ៉ាវទាំងនេះ ៗ ត្រង់នេះជាភស្តុតាងមួយបញ្ជា

ផ្តល់ចំពោះសំណៅរឿងទាំងនោះ ៗ យើងអាចរកឃើញ សេចក្តីពិតមួយផ្សេងពីនេះទៀត គឺត្រង់ឫសគល់នៃរឿង ទាំងនេះដកស្រង់ពីគម្ពីរមួយហៅថា «បញ្ញាសជាតក» ដែលសរសេរឡើងជាភាសាបាលីសុទ្ធ ៗ បើយើងឃើញមាន មូលដ្ឋានជាភាសាបាលីដូច្នេះ តើយើងអាចជឿថាពិតប្រាកដ ជារឿងកើតតាំងពីសម័យពុទ្ធកាលដូចគម្ពីរផ្សេង ៗ ដែរឬអ្វី? យើងត្រូវឆ្លើយថា យើងមិនទាន់ជឿស្លុងភ្លាមទេ ព្រោះការអ្វី ផងទាំងពួង មុននឹងជឿត្រូវតែពិចារណាឲ្យហ្មត់ចត់សិន ៗ ដូច្នេះ យើងត្រូវធ្វើការសង្កេតនិងស្រាវជ្រាវរកហេតុផលបន្តិច សិន ៗ គម្ពីរ «បញ្ញាសជាតក» ប្រែថា «ហាសិបរឿង» បានសេចក្តីថានៅក្នុងគម្ពីរនេះ មានរឿងនិទានចំនួនហាសិប ។ យើងអាចពិនិត្យតទៅទៀត ឃើញថាគម្ពីរនេះជាស្នាដៃរបស់ អ្នកប្រាជ្ញនៅជ្រោយសុវណ្ណភូមិជាពិតប្រាកដ ព្រោះគេឃើញ មាននៅតែក្នុងប្រទេសខ្មែរ, ថៃយ៍, លាវ និង ប្រទេសភូមា ប៉ុណ្ណោះ ចំណែកកោះលង្កាដែលជាមូលដ្ឋានពុទ្ធសាសនា

ធំបំផុត គេពុំដែលប្រទះឃើញគម្ពីរនេះទេ ។ ហេតុនេះឯ
នាំឲ្យអ្នកស្រាវជ្រាវគ្រប់សញ្ជាតិ នាំគ្នាសន្និដ្ឋានថាគម្ពីរនេះពិ
ជាកើតឡើងដោយគំនិតអ្នកប្រាជ្ញខ្មែរ, លោក ឧង មន[1] មែ
គ្រាន់តែផ្តុកទៅតាមទ្រឹស្តីពុទ្ធនិយមប៉ុណ្ណោះ ។ គេអាចស្ម
បានយ៉ាងជាក់ទៀតថា អ្នកប្រាជ្ញទាំងនេះតុបតែងឡើងនេ
ក្រោយសម័យពុទ្ធកាលជាយូរអង្វែង ដើម្បីជាគ្រឿងណែន
សតិអារម្មណ៍ របស់ជនានុជនឲ្យនាំគ្នាគេចទៅតាមផ្លូវល្អ
សមាទិដ្ឋិ នៃគន្លងពុទ្ធកថ ។

ភស្តុតាងដែលយើងលើកយកមកលាតត្រដាងខាងលើនេ
សមល្មមឲ្យយើងជឿជាក់ច្បាស់ក្នុងចិត្ត លែងមានការយល់ច្រ
ទៀតថា រឿងនេះជារឿងព្រះ, កើតឡើងតាំងពីសម័យពុទ្ធកាល
ដូចមុនទៀតហើយ ។ ព្រោះគេតែងជួបប្រទះគម្ពីរដីកាច្រើ
ណាស់ដែរ ដែលអ្នកប្រាជ្ញពុទ្ធសាសនាបានរៀបរៀងបង្ក្រ
ឡើងនៅស្រុកអាយយើងនេះដូចជាគម្ពីរមង្គលត្ថទីបនីជាដើម

១– សូមមើលយោបល់ដើមនៃសៀវភៅ «បញ្ញាសជាតកសំរាយ» ភាគ
ផ្សាយពីពុទ្ធសាសនបណ្ឌិត្យ ។

បន្តទៅទៀតនេះ យើងសូមលើកយកស្នាដៃនិង
ដំណើរប្រវត្តិរបស់អ្នកនិពន្ធ សម័យកណ្ដាលមករៀបរៀងតាម
លំដាប់សតវត្ស សំរាប់ជាការសិក្សាយ៉ាងជាក់ច្បាស់ខាងអក្សរ-
សាស្ត្រជាតិយើង ។ ប៉ុន្តែការរៀបរៀងនេះ យើងលើក
យកតែស្នាដៃណាល្អសមរម្យ និង មានចារឹកនាមអ្នកនិពន្ធជាក់
ប្រាកដប៉ុណ្ណោះមកអធិប្បាយ ។ ចំណែកស្នាដៃណាមិន
មានចារឹកនាមជាក់ប្រាកដទេ យើងសូមលើកទុកមួយកន្លែង
សិន ព្រោះការជាក់ប្រាកដមិនទាន់ហុចឲ្យយើងនៅឡើយ ។
ហើយយើងសង្ឃឹមថា ការស្រាវជ្រាវជាបន្ត ១ ទៅមុខទៀត
មុខជាបញ្ជាក់ឲ្យយើងជាមិនខាន ។ ជាដំបូង យើងសូមលើក
យកស្នាដៃណា ដែលមានកាយុចាស់ជាងគេមកពណ៌នា
មុន ដូចមានជាលំដាប់ហូរហែតទៅ ៖

## បណ្ឌិត ជ័យ _ ឧត្ត

បណ្ឌិតជ័យ - ឧត្ត ជានាម៉ឺនមួយរូបក្នុងរជ្ជកាលព្រះបាទ
ធម្មរាជា ។ នៃមួយលោក បាននាំគ្នីគ្នាជាច្រើនទៅធ្វើបុណ្យ

អំពីចំការនៅឯអង្គរវត្ត ទើបលោករៀបចំធ្វើសិលាចារឹកជាច្រើន
ផ្ទាំង ដែលនិយាយសុទ្ធតែពីពាក្យស្មូត្រ និងបួងសួងប្រាថ្នា
ឲ្យសំរេចដូចបំណងទៅជាតិមុខ ៗ យើងលើកយកស្នាដៃ
របស់លោកបន្តិចមកបញ្ជាក់ជាភស្តុតាងដូចខាងក្រោម ៖

« . . . ខ្ញុំសូមនោះរៀងមក ជាពន្លកសពើជ្រៃ អង្គខ្ញុំនោះ
« ឯងនៃ ដោយនាមហៅ ជ័យ-ឧទ្ទ ៗ រីខាងជាកន្សែ
« ឈ្មោះពីរនៃខាង ប៉ែន-សខ រូបនោមទន់ផែនអន យល់សក្តិ
« សមចរិតស្រី ៗ លុះព្រះបាទពាក់ជា ឲ្យសក្តាទីទៃខ្ញុំ ជ័យ-ឧទ្ទ
« សេនាបតី ហើយឲ្យធៃព្រក្តីហេងៗដល់ទៅតិរ្សងយំ នាម៉ុន
« ធំឯកឯងហេង លុះដាយមកជផង់ នេះឯងហេងសាន
« ត្រីស្ងួល ៗ ឯមឹងប៉ែន-សខណា យសសក្តាដោយសមគួរ
« ឈ្មោះនោះយល់បរិបូណ៌ ជាជំទាវទេពសុគណ៌ (១) . . . »

សេចក្តីដកស្រង់ខាងលើនេះ បណ្ឌិត ជ័យ-ឧទ្ទ បានយ
ការណ៍ប្រាប់យើងអំពីប្រវត្តិ និង លំដាប់សក្តិរបស់លោក

---

១– អត្ថបទស្រង់ពីសៀវភៅសិលាចារឹកអង្គរវត្ត ដែលពុទ្ធសាសនបណ្ឌិត្យ
បោះពុម្ពផ្សាយ ។

កគមានកិរិយាឈ្មោះនាងប៉ែន-សន ដែលប្រកបដោយរូប
មច្រឹមប្រិយ៍ ។ គ្រានោះលោកមានការជាសេនាបតី រួច
ដោយលោកបានទៅស្ដីទ័ពនៅខេត្តត្បូងឃ្មុំ ដាប់ផុតបានចទួល
ខៈដាំ១កញ្ញាយមកជ ។ ចំណែកកិរិយាលោកក៏បានឡើង
សជាផ្ទាប់ដោយមាននាមសន្មតថាផ្ទាសុពណ៌ ។

# ព្រះបាទស្រីធម្មរាជា

ព្រះបាទស្រីធម្មរាជាថ្មព្រះរាជសម្ភារ មានព្រះនាមដើម
ទៅពញាតូ » ជារាជបុត្រនៃព្រះបាទជ័យជេដ្ឋាទី-២ ។
លនៅប្រជន្ម១៦សេក ព្រះអង្គទ្រង់សាងព្រះផ្នួសជា
ន្ត៖ វង្គតទៅ ព្រះអង្គបាន
លនៅពីកុមារ ព្រះ
តាបានប្រុងប្រៀបឡុគ្គ ... ព្រះអង្គរួមព្រះបិតា
តាទីទៃព្រះនាម បុប្ផាវតី ។ ប៉ុន្តែដោយទ្រង់សាងផ្នួសយូរ

ពេក ព្រះក្សត្រីអង្គនេះក៏បានជាអគ្គមហេសីព្រះទ័យទៅ
លុះដល់ គ.ស. ១៦២៩ ព្រះអង្គបានលាចាកសិក្ខាប
គ្រប់គ្រងរាជសម្បត្តិ នៅព្រះរាជវាំងកោះឃ្លាក[១] ។ ព្រះ
មិនបានផុតព្រះទ័យ នឹងព្រះនាងបុប្ផាតែនៅឡើយទេ
គេឃើញមានស្នាព្រះហស្ត ដែលព្រះអង្គទ្រង់លិខិតជា
អត្ថុក ឆ្លើងឆ្លើយជាមួយព្រះក្សត្រីទៅគង់ទ្រង់ហេតុ
សព្វថ្ងៃនេះ[២] ។ ព្រះអង្គជាយុវក្សត្រមួយ ប្រកបដោយ
ប្រាជ្ញាកវី តែងសព្វព្រះរាជហឫទ័យនឹងអក្សរសាស្ត្រ
ណាស់ ព្រោះព្រះអង្គបានសិក្សា វិជ្ជាភាសាបាលីចេះមុ
នឹងបានទុកស្នាព្រះហស្តឲ្យយើងជាច្រើន សុទ្ធសឹងប្រ
ដោយពាក្យកាព្យឃ្លោងផ្អែមល្ហែម នឹងជួនរណ្ដំគួរចាប់ចិត្ត

យើងស្រង់អត្ថបទខាងក្រោមនេះ ពីក្នុងសា
«សរសើរហេមន្តមាស» មកធ្វើជាគ្រឿងពិនិត្យសង្កេ
ស្នាព្រះហស្តព្រះអង្គដូចតទៅ ៖

---

១– គឺកោះឃ្លាប់កណ្ដាលសព្វថ្ងៃ ។ ២– សូមមើលក្នុងសៀវភៅពង្សាវតា
ទេសកម្ពុជា សរសេរដៃ ដែលមានដម្កល់នៅបណ្ណាល័យពុទ្ធសាសនបណ្ឌិ

« ... ដំណាលដំណើរនោះ សរសើរគ្រាហេមន្តមាស ត្រសៀកឯអាកាស សែនសាយល្ហេវទៅ ៗ ស្រះណោះ បក្សាគរ ឯអម្ពរធ្វៀលធ្លាក់ទៅ សំកុកសំកាំងនៅ សងស្នូរ សាខសត្វយាសយំ ៗ ខ្លះហើរប្រកៀងគ្នា ចាំទៀងនៅ ទ្រង់ព្រាយសម ខ្លះសសិតស្លាបចំ ខ្លះហើរហួសផ្ទេកទៅ ទៅ ៗ ខ្លះរេរកចំណី ដោយមុទិតគន្ធាជ្រៅ ខ្លះចៀងឆាប សំដៅ ចុះចាប់ចឹកសន្ធិសុី ៗ គន់គួរស្រះណោះសល់ ស្រះណោះគលផ្សាបក្សី សងស្នូរសត្វសំដី រៀយ ៗ រែង ភាសាសត្វ ៗ ...

កំណាព្យខាងលើនេះ ព្រះរាជសំភារទ្រង់និពន្ធសរសើរ សភាព និងធម្មជាតិទាំងឡាយ ក្នុងហេមន្តរដូវ ឬក្នុងខែ ផលធ្លាក់សន្សើម ៗ ព្រះអង្គទ្រង់បានចុបយកពេលល្ងាច ជាក់ គ្រាដែលព្រះសុរិយាជ្រេទេរទៅខាងលិច គ្រានោះ នបក្សាបក្សីជាច្រើន ស្រែកហោកញ្ញៀវទ្រហឹងអឺងកង យេធ្លងគ្នា ៗ ខ្លះហើរឯកណ្ដាលអាកាសវេហាស៍, ខ្លះចាំនៅ

លើមែកព្រឹក្សា សំកាំងស្លាប ឬ សសិតស្លាប និងខ្វះទៀ
ចំគៀកគ្នា ឈ្មោលញីយ៉ាងសប្បាយរីករាយ ។ មានបក្
ខ្វះហើរត្រសងតាមមាត់ចំការស្រូវជាប់មត្តាធ្វើជាចំណី ហើយ
ស្រែកច្រៀងឆ្លើយពីចុងមួយទៅចុងមួយ ឮគ្រលួចគួរស្រណោះស្រ
ផង ។ ស្នាព្រះហស្ថនេះ ព្រះរាជសម្ភារបានបង្ហា
នូវសម្រស់កាព្យល្អបំព្រង និងពាក្យសំដីចំនុចគួរចាប់ចិ
មិនខុសគ្នាពីរឿងដទៃទៀត ដែលជាស្នាព្រះហស្ថរបស់ព្រះអ
ដែរនោះទេ សម្តែងឲ្យយើងឃើញថា ព្រះយុវក្សត្រអ
នេះ អាចកប់បានជាបណ្ឌិតឯក ខាងអក្សរសាស្ត្រយើងក្
សតវត្សទី-១៧ ។ ចំណែកខាងស្នាព្រះហស្ថខាងក្បួនច្បា
ប្រដៅវិញ ក៏គួរឲ្យសរសើរណាស់ដែរ ព្រោះច្បាប់ពាក្យមួយ
ម៉ាត់ ៗ សុទ្ធតែមានន័យទូលំទូលាយ អាចលើកយក
គតិយ៉ាងល្អ ៗ ផង ។ មិនតែប៉ុណ្ណោះ មានពាក្យក្នុងនោ
ជាច្រើន បានក្លាយទៅជាពាក្យសុភាសិតរបស់យើង សព្វថ្ងៃ
ប្រើតែមាត់ចាំងក្រែងចាស់ទៅហើយ ។ លោកយកនឹងបា

បីញពាក្យទាំងនោះ  នៅក្នុងអត្ថបទយ៉ាងខ្លីខាងក្រោមនេះ
លេយើងស្រង់ចេញពីសាស្ត្រាច្បាប់ព្រះកជសម្ភារ  ដូច
តទៅ៖

« ... ផ្អែមពីរប្រការ ចំណេរទៅដាល កុំគាលឲ្យធំ ផ្អែមមួយពាក្យពាល រែងកលគេក្តី ផ្អែមមួយពាក្យស្រី ស្រដីមាយា ៗ ពាក្យត្រូវរែងរឹង ស្រារែងស្រវឹង កុំផែលពិសា ពាក្យពិតរែងស្មូង កុំពិរោះថា បណ្តាំមេបា រែងថាពុំគាប់ ៗ ខ្ញាំរែងស្អប់បេះ ខ្សត់ឥតចំណេះ ស្អប់អ្នកមានទ្រព្យ ស្រីស្រាលប្រច័ណ្ឌ រែងស្អប់ខ្ញុំគាប់ ពាលពិតឥតច្បាប់ រែងស្អប់ប្រដៅ ៗ ចង់បុណ្យបានបាប ប. ចើងចង់លាភ រែងបាត់ធនទៅ មានខះបាត់មិត្ត ឥតអ្នកជាទៅ ក្រៅក្រោធយោរយៅ រមែងបាត់អង្គ ៗ ស្មូងគាប់បានយស ចង់ស្មូងរបស់ ប្រើបេះផ្គត់ផ្គង់ ចង់ធំកុំអួត ដើមមានតួជពង្ស បង់បានខ្ទួនត្រង់ ប្រើផ្គាប់អ្នកមុខ ៗ ខ្លួនហើរគ្មើតខ្យល់ នាយថ្កើងដ្បិតពល រក្សាឲ្យសុខ

,, ទ្រព្យគង់ផ្សិតស្រី នេះសំដៅទុក ផ្ទះធំស្រណុក ផ្សិ

,, កិរិយាផា ។ . .

អត្ថបទខាងលើនេះ ជាពាក្យប្រៀនប្រដៅគ្រង់ៗ ចំពោ
ផនទូទៅ តាំងខាងផ្ទះបរិយា តាំងខាងអាជីវកម្ម ដែលត្រូ
ប្រកបការចិញ្ចឹមជីវិត ។

## ឧកញ៉ាកោសាធិបតី-កៅ

ឧកញ៉ាកោសាធិបតី កៅ ជាកវីឯកក្នុងរជ្ជកាលព្រះបា
អង្គចន្ទ ។ លោកបានរៀនសូត្រចេះស្ទាត់ជំនាញអក្សរខ្មែរ និ
ភាសាបាលី ជាពិសេស លោកបានចេះតាំងខាងច្បាប់កផ្កា
គ្រប់សព្វល្អមប្រើការបានទៀត ។ ហេតុនេះហើយ ទើ
ព្រះនរបតី ទ្រង់ប្រោសប្រទាន ឲ្យធ្វើជាចៅហ្វាយឃ្លាំងមណី
តេចក្នុងព្រះបរមរាជវាំង និងបានជាទីប្រឹក្សារបស់ព្រះអង្គខា
ច្បាប់ទៀតផង ។ ស្នាដៃរបស់លោក មានតែមួយប៉ុណ្ណោ
គឺរឿង ''ក្រុងសុភមិត្រ,, ។ ក្នុងការម្ភុកថានៃរឿងនេ

...កគ្គកទិពនូបានប្រាប់យើងថា លោកបានដកស្រង់ចេញ ...ពីរឿងក្នុងបញ្ញាសជាតក ត្រង់ជាតកទី ៩ ដែលមានជា ...សាបាលី ។ លោកបានសរសេរបញ្ចូលនូវពាក្យពេចន៍ ...ជាច្រើន ដើម្បីបានជាសម្រស់នៃរឿង ដែលមានបន្ថែម ...តែងជាពាក្យកាព្យឃ្លោងយ៉ាងល្អល្អាយ ដែលយើងអាច ...ន្ទើបបាននូវផ្លូវរឿងនោះដូចតទៅ ៖



ព្រះរាជាមួយអង្គព្រះនាម ក្រុងសុកមិត្រ មានអគ្គម-ហេសីព្រះនាមនាងកេសនី ព្រមទាំងបុត្រាពីរអង្គ ត្រង់គង់នៅនគរពារាណសី ។ ថ្ងៃមួយព្រះអនុជព្រះអង្គព្រះនាមអសុកមិត្រ បានប៉ងប្រាថ្នាទីងធ្វើឃាតព្រះអង្គដើម្បីដណ្តើមយករាជសម្បត្តិ ។

លុះទ្រង់ជ្រាបហេតុនេះក្លាម ព្រះបាទក្រុងសុភមិត្រក៏នាំមហេ
សីនិងបុត្រទាំងគូភៀសព្រះអង្គចេញពីព្រះនិវេសន៍ ដើ
រងកុំឲ្យមានកើតចលាចលក្នុងប្រទេស ។ ទ្រង់យាងក
ព្រៃភ្នំក្រំថ្ម ស្វាយតែផ្លែឈើដែលមានដុះនៅតាមដងព្រៃ
ថ្ងៃមួយបានទៅដល់មាត់ស្ទឹងធំមួយ ព្រះអង្គទ្រង់ទុកបុត្រទាំ
ពីរនៅត្រើយខាងអាយ ហើយពមហេសីហែលឆ្លងទៅក
ត្រើយនាយ ។ ជួនពេលនោះមានព្រានប្រមង់ប្ដី-ប្រពន្ធ
ទូកមកឃើញកូនក្មេងទាំងពីរនៅត្រៃមត្រមាបផ្លូវនោះ
លើកដាក់លើទូកនាំយកទៅ ។ ឯព្រះកជាកាលដែលហែ
បានដល់ត្រើយម្ខាងហើយ ក៏ដាក់មហេសីនៅក្រោមដើ
ឈើមួយ ផ្តាំឲ្យនាងនៅចាំ ហើយហែលត្រឡប់មកយ
បុត្រាទាំងគូវិញ ។ គ្រាដែលហែលឆ្លងផុតមក មានសំ
ជំនួញមួយបើកក្ដោងមកដល់ ឃើញនាងមហេសីនៅតែមួ
អង្គឯង គេក៏នាំគ្នាចាប់នាងដាក់សំពៅយកទៅ ។ ចំណែ
ក្រុងសុភមិត្រហែលឆ្លងទៅដល់ត្រើយម្ខាងហើយ រកមើ

កូនពុំឃើញក៏ដង្ហោយហៅពេញព្រៃព្រឹក្សា ៗ លុះអស់សន្សឹម ហើយទើបហែលឆ្លងមករកមហេសីវិញ ៗ មកខាងនេះ ក៏ទ្រង់មិនបានយល់មហេសីទៀត ៗ ព្រះអង្គវិតក្កក្រៃលែង ក៏យាងតែមួយអង្គឯងកាត់ព្រៃគ្រោកព្រៃគ្រាញ់ ហូតទៅដល់ក្បាននគរមួយឈ្មោះឧតរតក្កសិលា ៗ នគរនោះឥតមានមហាក្សត្រទេ ដូច្នេះសេវកាមាត្យទាំងឡាយក៏នាំគ្នារៀបក្បួនគជេន្ទ្រផ្សង់រកអ្នកមានបុណ្យមកសោយសម្បត្តិ ៗ ក្បួនគជេន្ទ្របានទៅអញ្ជើញក្រុងសុតមិត្រ សុំឲ្យព្រះអង្គឡើងគ្រប់គ្រងរាជ្យតក្កសិលា ៗ ថ្ងៃមួយនាយព្រានប្រមង់បាននាំកុមារពីររូបទៅថ្វាយព្រះអង្គ ធ្វើជាមហាតលិកតែទ្រង់ពុំទាន់ស្គាល់ជាកូនបុត្រនៅឡើយទេ គ្រាតែដល់ពេលមួយនាយសំពៅនាំយកបណ្ណាការមកថ្វាយព្រះអង្គ ហើយព្រះអង្គទ្រង់ឃាត់ឲ្យនាយសំពៅនៅសំណេះសណ្ណាលលេងសិន ដោយទ្រង់ចាត់ឲ្យមហាតលិកក្មេង ១ ទាំងពីរទៅនៅចាំសំពៅជំនួស ៗ គ្រានោះចៅកំឡោះទាំងពីរបានសួរដេញដោលគ្នារកដើមដាន

ពីរឿងមាតាបិតាខ្លួន ស្រាប់តែនាងកេសនី ដែលនៅក្នុងបន្ទប់ក្បែរនោះឮសូរក៏ចេញមកឱបកូនសោយសោក នាំឲ្យពួកសំពៅផ្អើលនោះឡើងចាប់អ្នកកម្លោះទាំងពីរយកទៅថ្វាយក្សត្រ សុំឲ្យព្រះអង្គវិនិច្ឆ័យទោសក្មេងនេះ ព្រោះលបចាប់នាងស្រី ៗ ព្រះរាជាទ្រង់ធម៌ ទ្រង់ត្រាស់សួរទៅមហាតលិក តាំងពីដើមចប់មក ទើបទ្រង់ជ្រាបថាជារាជបុត្រនឹងជាមហេសីរបស់ព្រះអង្គ ៗ ទ្រង់ក៏បានជួបជុំមហេសីនឹងបុត្រនៅគ្រងរាជ្យជាសុខសាន្តរហូតទៅ ៗ

នៅក្នុងរឿងមួយៗ លោកញ៉ុកថាធិបតី-កេ ប្រើតម្រៀបពាក្យពេចន៍ឲ្យបានសមរម្យ ហើយកុំឲ្យមានពាក្យជួនឥតប្រយោជន៍ផង ៗ ដូច្នេះហើយ ទើបស្នាដៃនេះ បានសេចក្តីសរសើរជាច្រើន ពីសំណាក់អ្នកសិក្សាទាំងឡាយ ហើយនៅក្នុងរឿងនេះ លោកបានរៀបធ្វើក្បួនកាព្យខ្មែរបុរាណលាយចំរុះជាមួយផង សំរាប់បង្ហាញអ្នកក្រោយ ១ ឲ្យយល់ថារបៀបប្រើកាព្យខ្មែរយើងដូចម្តេចខ្លះ ៗ ដើម្បីជាសេចក្តីបញ្ជាក់

យើងស្រង់យកសេចក្តីបន្តិចក្នុងរឿងនោះ ត្រង់ដែលនាងកេសរីទួញយំរលឹកស្វាមីនិងបុត្រ ក្នុងគ្រាដែលឈ្មួញសំពៅចាប់នាងយកទៅ ៗ អត្ថបទនេះមានដូចតទៅ ៖

" ...កាលនោះនាងទេវី អគ្គមហេសីកដធីតា នាងភិត
" ញ័រអង្គា យល់អស់ពាណិជទាំងឡាយ ៗ នាងរែងសោយ
" សោកា ទួញព្រះមហាក្សត្រពណ្ណរាយ ផ្កាខ្ចាចឈើសព្វ
" សាយ វែងគានតឹងពាក្ខ ៗ ទួញថាព្រះបង ប្អូន
" មករងទុក្ខពេកក្តាត់ ថាព្រះមហាក្សត្រ ស្តេចវងទ្រង់
" ព្រះមេត្តា ៗ មិនដឹងជាប្អូនស្រី កើតទុក្ខដល់ម្ល៉េះណា មក
" នៅខឹងអស់ពា-ណិជគេគ្រាយកប្អូនទៅ ៗ ថាម៉្លេះសម
" ព្រះបង វិលមកផងរកប្អូនពៅ ពុំឃើញរត់រកហៅ សព្វ
" កណ្តាលព្រៃព្រឹក្សា ៗ ឱអាសូរបុត្រពៅ ម៉្លេះយំហៅរក
" មាតា សង្រេងឈើខ្ទាចផ្កា ក្បែរដីរ៉ៃសូន្យបោះបង់ ៗ ...

អត្ថបទខាងលើនេះ ចូលញ៉ាំកោសាធិបតី-កៅ ធ្វើជា

បទព្រហ្មគីតិ ដើម្បីជំរុញសំដីដំណាងសេចក្ដីសោកសង្រេង
របស់នាងកេសនី ។

## ឧកញ៉ាវង្សសារពេជ្រ-នង

លោកមានងារមួយទៀតជា ឧកញ៉ាព្រះឃ្លាំង-នង គឺ
ជាអ្នកប្រាជ្ញមួយខាងផ្នែកអក្សរសាស្ត្រយ៉ាងចំណានបំផុត ក្នុង
សម័យឧត្តុង្គ ព្រោះលោកបានរៀនសូត្រភាសាជាតិ, ភាសា
សៀម និងភាសាបាលីចេះយ៉ាងស្ទាត់ជំនាញ ។ កាលរាជ្យ
ព្រះបាទអង្គដួង លោកមានងារជាឧកញ៉ាវង្សសារពេជ្រ ដ្បិត
លោកជាអ្នកចេះព្រះត្រៃបិដក និងអក្សរសាស្ត្រពិតប្រាកដ ។
ព្រះមហាក្សត្រទ្រង់ប្រោសប្រាណ តាំងធ្វើជាគ្រូលើសំណាក់
ព្រះសង្ឃនិងគ្រហស្ថទាំងឡាយនៅក្នុងព្រះនគរ ។ លុះមក
ដល់រជ្ជកាលព្រះបាទសម្ដេចព្រះហរិរក្សរាមាធិបតី ព្រះអង្គ-
ឌួង លោកកវីនេះបានឡើងជាទីប្រឹក្សា និងជាកវីសហការ

ក់ព្រះកជា ហើយព្រះអង្គទ្រង់ប្រោសព្រះកជធាន
ានន្តរសក្តិជាចាងហ្វាងឃ្លាំងព្រះកជទ្រព្យ ទើបមានអាជា
កញ្ញាព្រះឃ្លាំង ។ លោកទុកស្នាដៃឲ្យយើងជាច្រើនគឺ ៖
រឿងគោតកុលកុមារ, លោកនយជាតក, ច្បាប់សុភាសិត,
រឿងបុញ្ញសារ - សិរីសារ, រឿងវរនេត្រវរនុជ និង រឿងព្រះ
បមុទ្ទ ។ ឥឡូវយើងលើកស្នាដៃលោកមួយមកពិភាក្សា
រឿងគោតកុលកុមារ ។ រឿងនេះមិនសូវវែងទេ តែ
រម្ភណ៍ដោយការកប់រៀប ។ យើងអាចនិទានសរុបផ្ទៃ
រឿងបានយ៉ាងខ្លីដូចតទៅ ៖

គោតកុលកុមារ ជាមាណពកំសត់ប្រកបរបរធ្វើចំការ
ដាំបន្លែ ។ ឪពុកម្តាយស្លាប់ចោលអស់ ។ ព្រះឥន្ទបាន
ទៅនាំបុត្រីព្រះកជាមួយអង្គ ឯនគរមួយនៅកណ្តាលសមុទ្រ
កឲ្យធ្វើជាភរិយាបុរសកំសត់នេះ ។ គូស្វាមីភរិយានេះ
ស្រឡាញ់គ្នាណាស់ តែនាងភរិយារូបឆោមល្អក្រៃលែង នាំ
ឲ្យកើតរន្ធឺឮដំណឹងទៅដល់ព្រះបាទព្រហ្មទត្តជាក្សត្រនគរនេះ

ទ្រង់ក៏ប្រើឲ្យរាជអាមាត្យរកមធ្យោបាយ យកនាងស្រីនេះឲ្យបាន ។ រាជអាមាត្យទទួលបង្គាប់ហើយ ក៏ប្រើមធ្យោបាយគ្រប់បែបគ្រប់យ៉ាងបោកប្រាស់ទៅកំសត់នេះ តែកសមាមាន ទៅកំសត់នោះតែមានជោគជ័យលើទៅវិញ ។ ថ្ងៃមួយអាមាត្យបានចាប់បង្ខាំងប្តីប្រុសនេះបាន, នាងក៏រិយាដឹងដូច្នោះក៏លួចតែចេញពីខ្ទមទៅឯនគររបស់នាងទៅវិញ ដើម្បីឲ្យផុតពីកណ្តាប់ដៃអាញ ។ លុះគោតកុលកុមារត្រឡប់មកវិញរកប្រពន្ធពុំឃើញក៏នាំឆ្កែមួយដើរទៅតាម ។ ដល់សមុទ្រក៏នាំគ្នាហែលឆ្លង ។ ពេលនោះឆ្កែក៏ស្លាប់ទៅ នៅតែម្នាក់ឯងប្រឹងហែលរួចទោចឆ្កែត្រាតែមានត្រីកម្មួយមកជួយនាំផ្លូវ លុះទៅដល់សួនច្បាររបស់ព្រះចៅជាបិតាក្មេក ។ ពេលនោះមានពួកទាសី មកដងទឹកទៅជម្រះព្រះកាយឲ្យព្រះនាង ។ គោតកុលក៏លួចទំលាក់ព្រះទម្រង់ទៅក្នុងក្អម ដល់នាងនេះយកទៅស្រោចលើកាយព្រះនាង ស្រាប់តែចិញ្ចៀននេះបានចូលទៅស៊ិតជាប់ [illegible]

បានដៃស្នែងយកកោតកុលកុមារចូលទៅក្នុងនគរ រៀបអភិសេកឡើងគ្រងរាជ្យ ។ រួចដល់ទីបំផុត ក៏វិលមកយករាជ្យពីព្រះបាទព្រហ្មទត្តសោយទៀត ។

ក្នុងរឿងនេះ ឧកញ៉ាព្រះឃ្លាំង-ងន់ រៀបចំក្បួនកាព្យនិងពាក្យពេចន៍ មិនចាញ់ឧកញ៉ាកោសាធិបតី-កៅ ទេ ដែលយើងនឹងឃើញក្នុងអត្ថបទដកស្រង់ពីក្នុងរឿងនេះ ដូចតទៅ ៖

«...ព្រះឥន្ទ្រជៀងជាក់ ទ្រង់បើកទិព្វចក្ខុ ជ្រួតជ្រាបថែថា
« កោតកុលត្រកាល ពិសាលសោកា ពុំមានគរិយា ជាគូ
« សម្ពន្ធ ។ ទើបស្ដេចគិតថា នាងទេពធីតា ដែលអញនិមន្ត
« ចុះទៅមនុស្សលោក យោនយកបដិសន្ធិ នៅនាដំបន់
« សត្តកុដបុរី ។ អាស្រ័យនៅនា ក្នុងឧទរ ព្រះអគ្គមហេសី
« ស្ដេចសត្តកុដរាជ អំណាចឫទ្ធី គ្រប់គ្រងបុរី ពលពាល
« ស្មា ។ វីនគរនោះ ជាទីទួលកោះ កណ្ដាលជលសា
« [illegible] ក្បួនយោជន៍គណនា [illegible]

« សប្បាយ ៗ ទៀតនឹងប្ដី ពាកណាស់ គណនាចម្ងាយ
« យោជន៍សាមសិបប្រាំ ពិតពុំឃ្លាតឆ្ងាយ គេក្រោយឈ្ញ
« ឆ្ងាយ ចូលជួញឥតអាក់ ៗ រីកជតីតា សោឡស
« វស្សា កប់នូវលក្ខណ៍ ដូចទេពអប្សរ បវរសួស្ដីសក្តិ
« ព្រះខាត់ព្រះភក្ត្រ ដូចចន្ទបូណ៌មី ៗ

អត្ថបទនេះ ចេញព្រះឃ្លាំង-ខង ពណ៌នាពីសេចក្ដីល្បួងយល់របស់ព្រះឥន្ទ ក្នុងការអញ្ជើញនាងទេពធីតាឲ្យចុះទៅចាប់កំណើតនៅនគរសេត្តកុដបុរី ដើម្បីបានជាគូនឹងគោត-កុលកុមារ ៗ កវីយើងបានបញ្ជាក់ថា បុរីនេះស្ថិតនៅជាកោះកណ្ដាលសមុទ្រមានទំហំបួនយោជន៍ ៗ ទើបបំផុតលោករាប់រៀបពីសម្រស់លំអរបស់នាងធីតា ដែលអាយុបាន ១៦ ឆ្នាំ ៗ អត្ថបទនេះ អាចបញ្ជាក់បង្ហាញយើងពីការចំរើនលូតលាស់របស់អក្សរសាស្ត្រយើង ដោយសារស្នាដៃរបស់កវីខ្មែរបុរាណ ៗ

# ព្រះបាទហរិរក្សរាមាធិបតី ព្រះអង្គឌួង

ព្រះបាទអង្គឌួង ទ្រង់ជាព្រះរាជឱរសនៅនៃព្រះបាទ
…អេង ព្រះចៅក្រុងកម្ពុជាសម័យព្រះរាជវាំងក្រុងឧត្តុង្គមាន
ជ័យ ។ កាលពីកុមារព្រះអង្គបានយាងទៅសិក្សាវិជ្ជានៅ
…ប្រទេសសៀម ដែលនាំឲ្យព្រះអង្គទ្រង់ក្តីស្មានក្នុងព្រះបញ្ញា-
…ាណខាងផ្លូវអក្សរសាស្ត្រ ។ ក្នុងកាលសិក្សានេះ ព្រះយុវ-
…ក្របានទៀតរៀបរៀងជាសៀវភៅនិងបង្រៀនច្បាប់ទំលាប់
…ន ៗ ទុកកេរ្តិ៍រហូតយើងសព្វថ្ងៃ ។ ក្នុងគ្រាដែលព្រះអង្គ
…ឡើងគ្រប់គ្រងរាជសម្បត្តិហើយ ដែនដីកម្ពុជាដូចមាន
…ល់ព្យុះគ្រប់ទិសបក់បោកបង្កើតជាកោលាហលក្នុងព្រះនគរ
…កាលនឹងបច្ចាមិត្រតាំងសងខាង បានជ្រៀតជ្រែកទឹកដី រាត
…ណាចរបស់គេក្នុងប្រទេសយើង បណ្តាលឲ្យអ្នកស្រុកអ្នក
…នរកើតវឹកវរសើងគ្រប់ដំបន់ ។ ព្រះបាទព្រះហរិរក្សរាមាធិបតី

[illegible]

ដើម្បីបង្កើតសន្តិសុខ

សម្រាប់ប្រជានុកស្រ្តដែលជាទីសព្វព្រះទ័យរបស់ព្រះអង្គទៀ
វិញ ៗ ពោះបីជាស្ថិតនៅក្នុងយុគយ៉ាងវឹកវរយ៉ាងនេះក៏ដោ
ព្រះករុណាព្រះអង្គនូវ ទ្រង់មិនបោះបង់ ផ្នែកវប្បធម៌ឡើ
ព្រះអង្គតែងប្រមូលអ្នកប្រាជ្ញរាជបណ្ឌិតខាងសាសនា និងខា
អក្សរសាស្ត្រមកនៅជួបជុំគ្នាក្នុងព្រះរាជវាំង ដើម្បីត្រិះរិះ
ក្រងនូវក្បួនច្បាប់ផ្សេង ៗ ផង និងបង្ហាត់បង្រៀនដល់កុលបុ
ណាដែលត្រូវការស្វែងរកវិជ្ជាទៀតផង ៗ មានសេចក្តី
ណាលថា ព្រះប្រិយមហាក្សត្រអង្គនេះបានធ្លៀតពីកិច្ចក
ផែនដី យកពេលបង្ហាត់បង្រៀនព្រះសង្ឃគ្រហស្ថដែ
ជាសិក្ខាកាមកុលបុត្រទាំងឡាយផ្ទាល់ព្រះអង្គ ព្រមទាំងធ
ឲ្យរាជការផែនដីទូទៅអនុវត្តការផ្សេង ៗ ប្រកបដោយអក្ស
សាស្ត្រត្រឹមត្រូវ ពោលគឺមិនឲ្យជនណាមួយសរសេរពា
ពេចន៍ប្អូសំបុត្រស្នាមប្រែបន្ទិចទាល់តែទៀយ ៗ សេចក្តីដំណា
មួយយ៉ាងទៀតថា ព្រះបណ្ឌិតអង្គនេះ ប្រកបដោយប្រ
សរីរៈកាយមាំមួនល្អណាស់ ព្រះអង្គមិនសូវមានព្រះរោ

ឡើយ  បានជាយើងឃើញព្រះបរមតាយាលក្ខណ៍របស់ព្រះ
អង្គដ៏មានព្រះភក្ត្រធំទូលាយ ព្រះនេត្រថ្លាស្រឡះ ព្រះនលាដ
ធំទូលាយដ៏មានករមារការវែងក្រាប់ទឹងខ្នង់ព្រះឃានយ៉ាងមូល
ហើយស្រួចបន្តិច, ព្រះសុរសៀងសមជាអ្នកមានកេហារសំខាន់
ណាស់ ៗ ចូរយើងចាំថា គឺជាព្រះអង្គនេះហើយ ដែលជា
ឧបមក្សត្រនៃព្រះរាជសន្តតិវង្សព្រះមហាក្សត្រខ្មែរគ្រាបច្ចុប្បន្ន
នេះ ព្រោះវេជ្ជធម្មនិញយើងពោលថា « រាជសម្បត្តិនៃប្រទេស
កម្ពុជា   ជាកេរ្តិ៍មត៌កពីព្រះបាទសម្តេចព្រះហរិរក្សរាមាធិបតី
ព្រះអង្គឌួង » ។

ព្រះបាទសម្តេចព្រះអង្គឌួងដែលជាមហាកវីឯករបស់ជាតិ
យើងបានទុកស្នាព្រះហស្តនូវរឿងកាព្យ និង ក្បួនច្បាប់ជាច្រើន
ល់សព្វថ្ងៃ  ដែលវេលានេះយើងស្រាវជ្រាវឃើញមានទាំង
ពាក្យកាព្យខ្លះ ពាក្យរាយខ្លះដូចកប់ឈ្មោះតទៅនេះ ១-រឿងកាកី,
- រឿងសុតន្ទរោង,  ៣- ច្បាប់ស្រីព្រះអង្គឌួង,  ៤- បទ
ពាលរឿងល្ខោនផ្សេងៗ ។  គ្រានេះយើងសូមលើកយកស្នា

ប្រហស្ចឯករបស់ព្រះអង្គគឺរឿងកាកី មកធ្វើសេចក្ដីសង្កេ
ត្រៀងបញ្ជាក់ ដែលយើងអាចសរុបរឿងនេះបានដូចតទៅ

ព្រះបាទព្រហ្មទត្តមានអគ្គមហេសីប្រកបដោយរូបឆោម
លោមពណ៌ល្អក្រៃលែងព្រះនាមនាងកាកី ។ ព្រះអង្គស
ព្រះទ័យនឹងក្រសាលល្បែងចតុរង្គណាស់ ។ មានគ្រុឌ
មួយតែងក្លែងខ្លួនធ្វើជាមាណពមកលេងល្បែងចតុរង្គ ជាមួ
ព្រះអង្គជាពល់ថ្ងៃ ទើបឃើញសម្រស់រូបឆោមព្រះអគ្គម
សី ក៏កើតចិត្តប្រតិព័ទ្ធ ព្រមទាំងលួចបញ្ចេញអាកប្បកិរិ
ខ្លះ ៗ ឲ្យនាងឃើញផង ។ ដោយចិត្តរើករាយ នាង
ក៏បានតបខ្សែវិយោបថប្លែក ៗ ទៅគ្រុឌវិញដែរ ។ ពេ
ល្ងាចមួយ គ្រុឌនិមិត្តធ្វើព្យុះខ្យល់យ៉ាងខ្លាំងបណ្ដាលឲ្យ
កដក់ង កើតចលាចល ទើបគ្រុឌលបចូលទៅក្នុងបន្ទប់
នាងកាកី ហើយលួងលោមពយកនាងកាកី ទៅកាន់ស្ថ
សិម្ពលីទៅ ។ ក្រោយនោះព្រះបាទព្រហ្មទត្តទ្រង់តក្កជាខ្លាំ
ក៏ឲ្យគេស៊ើបរកតែពុំឃើញសោះ ។ ឯគ្រុឌតែងនិមិត្តខ្លួ

បង់ហ្មស្កាជាមួយព្រះរាជាដូចធម្មតា ចូនជាដកជាប់ភាន់ក៏ន
ាងកាកីមកជាមួយផង នាំឲ្យព្រះអង្គកើតមន្ទិលសង្ស័យក
ាស់ប្រើគន្ធនជាសេនាធំទិត ក្លែងខ្លួនជាសត្វចូលលបតាម
ុងទៅកាន់ស្ថានសិម្ពលី ។ លុះទៅដល់ហើយ, គន្ធន
ានប្រែក្លាយជារូបធម្មតា តែចង់នាងកាកីត្រាតែបានសំរេច
បព្វជា ។ មួយថ្ងៃមកទៀត គន្ធនលបតាមគ្រុឌត្រ-
ប់មកនគរវិញ នាំពត៌មានទៅក្រាបទូលព្រះរាជា ។ លុះ
ពេលគ្រុឌមកលេងល្បែងទៀត គន្ធនក៏ដេញពិណាច្រៀង
ន្ទានសំឡេងផ្តាះផ្តងឲ្យគ្រុឌ ពាល់តែគ្រុឌដឹងថាៈ នាងកាកី
នចិត្តមិនស្មោះត្រង់នឹងខ្លួនទេ ទើបម្នីម្នាត្រឡប់ទៅដេស្តី
ងកាកី ហើយចាប់កញ្ឆក់ នាងហោះយកមកដាក់ក្នុងព្រះរាជ-
ង់ព្រះបាទព្រហ្មទត្តវិញ ។ នាងកាកីចូលទៅសុំអង្វរខមា
ាសតែព្រះបាទព្រហ្មទត្តទ្រង់ពុំព្រម ក៏ត្រាស់បង្គាប់ធ្វើពោង
យបណ្តែតនាងនេះចោលទៅ ។

ដើម្បីបញ្ជាក់លើសេចក្តីសង្ខេបនេះទៀត យើងសូម
ស្រង់អត្ថបទបន្តិចពីក្នុងរឿងនោះយកមកធ្វើជាគំរូ គឺយើងដក
ស្រង់ត្រង់បទចម្រៀងរបស់គន្ធីនប្រៀនឪដងឲ្យគ្រូ ដូចសេចក្ដ
ខាងក្រោមនេះ ៖

« ...ប្រាប់ក្មានធ្វើក្មេង ចំអ
« ខេលខេល ជាពាក្យកាព្យ
« ពិរោះពិណពេក ស្រួលស្រក
« ខគថា ខស្រីស្រស់កា – ក
« កែវបងអើយ ៗ ពិដោ
« ក្លិនសួន ហាក់បានឃើញខ្លួ
« ជិតជាប់បង្អើយ កាលបង
« ទីណាទៅ នៃបទៅ ៗ ទៀយ
« ព្រលឹងបងអើយ ឆាប់ស្ទើ



ក្រុមជាងរូបអង្គយ៉ាងសំខាន់ក្នុងអក្សរសាស្ត្រខ្មែរ ។

…ស្នេហា ។ ក្រោយគ្រូឱទៅបាត់ បាតបង់ប្រតិព័ទ្ធ ស្លាប់
…បង់គ្រូឱ ថាក់ថមផ្តេកផ្តិត ផ្ញួញផ្តិតទ្រូក គេសគើយទ្វើយ
…ក – មួយមិនដែល ។ គ្រៀមក្រាំ្តសាទរ សេពសុខសមតារ
…មរសម្លូលមៃ -- ត្រើត្រែកមនោរម្យ បទ្ទីសុខសេ – យក្រាស
…បារគ្រប់ថ្ងៃ ប្រាំពីរខឹងបង់ ។ ទ្រស្រីបង់បាត់ ស្រីសួន
…រូបស្ងាត់ សមខ្លួនខឹងរង់ ទុក្ខទល់ម្នាក់ម្នេញ កន្ទេញ
…ខ្លួន កន្ទេងតិតបង់ បង់បាត់លង់លន់ ។ កុំមានគ្រូឱ
…ង់ខឹងសួនកា ឲ្យគេស់ផិពជន ឥឡូវគ្រូឱគ្រង់ មូលផង
…បម្ទួន ថ្ងៃអើយបង់អន់ បង់អួលទ្រូក ។ ទបង់ខឹងយក
…មមាសមិត្រមក ផិតដោយកាត្វា មោះប្ដូបង់ដើរ ដំណើរ
…ហាស់ ដោយសារគ្រូឱ នានាំងបង់មក ។ . .

## ឧកញ៉ាសន្ធរវោហារ - ម៉ុក

នៅចុងសម័យឧត្តុង្គ យើងប្រទះឃើញអ្នកនិពន្ធមួយ
ទៀតយ៉ាងឆើតណាស់ដែរ ដែលយើងគួរតែលើកយកមក
…ាយក្នុងទីនេះ គឺឧកញ៉ាសន្ធរវោហារ - ម៉ុក ។

សន្ធរម៉ុក មានស្រុកកំណើតនៅក្នុងស្រុកសំរោងទង ខេ
កំពង់ស្ពឺ ។ កាលពីកុមារបាននៅនៅរៀនសូត្រក្នុងសំណា
លោកគ្រូពេជ្រ អុង គង់វត្តគោកក្នុងភូមិខ្ពង់ ។ កុមារ
ឧស្សាហ៍ណាស់ខំរៀនសូត្រឥតមានធ្វេស ទើបបានជាទីស
ព្រះទ័យរបស់លោកគ្រូ ។ កាលណាហាត់សរសេរអក្
កុមារនេះសរសេរតែដោយធ្យូងលើបែកឥដ្ឋឬក្បឿង ព្រ
ខ្លួនជាកូនអ្នកកំសត់ទុគ៌តពេកណាស់ ។ លុះគ្រប់អាយុហើ
លោកគ្រូបំបួសជាសាមណេរ រួចជាភិក្ខុនៅក្នុងវត្តនោះ
កាលដែលលាចាកសិក្ខាបទមក ព្រះពេជ្រ អុង បាននាំ
ថ្វាយព្រះករុណាព្រះបាទសម្ដេចព្រះនរោត្តម ដើម្បីធ្វើជាក្មា
ឆ្មាំក្នុងក្រុមព្រះអាលក្ខណ៍ ។ ប៉ុន្តែព្រះអង្គទ្រង់ជ្រាប
ក្មេងឆ្មាំក្មេងនេះជាអ្នកចេះដឹងក្បួនច្បាប់ពិតប្រាកដ ព្រះអង្គ
ទ្រង់តែងតាំងឲ្យធ្វើជាចាងហ្វាងក្រុមព្រះអាលក្ខណ៍ ហើយ
ជាគ្រូលើអាម៉ឺនទាំងឡាយ ខាងការបង្ហាត់បង្រៀនតែច្បា
រាជការផែនដី ។ តែអកុសល លោកឧកញ៉ាសន្ធរ-ម៉ុ

តិការទៃ ដោយគេតម្កល់ពាក្យនៃលោកឲ្យត្រូវនឹងតំនិសព្ទាន់ ទើបមានពាក្យជំណាលថា « ម៉ែក្រងុំក-ម៉ុកក្រងឹង » ។ ក្រៅពីកិច្ចការរាជការ លោកឧទ្ទិតសរសេររឿងរ៉ាវល្អ ៗ ណាស់ដែរ ទើបបានជាទីសព្វព្រះទ័យ របស់ព្រះបាទសម្ដេចព្រះនរោត្តម ។ កាលណាព្រះអង្គទ្រង់យាងទៅណាមកណា តែងប្រោសអោយតានឲ្យសន្ធរ-ម៉ុកទៅតាមដង្ហែជានិច្ច សម្រាប់ជួបនឹងហេតុការផ្សេង ៗ សន្ធរ-ម៉ុកនឹងលើកជាពាក្យថ្វាយព្រះអង្គជាទីព្រះសណ្ដាប់មួយរំពេច ផ្សិតបណ្ឌិតនេះពូកែខាងលើកកំណាព្យក្អេង ៗណាស់ ហើយបានសមាម្យ ដូចប្រយោគរបស់លោកមួយឃ្លាន័ទុំថា ៖

« ហើយខែកាចិកធាមួយកាក់ កាចិកក្ដ្រាក់បានសាច់ខ្ញុំ
« តាញខ្វាកកាប់ខ្ចាច់សាប់ញាប់ដៃ ហើយលៃឲ្យតាច់ប្រញាប់តាន់ ។

ប៉ុន្តែបើកាលណាលោកសរសេររឿងវែងលោកមិនប្រើពាក្យកំប្លែងដូច្នេះទេ លោកច្រើនប្រើពាក្យខ្ពស់ខ្ពះ ពាក្យសា-

ចំពោះខ្ញុំ ដែលយើងឃើញស្នាដៃពីរប្លែកពីគ្នានេះ គឺរឿង ទេវន្ត លោកសរសេរសុទ្ធតែពាក្យពិបាកៗ គួរឲ្យចង់សិក្សា; ស្នាដៃលោកមួយទៀតគឺរឿង ទុំ-ទាវ[1] លោកបែរជាសរសេរសុទ្ធតែពាក្យងាយយល់ងាយគិតទៅវិញ ដើម្បីឲ្យសមនឹងការជាក់ស្តែងក្នុងសម័យរឿងនោះ ។

នេះជាសេចក្តីដកស្រង់ពីក្នុងសាស្ត្រារឿងទេវន្ត ៖

« ..ទឹកផសីតា ឥស្សូរសុខា ក្បូរគ្រៅថ្ងៃវេស្ស អធិកពិស្តារ-
« ធិការកិម-ន្ទលគាប់ទក្ខិណ ទក្ខមទក្ខណា ៗ នៅទាំងទេវត្តវៃម
« ទេវត្តទិណ្ណាព្រះហោម-ពាន្ទទាំងទក្ខក បន្ទាយជុំវិល ក្រុំពីរ
« ជាន់មហា-ទ្វារហោរជាយទ្វារ សឹងមានមណ្ឌប ៗ គួរគោក
« ថ្នាក់ថ្នល់ ឥតជលមានផល ពិចិត្រគ្រៅគ្រប់ ភ្ញាក់ខ្ញាតែន
« ភ្ញាក់ខ្ញុំប្រសព្វ ប្រាសើរសើងអ-ក្តិរម្យគួរខ្លាច ៗ ស្រែគ្គ
« បរ-កណ្ណាសីទន្តរ ពីខ្លុំមេរុកជ ប្រាសាទរចនា ក្រុំ

---

១– ស្នាដៃទុំទាវសព្វថ្ងៃនេះ យើងរកពុំទាន់បានច្បាប់ដើមមកបោះពុម្ពនៅឡើយ ព្រោះតែឃើញសំណៅខ្លះវាបាត់ៗហើយមិនគ្រប់គ្រាន់ ។

« ប្រការស្មោច ចំពោងចំណោច ក្រេះបន្ទំ ៗ . . . »

ត្រង់នេះ សន្ធរម៉ុកទៀតបានប្រាប់យើងពីទ្រង់ទ្រាយប្រាសាទមួយដែលស្ថិតនៅជិតព្រៃហេមពាន្ត មានឈ្មោះកេជសីមាកាសេយ្យ ៗ បន្តទៅទៀតយើងស្រង់ស្នាដៃរបស់លោកមួយទៀតដែលជាការថ្លែងមនោសញ្ចេតនារបស់លោក ៖

« ស្រឡាញ់ស្រីតូច ស្រីទៀតមិនដូច មិនដល់មាសបង
« មាសបានសាងផល កុសលឥតហ្មង ឥតមានប្រឡង
« ប្រឡះកាំបាន ៗ ក៏ទាន់បានជួន បានជួបនឹងនួន
« នឹងនាងកល្យាណ កល្យាណ៍គប់លក្ខណ៍ ចិត្តស្ម័គ្រស្មោះ-
« ស្មាន ស្មោះស្មើនៅឋាន នៅបំតមូលគ្នា ៗ ប្រសិនបេះ
« ពោះ បេះហើយបេះដោះ ទៅថ្នមអង្គា អង្កៀកប៉ះពាល់
« រៀងពល់វេលា ពិលាបរដោយនា ដោយទូកខ្មែរ (១) ៗ

សេចក្ដីដកស្រង់ខាងលើនេះ ទកញ្ញាសន្ធរម៉ុក បានយកសេចក្ដីទុក្ខទៅផ្ចិតផ្ចាប់ជាមួយការស្រមៃនឹក ៗ លោកបេះគ្រង់

១- អត្ថបទនេះស្រង់ពីកាសែតស្រុកខ្មែរ បោះពុម្ពនៅព្រៃនគរ, ខែកញ្ញា ១៩២៧ ។

ពាក្យកាព្យ កាយគតិទុក្ខបណ្ដាក់គ្នា ជាមួយសេចក្ដីបំណង
ទឹង លោភណ៍ ភាពនៃនារីដែលគាត់ពេញចិត្ត នាំឲ្យអ្នកផងគាប
ជួយស្រឡាញ់ ជួយកើតទុក្ខ ជួយប៉ុនប៉ង ជាមួយនឹងគាត់
ដែរ ។ ដូច្នេះហើយ ទើបយើងស្គាល់ជាក់ថា ទុកញ៉ា
សន្ទរៈកហារ មុក ជាកវីយ៉ាងជំនាញក្នុងសម័យទុក្ខគ្រាចុង
បំផុត ។



## ជំពូកទីប្រាំបួន

# អក្សរសាស្ត្រសម័យអាណាព្យាបាល

ឥឡូវនេះ យើងត្រូវនិយាយពីរឿងរ៉ាវអក្សរសាស្ត្រខ្មែរយើង ក្នុងសម័យអាណាព្យាបាល ។ គ្រាន់តែឮឈ្មោះសម័យនេះ យើងប្រមាណដឹងខ្លះហើយថា ៖ ជាសម័យដុនដាបមួយរបស់អក្សរសាស្ត្រយើង ។ គឺគ្រានោះឯងដែលប្រទេសខ្មែរយើង ត្រូវធ្លាក់ខ្លួនទៅក្រោមនឹមពួកបស្ចិមប្រទេសអស់រយៈជាងប៉ែតសិបឆ្នាំ គឺតាំងពី គ.ស. ១៨៦៤ រហូតដល់ ១៩៥៣ ជាគ្រាដែលខ្មែររំដោះខ្លួនផុតពីអាណាព្យា-បាលរបស់បរទេស ។ លោកអ្នកគង់នៅចាំបានសឹងតែគ្រប់

ហើយក្នុងសម័យនោះ តើអក្សរសាស្ត្រយើងយ៉ាង

ណា ? យើងមិនដែលឃើញអក្សរខ្មែរលេចមុខមាត់មកជា

ប្រការដើម្បីបង្ហាញដល់សាធារណជនទេ ។ ចំណែកក្បួន

ខ្នាតនានាខាងអក្សរសាស្ត្រ ក៏ឥតដែលមាននរណាកប់អាន

លើកឡើងជាក្រមុខឡើយ ។ ហេតុនេះឯងអក្សរខ្មែរក៏រត់តោ

ពួនអាត្មាយ៉ាងស្ងាត់ស្ងៀមនៅតាមវត្តអារាម ឬក្រោមខ្នងផ្ទ

ជាប់ទងសិក្ខាចារិកទាំងឡាយ ឥតមានគំរើកខ្លួនឡើយព្រោះ

ខ្លាចផ្ទះចប់សត្ត ឬមហន្តរាយអ្វីដល់ខ្លួន ។ ព្រះសង្ឃពុទ្ធ-

សាសនិកទាំងឡាយ តែងយកព្រះទ័យទុកដាក់ប្រឹងប្រែង

ចរក្សាគម្ពីរដំណែលទាំងនោះបាននៅគង់គត់មក ។ ព្រោះ

ដូចយើងតែងនិយាយជារឿយៗមកហើយថា អក្សរសាស្ត្រ

យើង បានបោះគោលចារឹកនៅក្នុងលទ្ធិពុទ្ធសាសនាយ៉ាង

ស៊ប់សួនខ្ជាំងណាស់ ។ ព្រះសង្ឃស្វាធ្យាយធម៌គ្រប់មាត់

គ្រប់ពាក្យ ឬធម្មទេសនាគ្រប់លើកគ្រប់គ្រា សុទ្ធតែជា

មធ្យោបាយផ្សាយអក្សរសាស្ត្រសម័យនោះ ដើម្បី

អានុភាពអក្សរខ្មែរ ឲ្យចុះជ្រាបក្នុងសន្តានចិត្តប្រជាករយើង ទូទៅ ។ ចំណែកទឹកចិត្តជនជាតិយើងវិញ ឃើញថាមានភាគច្រើនដែលនៅតាមនិគមជនបទ តែងមិនព្រមងាចចាល័យពីអក្សរសាស្ត្ររបស់ជាតិខ្លួនឡើយ ។ គេតែងបញ្ជូនកូនចៅឲ្យទៅរៀនសូត្រជាមួយព្រះសង្ឃ ដើម្បីក្រេបជញ្ជាក់នូវរសជាតិវិជ្ជាផ្សេងៗ របស់ជាតិខ្លួន ។ ព្រះសង្ឃទៀតក៏មានមេត្តាធម៌ក្រៃលែង ។ លោកប្រឹងប្រែងបង្ហាត់បង្ហាញកុមារទាំងនោះលុះត្រាតែបានចេះអាន, ចេះសរសេរល្មមប្រើការបាន ទើបលោកឲ្យវិលត្រឡប់មកផ្ទះរកប្រកបកសិកម្មតរៀងទៅ ។

នៅពេលនោះ ប្រជាជនខ្មែរ មិនដែលនៅស្ងៀមឥតប្រយោជន៍ទេ គេតែងតែនាំគ្នាអានសាស្ត្ររឿង និទានរឿងព្រេង ឬ ច្រៀងលេងតាមទំនុករបស់ខ្មែរបុរាណ គឺជាសាខារបស់អក្សរសាស្ត្រយើង ឬ ជាជាតិធាតុដែលសំរាប់ផ្សំឲ្យកើត [illegible] យើង ។ តែគួរអនិច្ចាណាស់

របៀបសរសេរអក្សរក្នុងសម័យនោះ ព្រោះគ្មានឯកសារណាសោះ នាំយកច្បាប់សំខាន់ៗរបស់យើងបានបាត់បង់ទៅជាច្រើន, លោកឯអ្នកប្រាជ្ញនានា ក៏សោះសូន្យមិនមានអើពើមកក្នុងមជ្ឈដ្ឋានជាផ្លូវការឡើយ ព្រោះខ្លាចអំណាចបរទេសដែលជាអ្នកគ្រប់គ្រងៗ ទោះបីជាមានបណ្ឌិតណាទៀតសរសេរបានរឿងរ៉ាវអ្វីមួយៗទុកមក គេពុំសូវហ៊ានបញ្ចេញឈ្មោះរបស់ខ្លួនឲ្យយើងដឹងទេ នៅសល់ត្រឹមតែស្នាដៃប៉ុណ្ណោះ ជាហេតុនាំឲ្យយើងស្ដាយក្រៃលែងៗ អក្សរដែលបាននៅក្នុងសិលាចារឹកសរសេរនៅក្រាំងផ្សេងៗ មិនដែលត្រឹមត្រូវតាមអក្ខរាវិរុទ្ធឡើយ ដូចជាពាក្យតែមួយម៉ាត់សោះ ពួកអ្នកសរសេរជាន់នោះគាចសរសេរដាក់តាមចិត្តខ្លួនទៅជាបី ឬ បួនបែប នាំឲ្យអ្នកសិក្សាពិបាកឈានចាប់យកការទៀងទាត់ក្នុងពិធីសរសេរអក្សរនេះក្រៃលែងៗ បើឃើញកំហុសយ៉ាងនេះ តើយើងថាអ្នកនិពន្ធបុរាណជំនាន់នោះសរសេរខុសឬអ្វី? បើតាមការស្រាវជ្រាវរបស់យើង គឺមិនមែនអ្នក

...ានសរសេរខុសទេ   ព្រោះបើខុសមែនម្តេចក៏អ្នកនិពន្ធនោះ
...ះយកពាក្យបាលី សំស្ក្រឹតពិបាកៗ មកបញ្ចូលជាមួយបាន ?
...បក៏ចេះប្រើពាក្យទាំងនោះឥតគ្គង់សោះ ? ៗ ត្រង់នេះហើយ
...ញ្ញាក់ប្រាប់យើងថា ក៏បុរាណខ្មែរលោកពិតជាចេះសរសេរ
...រៀនចាត់ណាស់ ៗ ឯកំហុសដែលយើងពោលខាងលើនេះ
...តជាកើតឡើងពីពួកអ្នកដែលចារ ឬសរសេរចំឡងក្រោយ ៗ
...ទ្ធ ៗ មកនេះទេ ៗ ដ្បិតពួកអ្នកទាំងនេះច្រើនមិនសូវបានរៀន
...ត្រឹមសារអក្សរសាស្ត្រជាតិ ឲ្យជ្រៅជ្រះពិតប្រាកដមែន-
...ន ដូចនេះទើបសរសេរឬចារតាមតែគំនិតខ្លួន គឺឲ្យតែថា
...រចេះតែពីថាបាន ៗ តែទោះបីជាមានហេតុឆ្គាំឆ្គងយ៉ាង
...ងក៏ដោយ យើងសូមសរសើរពួកអ្នកមានព្យាយាមប្រឹង
ប្រឹងសរសេរចំឡងនេះដែរ ព្រោះដោយសារតែគំនិតល្អ
...សអ្នកទាំងនោះហើយ ទើបសាស្ត្រារឿងរ៉ាវជាស្នាដៃអក្សរ-
...សាស្ត្រយើង នៅគង់វង្សរហូតឲ្យយើងឃើញសព្វថ្ងៃនេះ ៗ
...យើងប្រទះឃើញស្នាដៃជាច្រើនណាស់ដែរ ដែលរៀបរៀង

ទៀតក្នុងសម័យនោះ   ដូចមានភាពនិទានក្រោមដែលម
ពប់រៀបពីស្នាដៃ,  នាមអ្នកនិពន្ធ និងកាលបរិច្ឆេទដែល
រឿងរឿងនោះឡើង ៖

១ – រឿងមរណមាតា ស្នាដៃធម្មបញ្ញា-អ៊ុក ពី គ.ស.១៨៣
២ – រឿងពោធិវង្ស ស្នាដៃ ព្រហ្មបរកត្តិ  ពី គ.ស. ១៨
៣ – រឿងទៅមាស ស្នាដៃឃុនសន្ធរពិនិត្យ ពី គ.ស.១៨
៤ – រឿងសព្វសិទ្ធិ ស្នាដៃ ហ៊ីនកត្តីអក្សរ-គង់ ពីគ.ស.១៨
៥ – រឿងសន្ធសិល្បជ័យ  ស្នាដៃ  ឧកញ៉ាវង្សាធិបតី-

ពី គ.ស. ១៨៨៦

៦ ‧ រឿងព្រះលក្ខណាវង្ស រៀបរៀងដោយ  ទៅអធិកា

វត្រកប្រណាក ពី គ.ស. ១៨៩០

៧ – រឿងអំបែងបែក ឧកញ៉ាសុត្តន្តប្រីជា-ឥន្ទ ពី គ.ស.១៨
៨ – កាព្យនិពសអន្ដរ  „  ពី គ.ស. ១៩
៩ – គតិលោក  „  ពី គ.ស. ១៩
១០ – រឿងពិឡាពិលាប អ្នកស្រី-សិទ្ធិ  ពី គ.ស. ១៩

១– រឿងពិម្ពានិញាន លោកវ៉ិបុល កន. ពី គ.ស. ១៩២០
២– រឿងតាឯក —„— ពី គ.ស. ១៩៤២
៣– រឿងបិសាចស្នេហា លោកញ៉ុក-ថែម ពីគ.ស.១៩៤០
៤– រឿងកុឡាបប៉ៃលិន —„— ពីគ.ស.១៩៣៦
៥– រឿងទឹកទន្លេសាប លោក គីម-ហាក់ ពី គ.ស.១៩៤១
៦– រឿងសេកសោមបណ្ឌិត —„— ពី គ.ស ១៩៣៣
៧– រឿងសុផាត លោករីម-គីន ពី គ.ស ១៩៣៨
៨– កែវមាត់សមុទ្រ លោកនូច-សឹងហាន គ ស.១៩៤២
៩– មហាអភិព្វ លោក អ៊ុម ហ៊ី ពី គ.ស.១៩៤៦
១០– ទៅកើតកុសល លោក ឧង-ឈុំ ពី គ.ស.១៩៤១

ក្រៅពីនេះ យើងឃើញមានរឿងជាច្រើនដែលយើងរក ឈ្មោះអ្នកនិពន្ធមិនឃើញ បានជាយើងមិនបានលើកយកមក ប់ក្នុងទីនេះ ។

បើយើងពណ៌នាសរុបអំពីរឿងទាំងនោះ មិនសូវខុសគ្នា ម្នានទេ ដូច្នេះយើងគ្រាន់តែវែកញែកជាពីរពួកប៉ុណ្ណោះ គឺពួក

រៀបរៀងតាមបែបបុរាណ ទីនពួករៀបរៀងតាមបែបទំនើប

បែបបុរាណ, អ្នកនិពន្ធបានឲ្យលាយចិត្តណាស់ក្នុងការប

ក្រងផ្ទៃរឿង គេអាចនិយាយតាមចិត្ត ចង់តួនិមួយ ៗ ស្ដា

ប៉ុន្មានដងក៏ដោយ តែងតែមានអ្នកមានឫទ្ធិបារមីមានព្រះ

ជាដើម មកជួយប្រោសជននោះឲ្យរស់មានជីវិតឡើងវិញ

ឯដំណើរគាត់គ្នាសោតទៀតជួនកាលឃើញថាពិបាកពេក ជួ

ជាដើរកាត់ព្រៃ ធ្នឹកលតាមព្រៃភ្នំក្រុំថ្ម, ជួនកាលឃើញ

ងាយពេក ដូចជាជិះសេះ, ជិះហង្ស, ហោះហើរដើរ

អាកាសជាដើម ៗ ចំណែកមួយបែបទៀត គឺបែបទំនើ

អ្នកនិពន្ធបានសិក្សាផ្លូវលោកនេះមុតមាំ ស្គាល់នូវបញ្

របស់ជីវិតមនុស្ស នេះប្រឌិតការរស់នៅរបស់មនុស្សធម្ម

ឲ្យផ្ចិតជាប់ក្នុងផ្ទៃរឿង ៗ តួនីមួយ ១ លែងនេះហោះហ

ដើរលើអាកាស, ព្រះឥន្ទព្រះព្រហ្មក៏លែងចុះមកជួយ, មហ

ឫស៊ីឬព្រះឥសូរក៏លែងបង្រៀនមន្តគាថា តួអង្គក៏មិនមែន

ពោធិសត្វចុះពីព្រៃត្រើងឬពីឋានតុសិត ដូចមុន ១ ទៀតហើយ

នរនេះអ្នកនិពន្ធទំនើប បានយកមនុស្សសាមញ្ញទៅដើរតួក្នុង
រឿង, បានលើកបញ្ហារស់នៅ របស់មនុស្សសព្វថ្ងៃ មក
ាតត្រដាងឲ្យបានសព្វសម នឹងកម្រិតសតិស្មារតីរបស់ជន
ប្បន្ន មិនឲ្យហួសកម្រិតឡើយ ។ ប៉ុន្តែមានការបំបែក
យក្នុងអក្សរសាស្ត្រយើង ត្រង់ដែលរឿងទំនើបទាំងនេះ
ប់តែងជាពាក្យកាព្យទៀតហើយ ។ គេធ្វើជាពាក្យរាយ
បជាភាសាអ្នកស្រុកនិយាយរកគ្នាជារាល់ថ្ងៃ ។ ឯគតិរឿង
ហាតក៏ងាយយល់, ងាយគិតល្មមនឹងសមត្ថភាពរបស់ជន
សាមញ្ញ មិនប្រើពាក្យខ្ពស់ៗពេក ហើយក៏មិនប្រើពាក្យទាប
កពេកដែរ ។ សរុបសេចក្តីទៅ គឺអ្នកនិពន្ធគ្រានេះ
នស្គាល់គុណភាពវិទ្យាសាស្ត្រ រៀនសូត្របះដឹងតាមបែប
ប្បធម៌ជុះជាល នៃពិភពលោកដ៏ជាក់ប្រាកដ ។

យើងធ្វើការសិក្សាតទៅទៀតចំពោះស្នាដៃអក្សរសាស្ត្រ
យើង ក្នុងសម័យអាណាព្យាបាល ។ ដូចយើងបានពណ៌-
ើវនកវិញកពីររបៀបពិតឯក្នុងរយពេលៈខ្លួមកហើយថា ៖ ជា

ដំបូងគេឃើញមានអ្នកនិពន្ធសរសេររបៀបក្លើកក្លើន ដូចកា
សម័យកណ្ដាលដែរ ហើយកំណាព្យសម័យនេះ យើងឃើ
មានការប្ដូររបៀបតែងជាបទកាព្យ ៧ , ពាក្យ ៨ , ពាក្យ ៩ ព
តំដើមរឿងរហូតចប់រឿង ដូចជារឿងសព្វសិទ្ធិជាដើម ។ ដូ
ដើម្បីបញ្ជាក់ជាក់ស្ដែង យើងលើកយករឿងទាំងនេះ
តាមអ្នកនិពន្ធខ្លះៗមកសិក្សាដូចតទៅនេះ ៖

## ម៉ឺនភក្ដីអក្សរ _ គង់

**៖ រឿងសព្វសិទ្ធ** ជាស្នាដៃរបស់អ្នកនិពន្ធឈ្មោះ គង់ ដែ
មានគោរម្យងារជាម៉ឺនភក្ដីអក្សរ និពន្ធឡើងពី គ.ស.១៨៩៩
រឿងនេះមានផែនរឿង មិនខុសពីរឿងដទៃៗ កាលពីសម័យមុ
ទេ ប៉ុន្តែយើងឃើញការប្លែក ត្រង់ដែលអ្នកនិពន្ធនេះមិនស
សេរកំណាព្យជាបទពំនោល, ព្រហ្មគីតិ ឬ កាកគតិទេ ។ លោ
សរសេរជាកាព្យពាក្យ៧ រហូតតាំងពីដើមដល់ចប់ប្រកបដោ

# ឧកញ៉ាសុត្តន្តប្រីជា – ឥន្ទ

លោកឥន្ទមានកំណើតកើតឯបរិការកោន៍ ស្រុកមុ
កំពូល ខេត្តកណ្ដាល ដែលជាដំបន់ខេត្ត បរិបូណ៌ពោ
ខេសគាត ៗ បិតាឈ្មោះបញ្ញូន់-កែ; ម្ដាយឈ្មោះមុំ លោ
កើតពីឆ្នាំ ១៨៥៩ ។ លុះអាយុ ១០ ឆ្នាំក៏បានទៅនៅ
សិក្សាអក្សរខ្មែរនឹងបាប់ហាត់រៀនប្រែគម្ពីរផ្សេង ៗ រួចហើ
លោកចូលផ្នួសជាសាមណេរ ។ អាយុ ២០ ឆ្នាំ លោកខ
ទៅបន្តវិជ្ជានៅប្រទេសសៀមបាន ៧ ឆ្នាំ ត្រឡប់មកស្រុកវ
វិញ ។ អាយុ ៣៧ ឆ្នាំបានលាចាកផ្នួសមកមានប្រពន្ធកូ
នៅខេត្តបាត់ដំបង៖ លោកឥន្ទជាអ្នកស្រាវសាស្ត្រសេវភៅ
ទើបពេលនោះ លោក ចាចន ឈុំ បានឲ្យទៅកាន់ទី
វិហារ ។ លុះលោកអាយុបាន ៥៥ ឆ្នាំ រាជការបានអញ្ជើញ
លោកឲ្យមកធ្វើការនៅក្រុងភ្នំពេញ ក្នុងក្រុមពុទ្ធសាសន
បណ្ឌិត្យ ខុទ្ទលមុខងារ ខាងរៀងផ្ដាក់ក្បួនច្បាប់ផ្សេង ៗ និ
ជួយរៀបរៀងវចនានុក្រមខ្មែរ ។ ដល់បានអាយុ ៦៥ ឆ្នាំ

ហើយលោកសុំលាពីការ ត្រឡប់ទៅនៅឯបាត់ដំបងវិញ ។ លោកទទួលអនិច្ចកម្មដោយសាររោគក្អក ពីឆ្នាំ ១៩២៤ ។ ឯលក្ខណៈខាងក្រៅរបស់លោក គួរជាជនមួយល្មមស្រឡាញ់រាប់អានក្រៃលែង លោកចូលចិត្តនិយាយក្រមាចក្រមើមច្រើន តែជាអ្នកមានស្មារតីរឹងប៉ឹងមិនរវល់នឹងការអ្វីឥតប្រយោជន៍ទេ, មាត់លោកស្រួចមញ្ញកិរិយាជាអ្នកនិយាយច្រើន ៗ ទៅណាមកណា លោកតែងស្លៀកសំពត់ចងក្បិន, ពាក់អាវគ្រង



កាន់ដំបងច្រាក់ , ពាក់មួកកាស ហើយបង្ខួសស្បែកជើងផ្ទាត់លុង ៗ គ្រាណាដើរទៅមុខ លោកច្រើនងើយមើលលើ ។

ពេលដែលលោកអនិច្ចកម្មទៅ គេរកឃើញស្នាដៃដែលលោកសរសេរបាន

ចំនួន ៤៤ មុខ តែដែលបោះពុម្ពហើយមានតែរឿងកំបែងបែក, សុភាសិតច្បាប់ស្រី, លោកនីតិបករណ៍, ក្បួនមេកាព្យ, កាព្យនិកសអង្គរ ទីងគង់លោកប៉ុណ្ណោះ ៗ ក្នុងចំណោមស្នាដៃរបស់លោកដែលបោះពុម្ពហើយទាំងប៉ុន្មាន យើងឃើញមានសាច់កាព្យគួរឲ្យចាប់ចិត្តណាស់ ចំណែកពាក្យពយសោត គឺលោកប្រឌិតឡើងជារឿងកំប្លែងសន្ទានបន្តជាបន្តុផង គ្រប់រូបឲ្យមានស្នាតើងប៉ុនចេះពិចារណាចាំមួនមុននឹងធ្វើការអ្វីមួយ ៗ យើងដកស្រង់ស្នាដៃ ជាពាក្យកាព្យមួយមកព្រោះកវីរូបនេះ ល្បីល្បាញជាចំផុតខាងកំណាព្យក្នុងសតវត្សរ៍ទី ២០ នេះ ៗ សេចក្ដីដកស្រង់នេះយើងស្រង់ចេញពីរឿងនិកសអង្គរ ដែលលោកសរសេរក្នុងពេល ដែលលោកបានទៅជួបប្រទះនឹងរូបភាព ចម្លាក់ចេញនៃប្រាសាទអង្គរជាដំបូងដូចមានសេចក្ដីតប់រៀបជាពាក្យកាព្យឃ្លោងជូនល្ដំតទៅ ៖

. . . គយគន់ស្នានស្អានថ្មតប្រជិត
ជាក្ដារថ្មជាសជិតប្រតិតគោក

ទោះដើរចរដាច់គ្មានយោគ
ឥឡូវជ្រោកស្រុតខ្វះតែដើរបាន ។
បន្ទន់ដៃខ្វេររូបកំសុក្រី
ដច់សិរសើដូចស្និតជិតផុំព្រាណ
លើកពពារទៀនញ្ញាក់ហាក់ហាវហាន
សំផែនព្រាណប្រួញរូបជាមួយគ្នា ។
មើលនាគកជងស់កាចអំណាចស្វែង
ខ្លួនកឹវៀនក្បាលកឹរក់តាមទ្វាក
ល្បូនលើស្ពានមានជើងកល់គន្លា
កន្ទុយបែកញែកគ្នាតាមផ្លូវ ។
ឱ ! រូបកំសុក្រើតកែក្រេងគ្រុង
កាំងសំផែនបុទ្ធិរុទ្ធសត្រូវ
ប្រសិនគ្រុឌមកយល់យ៉ាងពុំទៅ
គង់ស្ទុះទៅជ្រកក្នុងកសិន្ធុនានេះ ។
នាគអើយនាគបុសានបុកណាសាង

ពីដើមយើងល្អឯកដូចម្ដេចនេះ
ឥឡូវនាគរាកញាក់បាក់បេះ
ឃើញតែកងយើងនេះអស់លំអរ ។
ខ្នងក៏ឃ្លាតក្បាលក៏ឃ្លៀងទៅផាយខ្នង
ឃើញតែខ្លួនដើងទៀនប្រចាំប្រ
ស្ដាយអើយស្ដាយស្នាដៃលោកតាំងមក
មិនតាំងតហាវៈឲ្យវែងទៅ ។

ក្រមិនត្វាសន្ធារនាគាថ្ម
ហ្វាយតស្ថិតស្ថេរបេរកាលនៅ
នេះមិនទាន់ប៉ុន្មានមកហ្វងសៅ
មករុះកយញាក់ទៅទីខ្ទផ្ដាស់ ។
មែនហ្នឹងសត្វសន្ធារគ្រុងលោកីយ៍
មិនជាគ្បីកើតមកគងវិនាស
បុះរៃត្រលក្ខណ៍ជាក់យើងពុទ្ធប្រកាស
សន្ធារចាស់គង់ផ្លាស់ទៅជាថ្មី ។

ចំណែកសេចក្ដីខាងលើនេះ លោកឧកញ៉ាសុត្តន្តប្រីជា-ឥន្ទ នាំយើងឲ្យស្គាល់ទៅគ្រូចំឡាក់នៅអង្គរវត្ត ដែលកសាងមកជាច្រើនសតវត្សហើយ ហើយដែលអង្គរនេះបាក់បែកប្រុះព្រាមជាច្រើនណាស់ទៅហើយផង ។ ត្រង់នេះហើយដែលគំនិតរបស់យើងបានទាញយកទៅធៀបនឹងសណ្ឋានអ្វី ៗ ផ្សេងដែលកើតមកក្នុងលោក ហើយតែងតែវិនាសត្រឡប់ទៅវិញជាធម្មតា ។ លោកកវីនេះ ប៉ិនប្រសព្វខាងធ្វើការកប់រៀបតីបលមាស្ទ័មួយបានសេរីក ហាក់ដូចជាយើងអ្នកគានបានទៅឃើញជាមួយលោកដែរ ។ ស្នាដៃលោកទាំងអស់ សុទ្ធតែកប់ហាជាបានការឥតមានចន្លោះមួយឡើយ ដែលអ្នកសិក្សាអក្សរសាស្ត្រទាំងឡាយ គប្បីយកចិត្តទុកដាក់ចំពោះស្នាដៃរបស់លោកឲ្យមែនទែន ។

## ឧកញ៉ាវិបុលរាជសេនា នូ-កាន

លោកកនមានស្រុកកំណើតនៅឃុំអង្គតាសោម ស្រុកត្រាំកក់

ខេត្តតាកែវ, បិតានាម ឌូ, ម្តាយនាម អ៊ុក ។ លោកកើត ពី គ.ស. ១៨៧៦; អាយុបាន ៩ ឆ្នាំ ឪពុកម្តាយបាននាំឲ្យ ទៅនៅសិក្សាក្នុងសំណាក់លោកគ្រូ អ៊ុន-ជា ក្នុងវត្តគោក (អង្គតាសោម) ។ លុះអាយុបាន ១៦ ឆ្នាំ លោកបួសជា សាមណេរបានមួយវស្សារួចសឹកមកវិញ ។ អាយុ ១៧ ឆ្នាំ ចូលធ្វើជាស្មៀនលោកចៅហ្វាយខេត្តទ្រាំង មានមុខងារខាង ដីវាពន្ធដារ ។ ក្នុងរវាង គ.ស ១៨៩១-៩៦ លោកបាន ធ្វើការនៅក្នុងក្រុមព្រះគាលក្ខណ៍ ក្នុងរជ្ជកាលព្រះបាទសម្តេច ព្រះនរោត្តម ។ បន្ទាប់មកពីនេះ លោកបានចូលធ្វើ រាជការក្នុងក្រុមសុរិយោដី រួចខាងឃ្លាំងប្រាក់ ។ ក្នុង គ.ស ១៩០៦ លោកបានប្រឡងជាប់លេខមួយខាងអក្សរ បានសញ្ញាបត្រ រាជការគេតាំងធ្វើជាចៅហ្វាយខេត្តកំពង់-សៀម ហើយរាជការផ្លាស់លោកទៅធ្វើការនៅជាច្រើន ខេត្តទៀត ។ លោកជាអ្នកជំនាញខាងផ្លូវច្បាប់ ទើប ក្រោយមកបានធ្វើជាចាងហ្វាងសាលាលហុទ និង សាលា

ខ្ទួណ៍ ៗ កាលនោះរាជការអាណាព្យាបាលបានអញ្ជើញ
លោកឲ្យទៅបំពេញវិជ្ជាខាងរបៀបរាជការ ឯប្រទេសបារាំង
អស់រយៈ ៩ ខែ ៗ លុះត្រឡប់មកវិញ លោកធ្វើជាជំនួយ
សេនាបតីក្រសួងក្សេត្រាធិការ មានគោរម្យងារជាឧកញ៉ា
វិបុលរាជសេនា ៗ លោកចូលនិវត្តន៍ពីការរាជការហើយ
លោកនៅតែខំព្យាយាមសរសេរតុបតែងជារឿងរ៉ាវ និងប្រែ
រឿងណាសំខាន់ៗ ពីភាសាបរទេសមកជាភាសាខ្មែរ ៗ
កាលពី គ.ស.១៩៤៨ គ្រាដែលប្រទេសខ្មែររៀបចំការបោះ
ឆ្នោតជាដំបូង ដើម្បីបង្កើតរដ្ឋសភាកសាងច្បាប់រដ្ឋធម្មនុញ្ញ
នោះ លោកបានជាប់ឆ្នោតជាតំណាងរាស្ត្រ ក្នុងមណ្ឌលកោះ
សូទិន ខែត្រកំពង់ចាម ៗ ឯកិរិយាខាងក្រៅរបស់លោក
គេចាំបានថា លោកជាអ្នកស្ញាហ៍និយាយតែសំដីលោក
មួយ ១ មិនសូវញាប់ទេ ហើយច្បាស់លាស់ណាស់ផង ៗ
មុខលោកកងមូល, ដើងសក់ខ្លួក, លោកទុកពុកមាត់ង
ខ្ពុំ ព្រមទាំងមានកែវតាធំសមជាអ្នកត្រិះរិះពិចារណា

ច្រើន ៗ ក្រោយដែលលោកស្លាប់ទៅគេគឃើញស្នាដៃរបស់លោក ដែលបានបោះពុម្ពហើយ និងខ្លះទៀតពុំទាន់បានបោះពុម្ពមានជាច្រើនដូចតទៅនេះ ៖

១- រឿងពិម្ពានិញាន, ២ រឿងសាមកុក, ៣- រឿងទាវឯក, ៤- បកិណ្ណកកជាគោរត៧ប្រការ, ៥ -រឿងមហាសុបស្សីតាបស, ៦-រឿងឥណារ, ៧-រឿងគុនឈីន, រឿងសុមុខជេដ្ឋ ។

តទៅនេះ យើងសូមដកស្រង់សេចក្ដីមួយពីក្នុងរឿងទាវឯករបស់លោក ដែលលោកបានសរសេរឡើងចូលរង្វាន់លេខ ១ ក្នុងការប្រឡងប្រដែងអក្សរសាស្ត្រ គ.ស.១៩៤៤ ដែលលោករៀបជាកំណាព្យពាក្យ ៨ ជូនរណ្ដំដូចតទៅ ៖

... លោកនេនទុំពុំធ្លេសទេសនិបចស្នួត
គរហូតផុតរឿងអ្នកផងឮ
ចេញឥស់ចែបលែបខាយ សាយទទ្ទី
នោះក៏គិតគមផ្សំផ្សេហារ ៗ
ស្រីប្រុសខ្លះក្រាស់កាមជាមប្រឡាក់

គិតតែស្ទឹត្រដាក់ដល់វល់ចិត្ត
នឹកឃើញរឿងក្នុងខ្លួនមានសង្សារ
ពីកាលណានឹកសប្រោសទំនៃ ៗ
ខ្លះក៏ប្រោសតាំងរស់ខ្លះប្រោសស្លាប់
លុះមកស្លាប់សព្វសត្វកើតវៀរ
នឹកដល់ដើមកំសត់មិត្តមាសមៃ
ផ្តែតហឫទ័យនំយានឹងស្រក់ទឹកនេត្រ ។
ខ្លះគាល័យគាឡោះស្រែណោះផ្សេង
ដោយសំឡេងអន្ទងរងសម្តេច
ដូចជាដើរក្នុងព្រៃឆ្ងាយទូរេក
ពេលស្ទូរើយេតសាយណ្ហាទន់ក្រជាក់ ៗ
ខ្លះពោះម៉ាយស្តាយមិត្តគិតខ្លោចនាង
ឯមេម៉ាយស្តាយកងរូបខ្លោចអ្នក
តាអះណោចខ្លោចយាយកយតាយភ្ញាក់
យាយញ័រញាក់នឹកខ្លោចផល់ខ្លោចតា ៗ

សំនួនវោហាររបស់លោកកវីនេះ ដែលយើងស្រង់ម
ខាងលើនេះ ដំណាលកាលអ្នកស្រុកទាំងប្រុសស្រីអង្គុយស្ដា
នេនទុំស្មូតកណ្ឌមទ្រី ត្រង់ដែលនាងមទ្រីលាព្រះវេស្សន្ត
ទៅក្នុងព្រៃ ហើយព្រាហ្មណ៍ជូជកមកសុំយកបុត្រទាំងគូ
កយបណ្ដើរតាមផ្លូវ ។ នេនទុំប្រសប់នេបខ្លួនសំឡេង
តាមការសោកសង្រេងរបស់កុមារទាំងពីរ នាំឱ្យអ្នកស្ដាប់
ទ្រាំមិនបាន ក៏នឹកគិតលន្លង់ចិត្តតែរៀងខ្លួន ។ លោក
កេយសំដីលាយដោយការកំប្លែងផង ។

## លោក បាន - តេង

លោក បាន - តេង កើតនៅសង្កាត់លេខ ៤ ក្រុងភ្នំពេ
មាតាឈ្មោះ ត្រយង់, បិតាឈ្មោះ បាន ជាមន្ត្រីនៅក្នុងព្រះបរ
កផាំង ។ លោកកើតពីឆ្នាំ ១៨៨២ ។ កាលពីកុមា
មាតា - បិតាបានយកទៅឱ្យរៀនសាលាកផារ លុះអា
បាន ១៤ ឆ្នាំ ក៏បានចូលផ្នួសជាសាមណេរក្នុងសំណាក់សម្ដេ

ះមង្គល អៀម វត្តបទុមវតី បានមួយវស្សាក៏សឹកមកវិញ ។
លោកបានរៀនរបៀបតែងកាព្យខ្មែរ ពីលោកព្រះគ្រូវិយរក្ខិត
ិត វត្តសុត្តន្តមានបុណ្យ (ទក្តន៍) ហើយលោកបានបន្ថែម
ជានេះក្នុងសំណាក់លោកឧកញ៉ាសុត្តន្តប្រីជា - ឥន្ទ ទៀត ។
ហេតុនេះហើយបានជាលោក បាន · តែង ចេះយ៉ាងស្ទាត់ពី
បៀបតែងកាព្យ ។ ក្រោយពីនោះ លោកបានចូលធ្វើការ
ៅក្នុងព្រះបរមរាជវាំង បន្ទាប់មកទៀតធ្វើជាលេខាធិការនៅ
ឃ្លាំងប្រាក់ ។ លុះដល់ គ.ស. ១៩២១ រាជការបាន
ាត់លោកឲ្យទៅធ្វើជាគ្រូបង្រៀននៅកោះកុងអស់រយៈ ៥ ឆ្នាំ
ហើយលោកបានត្រឡប់មកបង្រៀន នៅសាលាវត្ត ស្វាយ
ពែ ក្រុងភ្នំពេញវិញ ។ លុះក្រោយមក លោកបានចូល
កធ្វើការនៅក្នុងក្រសួងសិក្សាធិការ ក្នុងក្រុមតែងសៀវភៅ
ប់សិក្សា ។ ហេតុនេះឯង ទើបយើងឃើញស្នាដៃលោក
ច្រើននៅក្នុងមេសូត្រ និងមេរៀនផ្សេងៗ ដែលសុទ្ធតែធ្វើ
ពាក្យកាព្យយ៉ាងងាយស្ដាប់ ។ លោកបានទទួលអនិច្ច-

កម្ម ពី គ.ស.១៩៥០ ប៉ុន្តែក្នុងពេលដែលរៀបចំដល់ចុ
បំផុតហើយរបស់លោកនេះ, លោកប្ញាន-គេង នៅធ្វើកប្បុ
រួមក្នុងគណៈកម្មការ តែងសៀវភៅមូលវិជ្ជាសំរាប់ថ្នាក់មធ្យម
ដ្ឋានបានពីក្បាលទៀត ។ គ្រាន់នេះបង្ហាញឲ្យឃើញថាលោ
ប្ញាន-គេង ជាអ្នកយកចិត្តទុកដាក់ណាស់ចំពោះអក្សរសាស្រ្ត
យើង, ទោះបីជាចាស់ណាស់ទៅហើយ ក៏លោកនៅតែប្រឹ
បំរើអក្សរសាស្រ្តរហូតដល់ទីអវសាន ។

ក្រោយដែលលោកអនិច្ចកម្មទៅ គេរកឃើញស្នាដៃ
លោកដែលបោះពុម្ពហើយខ្លះ មិនទាន់បោះខ្លះ មានជាប្រ
ដូចរាប់ខាងក្រោមនេះ ៖

១– សប្បុរសធម៌, ២– ទេពនារី, ៣– លោ
ធម្មចរិយា, ៤– រឿងធនុន្ត, ៥– រឿងខាងហ្វានជា
៦– រឿងទិព្វសញ្ញា (មិនមែនទិព្វសញ្ញាដែលបោះពុម្ពទេ)

ខាងក្រោមនេះ យើងដកស្រង់ស្នាដៃលោកមកធ្វើជាស
ភាពដូចតទៅ ៖

....មនុស្សយើងនេះឧត្តមយ៉ាងកំណើត
មិនមែនកើតមកភ្លាមក៏ខូចជា
លុះច្របល់ចូលជាមជាតពាលា
ខូចខឹងជាគោនស្អិតចិត្តអស់ស្អាត ។
ប្រគះបាចផ្លាំនមានទក្ខឹអក
ហោតកោកូនសត្វសេកជាអាទិ
កាលញាស់ឡើងដំបូងគ្មានខ្វះខាត
ចិត្តក៏ស្អាតបរិសុទ្ធឥតហោះហៅ ។
លុះខ្យល់បក់ឆក់បាត់សាត់ចាកទី
ក៏ព្រាត់ពីសំបុកបែកគ្នាទៅ
សេកមួយនោះជ្រុះធ្លាក់លើលំនៅ
ព្រះតាបសរើសទៅថែរក្សា ។
សេកមួយទៀតកាត់ផាត់សាត់ទៅដល់
ទីបណ្តូលសំណាក់ពួកចោរ
ចោរក៏រើសយកទៅជាយមេត្ត

ថ្មមកក្សេត្រសកល្អថៃតាំងទុក ។
សេកដែលនៅសំណាក់ព្រះតាបស
ចិត្តសប្បុរសរកផលខ្វល់ចង់សុខ
សាងសទ្ធាសុចរិតបិទផ្លូវទុក្ខ
ត្រោះតាំងមុខតាមមគ្គលោកអ្នកប្រាជ្ញ ។
សេកដែលនោះនៅទីនោះចិត្តអាក្រក់
រៀនតែចក់ទឹងល្អបឫស្សាកាប
ចេះឲ្យខ្លួនឲ្យជួបចោរកំណាច
ក្លាសតខ្លាបសតតិតជិតតែក្បែរ
ចូរមើលចុះតែសត្វជាតិតិរច្ឆាន
បើគប់ពាលមិនខានខ្លួនវិនស្ស័យ ។
បើគប់ប្រាជ្ញ ។ ប្រៀនព្រះធម៌ថ្លៃ
អញ្ចាស្រីយ៉ៅប្រែតាមស្នាមនោះហោង ។

កំណាព្យខាងលើនេះ លោកបាន-តែងលើកបង្ហា
យើងពីការគប់មិត្ត តើអាចឲ្យផលយើងយ៉ាងណា ៗ ល

បើកយករឿងក្នុងសេកចាំងពីមកធ្វើជាគ្រឿងបញ្ជាក់ ឲ្យ
បងឆាយយល់ផង ។

## អ្នកស្រី សិទ្ធ

នៅចុងសម័យនោះ យើងបានជួបប្រទះអ្នកនិពន្ធស្ត្រីមួយ
ដែលចុកគេត្រូវស្នាដៃចំណានណាស់ដែរ គឺអ្នកស្រី-សិទ្ធ ។
កស្រីសិទ្ធ យើងអាចទទួលស្គាល់ថាមានតែស្ត្រីនេះមួយទេ
លបានបញ្ចេញនូវស្នាដៃខាងអក្សរសាស្ត្រជាដំបូងគេបំផុត
ងចំណោមស្ត្រីខ្មែរនៅសតវត្សយើងនេះ ។ អ្នកស្រីបាន
ះស្ទាត់ខាងភាសាសៀមនិងភាសាខ្មែរ ហើយបានចេះរបៀប
តែងកាព្យខ្មែរ យ៉ាងម៉ត់ចត់ត្រឹមត្រូវណាស់ដែរ ។ ចំណែក
ៀបពាក្យកាយធម្មតាវិញ យើងឃើញថាអ្នកស្រីក៏មានថ្វីដៃ
ណានដែរ ។ ហេតុនេះហើយ ទើបគេឃើញស្នាដៃ
របស់អ្នកស្រីមានជាពាក្យកាព្យខ្លះ ជាពាក្យកាយខ្លះ ដែល
យើងកប់រៀបឈ្មោះខាងក្រោមនេះគឺ ៖ ១– រឿងពិម្ពាពិលាប,
– រឿងគូលាងមិត្តមិនច្រុស្តមិត្ត, ៣– រឿងចិត្តសក្សា ។

យើងសូមបង្ហាញដល់លោកអ្នក នូវស្នាដៃរបស់អ្នក

ដែលយើងដកស្រង់កំណាព្យមួយវគ្គ ពីក្នុងរឿងពិម្ពាពិលាប

"... ថ្វីបើមានខឹងប្រឹងស្រែកជេរ
មិនទេមិនទើងខឹងសោះឡើយ
ប្ដីមានត្រូវសរស្លាប់ទៅហើយ
មានអើយគឺកម្មនាំសរទៅ ។
ចិត្តបងគ្មានបំណងនឹងប្រមាថ
តែប្រញាប់ផ្ទាតខ្ទាតទៅត្រូវ
បងបាញ់សត្វសោះចុះឥឡូវ
ស្រីពៅនៅថ្វីព្រៃព្រឹក្សា ។
យំសោករកប្ដីក្ស័យរស់
គំរាមខឹងបានប្រាណស្នេហា
នេះទៅជាទោសខ្លួនអសារ
សោកាធ្វើអ្វី ៗ តាមបង ។

បងនេះជាស្តេចសោយកជេជ្ឍ
នាមព្រះព្រហ្មទត្តសោយកជ្យផង
មានទាំងក្រុងសាវត្ថីតកខ្ទង
ជាច្បងលើសលប់កតមនុស្ស ។
ពុំទាន់មានគូមកយូរឆ្នាំ
ជាកម្មនាំបងឲ្យយាត្រា
កម្មបងបិងបាញ់សត្វសកុណា
កម្មស្វាមីប្អូនប្រជួនគ្រោះ ។
កាំសរប្រហារដើរក្បៀ
កម្មបងអាល័យស្រីសមយស
កម្មប្អូនឲ្យក្តៅសៅហ្មងមោះ
កម្មប្តីអស់សៅហើយមាសថ្លៃ ។

សេចក្តីដកស្រង់ខាងលើ អ្នកស្រីសិទ្ធ និទានគាល សត្វកិន្នរី-ឈ្មោល បណ្តើរគ្នាកណ្តាលព្រៃ, ព្រះបាទព្រហ្មទត្តបានលបបាញ់កិន្នរ ហើយចូលទៅប្រលោមលួង

លោមនាងកិន្នរីដោយពាក្យផ្អែមល្ហែម ដើម្បីឲ្យនាងចំណង់ចិ
ស្នេហា ហើយឲ្យនាងលះចិត្តស្រឡះពីខ្មោចស្វាមី ដែល
ប្រជួនគ្រោះត្រូវសរស្លាប់ទៅហើយ ។



នៅកាលខាងចុងនៃសម័យនេះ យើងឃើញការចំរើ
លូតលាស់មួយយ៉ាង គួរឲ្យសរសើណាស់ដែរ គឺការបង្កើ
ឲ្យមានពុម្ពអក្សរខ្មែរ សម្រាប់បោះពុម្ពផ្សាយសៀវភៅឲ្យបា
ច្រើនក្បាល ។ វចនានុក្រមយើងក៏កើតឡើងក្នុងគ្រានោ
ដែរ ។ ដែលយើងអាចរាប់បានថាជាការលូតលាស់គោល
ជាគម្ពីរច្បាប់ទម្លាប់មួយខាងអក្សរសាស្ត្រ និង ភាសាជា
យើង ។ សៀវភៅជាច្រើនក៏បានបោះពុម្ពចេញផ្សាយបន្ត
គ្នា ប៉ុន្តែជំនាន់នោះ យើងឃើញច្រើនតែជាសៀវភៅធ
អាថ៌ និងច្បាប់បុរាណខ្លះៗ ប៉ុណ្ណោះ ឯរឿងប្រលោមលោ
និងសៀវភៅនិយាយពីការស្រាវជ្រាវ មិនសូវឃើញមា
បោះពុម្ពផ្សាយទេ ។ ឯសៀវភៅដែលចេញផ្សាយតាំ

នោះសោត សុទ្ធតែត្រូវសុំអនុញ្ញាតពីរាជការអាណាព្យាបាលថែមទៀតផង ។ ហេតុនេះហើយ ទើបសៀវភៅណាដែលជាគ្រឿងនាំឲ្យដាស់តឿនចិត្តគ្នាយើង មិនអាចនឹងចេញផ្សាយបានតាមចិត្តឡើយ ។

បើយើងធ្វើការសង្កេតចំពោះប្រលោមលោកខ្មែរសម័យនោះវិញ យើងនឹងឃើញថា៖ ប្រលោមលោកខ្លះៗ នោះមានរបៀបសរសេរប្លែកពីសម័យមុនៗ សន្ធឹកណាស់ គឺគេសរសេរជាពាក្យរាយកប់ៗ ដូចជាពាក្យដែលអ្នកស្រុកធ្លាប់និយាយគ្នារាល់ថ្ងៃ នាំឲ្យអ្នកអានងាយយល់ងាយគិតជាជាងស្នាដៃពីមុនមក ។ មួយទៀត ក្នុងរឿងទាំងនោះ ក៏ឈប់មានប្រើមន្តអាគមដូចជាគ្រាមុនៗ ទៀតហើយ , អ្នកនិពន្ធសុទ្ធតែត្រិះរិះ រចនាស្នាដៃខ្លួន ឲ្យស្របទៅតាមការចំរើនលូតលាស់នៃសាកលលោកសម័យថ្មី ។ ហេតុដែលនាំឲ្យកើតដុះដាលរឿងប្រលោមលោកទំនើបជាបន្តៗ ក្នុងគ្រានោះ ព្រោះរាជការបានបង្កើតជាការប្រឡងប្រជែងខាងអក្សរ-

សាស្ត្រជាញឹកញាប់ព្រមទាំងឲ្យរង្វាន់យ៉ាងតាមគួរ ដល់ម្ចាស់
ស្នាដៃណាដែលជាប់លេខផង ៗ ហើយស្នាដៃដែលល្អ
ទោះជាប់លេខក្តី មិនជាប់ក្តី ឲ្យតែគណៈកម្មការមានសេច
សរសើរ, ត្រូវគេយកទៅចុះផ្សាយនៅក្នុងសារពត៌មានកម្ពុជ
ដែលជាទិនានុប្បវត្តិ មួយចេញផ្សាយជាយូរអង្វែងណាស់មក
ហើយ ។ ដូច្នេះឯងទើបបណ្តាជនទូទៅទាំងគ្នាគ្រប់ជញ្ជ
នូវរសជាតិអក្សរសាស្ត្រទាំងនោះ បានងាយស្រួលជាជាងលើក
មុន ៗ ព្រោះមានប្រាកដជាអក្សរពុម្ពយ៉ាងស្អាត ។ មាន
រឿងមួយចំនួនទៀត ត្រូវបានចេញផ្សាយតាមរយៈការផ្សាយ
របស់ក្រុមពុទ្ធសាសនបណ្ឌិត្យ គឺជួនកាលគេបោះដោយឡែក
ក់មួយសៀវភៅ និងខ្លះទៀតផ្សាយក្នុងទស្សនាវដ្តីកម្ពុជសុរិយា
ដែលជាទស្សនាវដ្តីមួយមានអាយុជាង ៣០ ឆ្នាំមកហើយ ។
ទស្សនាវដ្តីនេះ ជាអង្គការយ៉ាងចំណានជួយស្ទួយទ្រនូវពុទ្ធ-
សាសនានិងអក្សរសាស្ត្រខ្មែរ ឲ្យកាន់តែមានរស្មីប្រាលរន្ទាល
ទៅគ្រប់ទិសទីក្នុងព្រះរាជាណាចក្រ ។ យើងសូមទៀត

ឱកាសជាពិសេស សរសើរដល់សទ្ធាចិត្ត អស់លោកដែល
ប្រឹងប្រែងផ្ដួចផ្ដើមឲ្យកើតជាទស្សនាវដ្ដីនេះឡើង ។ ប្រសើរ
សំខាន់មួយផ្នែកទៀត គឺអស់លោកអ្នកនិពន្ធដែលប្រឹងប្រែង
សរសេរជារឿងក៏ដោយ ស្រាវជ្រាវកាព្យធម៌ខ្មែរបុរាណមកផ្សាយ
ទុកជាគោលចារឹកក្នុងទីនោះ សំរាប់ឲ្យកូនខ្មែរ ស្នេហាវប្បធម៌
ជាតិ ការគេឃើញជាងក្ដីដំណែលជូនការបស់ខ្លួនយ៉ាងជាក់
ច្បាស់ ។ ទោះជាមានអាយុ ៣០ ឆ្នាំមកហើយក្ដី ទស្សនាវដ្ដី
នេះ ឥតប្រាសចាកពីគោលដើមដែលធ្លាប់មានមកនោះឡើយ
គឺនៅតែមានអត្ថបទជាខ្លឹមសារល្អរហូតសព្វថ្ងៃនេះ ។ ដូច្នេះ
ទស្សនាវដ្ដីកម្ពុជសុរិយា គួរពោលថា ជាឯកសារ មួយយ៉ាងពិ-
សេសសម្រាប់អ្នកត្រូវការរៀនសូត្រ ឬស្រាវជ្រាវពីកាព្យធម៌
ខ្មែរ ជាពិសេសខាងផ្លូវវប្បធម៌ ។

ក្រៅពីការផ្សាយតាមរយៈកជការ ឬ តាមវិធីជាផ្លូវការ
ដូចមានរៀបរាប់ខាងលើនេះ យើងបានប្រទះឃើញមានអ្នក
និពន្ធលាក់មុខជាច្រើនទៀត ដែលបានរៀបរៀងជាកំណាព្យ

ទ្វីៗ សំកប់ជាស់តឿនគ្គីគ្នាខាងផ្លូវចិត្ត ឲ្យបេះឹកឃើញផល់បញ្ហាជាតិដែលស្ថិតនៅក្នុងអាណាព្យាបាលរបស់បរទេស ៗ ខ្លះទៀតនិយាយពីអនុស្សាវរីយ៍ក្នុងគ្រាដែលកើតវិប្បរិតដោយសារជនបរទេសចូលមកត្រួតត្រាក្នុងប្រទេសយើង ៗ ដោយមានយោបល់ផ្ទុយពីគជការគណាព្យាបាល ដូចនេះហើយ, ទើបអ្នកនិពន្ធទាំងនោះ មិនហ៊ានបញ្ចេញឈ្មោះឲ្យគេស្គាល់ឡើយ មានត្រឹមតែបទនមស្សការនិងកាលបរិច្ឆេទដែលរៀបរៀងប៉ុណ្ណោះ ៗ ដើម្បីជាសក្ខីភាពចំពោះសទ្ធាធចិត្តខ្មែរខាងផ្នែកអក្សរសាស្ត្រក្នុងពេលនោះ យើងសូមស្រង់សេចក្តីបន្តិចពីក្នុងកំណាព្យទាំងនោះមកបញ្ជាក់ដូចតទៅ ៖

"....ខ្ញុំនឹងចាត់ចែងតែងសេចក្តី
ពិភពផែនដីកម្ពុជា
ប្រែប្រួលផ្លូវក្នុងសាសនា
អស្ចារ្យកោលាហ៍កើតវិការ ៗ
សព្វថ្ងៃមេទ័ពតេជាធំ

គេមករៀបចំកន្ទង់នគរ
មានប៉ុស្តិ៍គ្រប់ខេត្តគេត្រួតឈរ
គេរៀបនគរបំរុងចាំ ។
កម្រៅក្រៅគេមានឫទ្ធិក្លា
ត្រួតត្រាកងការចិត្តមួនមាំ
លើកថ្នល់ខ្ទាត់ខ្វែងវែងវង់ជុំ
បុណ្យគេជាធំកន្ទុំរដ្ឋ ។
តាំងមន្ទីរស្ដាពេញនគរ
សព្វថ្ងៃខ្លាចគេដូចជាខ្លា
តែគេបង់ឲ្យទៅត្រង់ណា
មុខជាលោយត្រង់នោះឯង ។
ហៃអ្នកតាំងឡាយចូលអ្នកគិត
ស្មារតីគិតមិតក្រែងរង្វេង
កុំធ្វើផ្ដេសផ្ដាសតាំងតាស់ក្មេង
ប្រឹងប្រែងតំមិតគិតកល់គ្នា ។

កំណាព្យនេះយើងស្រង់ចេញពីសាស្ត្រាស្លឹករឹតមួយមានចំណងជើងថា «ល្បើកកម្ពុជា» ។ នៅក្នុងសាស្ត្រានេះអ្នកនិពន្ធបានលាតត្រដាងហេតុការណ៍ផ្សេង ៗ ដែលកើតមានក្នុងគ្រានោះ ព្រមទាំងពោលនូវពាក្យដាស់តឿនដល់ជនរួមជាតិគ្រប់គ្នា ឲ្យខំថែរក្សាចិត្តគំនិតស្រឡាញ់ជាតិនិងថែរក្សានូវប្រពៃណីជាគ្រឿងដំណែលរបស់ជាតិពីបូរមបូរាណ ។ តែអ្នកនិពន្ធនេះពុំបញ្ចេញឈ្មោះឲ្យយើងស្គាល់ទេ ប្រហែលលោកខ្លាចមានឧបសគ្គអ្វីមកដល់រូបលោកទេដឹង ។ ទោះបីជាលាក់លៀមយ៉ាងណាក៏ដោយ សាស្ត្រានេះបានត្រូវបណ្ដាជននិយមណាស់ដែរ គេចម្លងចែកគ្នាមើលនៅតាមវត្តអារាមជាច្រើន សព្វថ្ងៃនេះមានគង់នូវច្បាប់ដើមយ៉ាងល្អស្អាតផ្ទុកនៅក្នុងបណ្ណាល័យពុទ្ធសាសនបណ្ឌិត្យ ។

ក្រៅពីសាស្ត្រា ដែលដូចបានរៀបរាប់មកខាងលើនេះ យើងបានប្រទះឃើញនូវកំណាព្យដាស់តឿនជាតិឲ្យខំប្រព្រឹត្តខ្លួនក្នុងគន្លងសីលធម៌ថែមទៀត ។ ជាពិសេសបំផុតគឺស្នាដៃរបស់

ក្នុកព្រះភិរម្យភាសា - អ៊ូ ឬ ក្រមង៉ុយ ដែលជាកវីសាមញ្ញមួយ នគំនិតថ្លៃងាយគួរយើងលើកយកមកធ្វើការសិក្សាបាន ។

## ព្រះភិរម្យភាសាអ៊ូ ឬ ក្រមង៉ុយ

មុននឹងពិនិត្យស្នាដៃសំខាន់ ៗ យើងសូមណែនាំអស់ លោកអ្នកជ្រាបបន្តិចពីជីវប្រវត្តិរបស់លោក ។ លោកតាង៉ុយ នចលំនៅ នៅឃុំកំបូល ( ខេត្តកណ្តាល ) លោកជាកវី សាមញ្ញមួយរូបក្នុងសម័យអាណាព្យាបាល ។ កំណាព្យ ព្យ ឃ្លោង ដែលលោកបានរៀនសូត្រហ្វឹកហាត់នេះហើយ នធ្វើឲ្យលោកទៅជាអ្នកចម្រៀងមួយយ៉ាងឯក ដែលជួន ទៅក្នុងព្រះរាជាណាចក្រនិយមគោរពរាប់អានគ្រប់ ៗ គ្នា ។ ពន្ធរបស់លោក បង្ហាញថាជាអ្នកមានសុខភាពបរិបូណ៌ ាយលោកមានមាឌមាំដុះពោះល្មម ទឹកសំឡេងឮក្រអៅ លោកមានដំណើរទៅណាមកណា លោកតែងស្លៀកសំពត់ ក្បិន ពាក់អាវចិន និងស្ពាយបង្វិចតូចមួយ ដៃកាន់ដំបង ឈើច្រត់រលោងស្រិល ៗ ពេលណាលោកត្រូវការច្រៀង ,

លោកទាញបង្វិលមក ស្រាយយកសបកឃ្លោកជាតួសាដៀ
មកដាំឡើងផ្គុំជាមួយឈើប្រគាត់ធ្វើជាផង រួចដាក់ខ្សែ
ឲ្យតឹងល្មម ទើបដាក់ផ្ទប់នឹងក្បាលពោះ គាត់ដេញរន្ទ័នប
បង្កើតជាសូរយ៉ាងពិរោះ ផ្សំជាមួយសត្វពេហារដែលលោ
ស្រែកច្រៀងឡើង ៗ បម្រៀងទាំងនោះសោត មិនមែ
និយាយតែពីរឿងកំម្សត់ណ្តកអណ្តានទេ គឺលោកគរើយើ
បានបញ្ចូលខ្លឹមពាក្យដាស់តឿន ក្រើនរំលឹក ដល់ជនរួមជាតិឲ្យ
ខំរកស៊ីធ្វើការកុំខ្ជិលដេកចាំសំណាង, ខំរៀនសូត្រខាងប
ពាណិជ្ជកម្មកុំឲ្យជនបរទេសលោភបាន, ខំរៀនសូត្រក្បួ
សាស្ត្រ ទឹង លេខនព្វន្ត កុំឲ្យពិបាកដើរពឹងគេឯងឲ្យធ្វើជ
ខ្លួន ៗ ជាពិសេស គឺនេះ ចូលចិត្តដាស់តឿនពួ
កសិករឲ្យខំនាំគ្នាបង្កើនផល ហើយនឹងរក្សាសេចក្ដីសុ
រៀបរយកុំឲ្យមានរឿងទាស់ទែងនឹងគ្នាផង ៗ គោលបំណ
របស់លោកដូចមានរាប់រៀបមកខាងលើនេះ បង្ហាញឲ្យឃើញ
ថា ឧត្តមគតិរបស់លោកក្នុងគ្រានោះ ដាក់ជាអ្នកជួយណែ

បន្ទានចិត្តជនរួមជាតិ ឲ្យចេះភ្ញាក់រលឹកដល់ការនាំប្រយោជន៍ខ្លួនឡើង ៗ ព្រោះលោកឃើញថា ៖ ភាសារបស់ជាតិយើងក្នុងពេលនោះមានស្ថានភាពដុនដាប ជាងយើងបច្ចុប្បន្ននេះច្រើនណាស់ ៗ មិនតែប៉ុណ្ណោះច្បាប់ខ្នាតរបស់លោកបានជួយបំប៉ន វាងវៃផ្នែកអក្សរសាស្ត្រយើង យ៉ាងសំខាន់ណាស់ព្រោះបានជាគ្រឿងកុះមើលការចំរើនរុងរឿង របស់អក្សរ-សាស្ត្រ និង ជីវភាពជនសាមញ្ញក្នុងសម័យនោះ យ៉ាងជាក់ប្រាកដ ៗ

បន្តទៅនេះ យើងស្រង់យកកំណាព្យក្នុងស្នាដៃលោកកលាតគ្រជាងដូចតទៅ ៖

«... សំអាតផ្ចិតផ្ចង់ លើកក៏ឲ្យត្រង់ កុំលើកឲ្យគោង
អ្នកកុំប្រហែស ក្រែងមានប្រហោង លើកមើលទំនង
ទំនាបទឹកហូរ ៗ ចំនួនទឹកស្ទឹង ទឹកព្រែកទឹកបឹង ទឹក
កលទឹកអូរ អ្នកលើលិចស្រូវ ត្រូវបើកបង្ហូរ អ្នកក្រោម
កុំថយ បង្ហូរសទៅ ៗ កំរើងថ្ងៃយប់ ឆាប់លើកឆាប់

« ទប់ កុំឲ្យធ្លាក់ជ្រៅ កក្តិកចេញខ្យល់ ដកល់ទឹកមេ
« បើចង់បានស្រូវ ស្រែចន្ទូវត្រឹមថៃ ៗ កុំយកគ្រាប់គ្នា
« ទៅដាំទៅដោត ពីលើភ្លឺស្រែ បិត្តគិតប្រមាណ ចង់បាន
« ផ្កាផ្លែ ដាំដុះបន្លែ បន្ទិនខ្លួនឯង ៗ ដល់គ្នាគេឡើតក
« ឡើងកើតនាំខ្វល់ ឆាងលូកឡើងវែង ក្ដូរកស់ជាប់ទឹ
« គ្រប់ជាប់ស្លែង ទទើសទទែង ក្ដូរឆ្ងន់មិនត្រូវ
« ដល់គ្នាគរពឹ ពមានស៊ីកទុំ ធ្លាក់ជ្រុះក្នុងស្រូវ ស្រែឆ្ងាយ
« ពីផ្ទះ ឃ្លាតណាស់ពីផ្លូវ ទុំពំតែទៅ រលួយស្រូវអស់
« កូនស៊ើយកុំភោត បើចង់បានគ្នា ដាំដោយកៀនក
« ដីទួលចំការ ឯណាចន្ទោះ ដាំដារបោះ ជាយផ្លូវបង ៗ...

កំណាព្យខាងលើនេះ លោកតា នុ៊យ បានប្រដៅកូ
ទៅនៅស្រុកស្រែឲ្យចេះរៀបចំភ្លឺស្រែរបស់ខ្លួន ទីងចេះយល
អធ្យាស្រ័យគ្នាក្នុងការធ្វើស្រែផង ៗ ជាពិសេសលោកតា
ថាកុំឲ្យដាំគ្នាតនៅតាមពលស្រែ ព្រោះនាំឲ្យធ្លាក់ស្ងួកជា
ទៅបំផ្លាញដល់ស្រូវដែលដុះក្នុងស្រែ ៗ ដំបូន្មានរបស់លោ

ំរៃងធ្លាយនោះ យើងសង្កេតទៅពុំឃើញមានប្រវត្តិផ្សេង
ើរឿងរបររកស៊ីរបស់អ្នកស្រុកសាមញ្ញឡើយ គឺលោកដោះ
ស្រាយរឿងកយរង ដែលជនអ្នកស្រែអ្នកចំការធ្លាប់ជួបប្រទះ
រឿងកល់ថ្ងៃ ៗ ត្រង់នេះហើយដែលយើងសន្មតថាលោក
រី ន៉ុយ ជាកវីសាមញ្ញមួយរូបរបស់ខ្មែរ យើងឃើញលោកប្រកប
ាជីវកម្មជាអ្នកស្រែចំការធម្មតា ៗ





## ជំពូកទីដប់

# អក្សរសាស្ត្រសម័យបច្ចុប្បន្ន

ដែលហៅថាសម័យបច្ចុប្បន្ននេះ គឺកប់តាំងពី គ.ស ១៩៤៩ (១) ដែលប្រទេសយើងបាន [illegible] ពីអាណាព្យ បាលរបស់ប្រទេសខាងផ្នែកវប្បធម៌ ។ ប៉ុន្តែពេលដើមដំបូ នៃសម័យនេះ អក្សរសាស្ត្រខ្មែរ នៅមិនទាន់លេចត្រដែតសុ សាយនៅឡើយទេ ដ្បិតគ្រានោះពិភពលោកទើបតែបានផុ ពីសង្គ្រាមថ្មី ។ ដូច្នេះប្រទេសយើង នៅខ្វះសម្ភារៈ ដែលជ មធ្យោបាយខាងការផ្សាយអក្សរសាស្ត្រយើង ដូចជាខ្ ក្រដាសបោះពុម្ព, ខ្វះគ្រឿងបោះពុម្ព និងអក្សរពុម្ពជាដើម

---

១– ឆ្នាំនេះ មិនទាន់បានឯករាជ្យសម្បូណ៌នៅឡើយទេ រហូតមកពី ថ្ងៃទី ៩ វិច្ឆិកា ១៩៥៣ ទើបបានឯករាជ្យបរិបូណ៌ ។ តែពេលនោះបាក់ បានផ្នែកវិទ្យាល័យ-អនុវិទ្យាល័យ និងសាលាបាលីមករាជការខ្មែរ ។

ញ៉ឹងទៀតមកពីពេលនោះ ស្មារតីយើងចាប់តែងើបរួចពីការគ្រប
ណ្ដប់នៃវប្បធម៌គេថ្មី ៗ ។ តែពពួកអ្នកដែលធ្លាប់ចិញ្ចឹមចិត្ត
សាធអក្សរសាស្ត្រវិញមិនព្រមចុះញ៉មឧបសគ្គទាំងនេះឡើយ
គនាំគ្នាប្រឹងប្រែងចងក្រង ឬរៀបរៀងជាសៀវភៅរឿងរ៉ាវ
មីលក់សាន្ត ឬកំព្យខ្នាតអ្វីផ្សេងៗតាមតែសន្ដានចិត្ត ឬស្មារតី
កដែលផាក់និជាប់មកយូរហើយ ។ សិទ្ធិខាងការផ្សាយក៏បើក
ទានយ៉ាងបរិបូណ៌ ជាពិសេសគឺសិទ្ធិយ៉ាងទូលាយក្នុងរដ្ឋ-
ធម្មនុញ្ញនៃព្រះរាជាណាចក្រ ដែលព្រះករុណាជាម្ចាស់ជីវិត
លើត្បូងព្រះបាទសម្ដេចព្រះ នរោត្តម-សីហនុ បានទ្រង់
ប្រោសព្រះរាជទាន ដល់ពលរដ្ឋជាទីសព្វព្រះរាជហឫទ័យ
បស់ព្រះអង្គកាលពីឆ្នាំ ១៩៤៧ ។ សិទ្ធិទាំងនេះបានជួយបណ្ដុះ
ណ្ដាលផ្លូវចិត្តឲ្យអ្នកស្នេហាអក្សរសាស្ត្រទាំងប៉ុន្មាន នាំគ្នា
ានសង្ឃឹមកាន់តែខ្លាំងឡើងក៏ខំខ្នះខ្នែងលើសពីពេលមុន ។
ទៅ ជួនជាពេលបន្ទាប់នោះ ប្រទេសយើងក៏បានកើតគ្រប់
វាឡើងផង គឺសម្ភារៈដែលយើងខ្វះខាតកាលពីមុននោះ

កំមានគ្រប់គ្រាន់ឡើង ៗ អក្សរសាស្ត្រខ្មែរខាងផ្នែករឿក
ក៏ល្អលាស់គ្រចះគ្រចង់យ៉ាងស្រោងស្រាងឡើង ប្រៀបបីដូ
រុក្ខជាតិដែលលាស់ស្លឹកខ្ចីល្អក់ ក្នុងគ្រាដែលមានព្រះពិរុណ
បង្អុរស្រស់ស្រប់មកលើជាដំបូង ៗ តែអនិច្ចា ! កម្ពុជាស្
ពន្លកខ្ចីតែងពុំទាន់មានសភាពរឹងមាំមួននៅឡើយទេ, ស្លឹកនេ
ទន់ហើយពុំមានសណ្ឋានពេញលក្ខណៈ ជាស្លឹកពិតប្រាក
នៅឡើយ ៗ ផ្លែកលោនៅស្លាក់ស្ល៉ពុំទាន់ពេញជ្រុងជ្រោយ
ផ្លូនកាលអាចនឹងមានអន្តរាយដោយសារសត្វល្អិតបើកាលណ
ហើយអ្នកថែរក្សានោះមិនថែឲ្យជិតដល់មែនទែន ៗ

សេចក្ដីប្រៀបធៀបនេះយ៉ាងណា ក៏សមាអក្សរសាស្
យើងសម័យនេះក៏យ៉ាងនោះដែរ ៗ ពិតមែនហើយ ដែលយើ
ឃើញរូបរាងសៀវភៅខ្មែរ ទោះពុម្ពផ្សាយជាប្រែនក្រែល
ក៏ពិតតែប្រៀបផ្ទឹមបាននឹងបរទេស ដែលចំរើនខាងផ្នែកន
ជាប្រុមករហើយដែរ ៗ ប៉ុន្តែយើងដឹងជាក់ដូច។ពាហណ៍ខា
លើថា ៖ ស្នាដៃទាំងនេះមិនសូវតែល្អគ្រាប់ប្រុសមច្បេ

ទោះតាំងអស់ទេ, មានខ្លះទៅគឺល្មមកប់យកជាការបាន តែង មានខ្លះទៀតដែលពុំគាប់លើកយកជាគោលបានឡើយ ។ ត្រង់នេះ ដោយសារតែយោលទៅតាមទឹកដៃរបស់អ្នកនិពន្ធ, មនោគតិរបស់អ្នកនិពន្ធ ឬ សតិសម្បជញ្ញៈរបស់អ្នកនិពន្ធ រឿងខ្លួននោះឯង ។ បានន័យថា៖ ប្រសិនជាអ្នកនិពន្ធនោះមាន សតិសម្បជញ្ញៈទូលាយ មានគំនិតល្អតលាស់ច្រើន ស្នាដៃគឺ បានល្អប្រសើរទៅ ; ផ្ទុយទៅវិញ បើអ្នកនិពន្ធរឿងនោះ ជា អ្នកខ្វះការពិចារណាឲ្យដិតដល់ ស្នាដៃនោះក៏អន់ខ្សោយទៅ តាមនោះដែរ ។

បញ្ហាដ៏ធ្ងន់ធ្ងរ មកខាងលើនេះ ជាបញ្ហាមួយធំណាស់ដែរ គួរតែអ្នកនិពន្ធគ្រប់រូប លើកយកមកពិភាក្សាក្នុងស្មារតីរបស់ ខ្លួនឲ្យល្អិតល្អន់ណាស់មុននឹងសរសេររឿងនិមួយ ៗ ។ ព្រោះ រឿងជាស្នាដៃរបស់យើងនោះ វានៅគង់វង្សជាយូរអង្វែង ណាស់ ហើយការទ្រព្យរបស់ជាតិពិតៗផង បើយើង តសាងបានល្អ ទ្រព្យនេះក៏បាននៅល្អរហូតអនាគតជាយូរដែរ

តែបើប្រហែលប្រហាក់វិញ រូបកនិទេព្យមតិកនេះពុំបានល្អ គត់មត់ទុកឲ្យអនុជនជាន់ក្រោយ ៗ ទៀតទេ ។

ប្រសិនជាយើងធ្វើការសង្កេតតាមពេលតាមវេលាវិញ, យើងគាបវែកញែកសម័យបច្ចុប្បន្ននេះ ជាបីពេលបណ្តោះអាសន្នសិន ដើម្បីងាយធ្វើការសិក្សាសង្កេតតាមជាន់អក្សរសាស្ត្រយើង គឺ ៖

គ្រាទីមួយ.- ចាប់តាំងពី គ.ស.១៩៤៩ រហូតមកដល់ ១៩៥១ ៖ កាលនោះ ការបោះពុម្ពផ្សាយនៅមានដំណើរយឺតណាស់ ៗ មានតែសារពត៌មានប៉ុណ្ណោះទេដែលចេញបានច្រើន និងសៀវភៅធម៌គាថាក៏បានចំរើនបន្តិច មកដែរ ឯរឿងប្រលោមលោកដែលមានលក្ខណៈអក្សរសាស្ត្រច្រើនជាងផ្នែកឯទៀតនោះ ពុំសូវមានចេញញឹកញាប់ទេ ។ តែបើចេញបានម្តងៗវិញ យើងឃើញមានខ្លឹមសារគ្រាន់បើ ទាំងគោលគំនិត តំណងចំណង់សេចក្តីល្អឲ្យមានសង្ឃឹមថា នៅក្រោយទៀតមុខជាមានល្អណាស់យ៉ាងសំខាន់ពិតប្រាកដ ។

ស្នាដៃដ៏ខាន់នោះ  អ្នកនិពន្ធតែងប្រើពេលវេលា យ៉ាងច្រើន ដើម្បីកសាងស្នាដៃខ្លួន  ឲ្យបានជាទីកប់គាន់របស់ជនទូទៅ ហើយអ្នកនិពន្ធដ៏ខាន់នោះ  សុទ្ធតែជាអ្នកចិញ្ចឹមចិត្តខាង អក្សរសាស្ត្រយូរឆ្នាំមកហើយ  ទើបចាំតែពេលវេលាល្អទើង ចេញផ្សាយស្នាដៃរបស់ខ្លួនបង្ហាញចំពោះសាធារណជន ។

មានរឿងខ្លះទៀតដែលបានសរសេរពីគ្រាមុនមកស្រាប់ក៏ មិនមានបញ្ចេញប្រកាសបង្ហាញដល់សាធារណជនឃើញដែរដូចជា៖

- រឿង «កុងឈឺន» របស់ លោក នូ-កន,
- — «វណ្ណៈ» — លោក ឡៃ-ដុម,
- — «គូសាងមិត្តមិនទ្រុស្តមិត្ត» របស់អ្នកស្រី សិទ្ធ,
- — «ផ្កាស្រពោន» របស់ លោក នូ-ហាច,
- — «ចិត្តឪពុក» របស់ លោក ហែល-សុំផា,
- — «ស្រីក្រោ» របស់ លោក មៃ-គិន,

- រឿង «កេសនាខៃនាងណាគ្រី» របស់អ្នកស្រី ស៊ុយ-ហៀង
- «ផ្ការីកផ្ការោយ» របស់លោក គៀង-សាយ

។ល។ . . .

ក្រៅពីនេះ យើងឃើញមានកំណាព្យចងក្រងតាមបែប ទំនើបថ្មីៗទៀត ដូចជា ៖

- «ប្រជុំរឿងល្បើក» របស់ លោក ហេង-យ៉ាន់,
  «រឿងល្បើក» លោក នុច-ស៊ុខុម,
- «បិត្តក្រមុំ» — លោក កេង-វ៉ាន់សាក់,
- «ព្រះបាទជ័យវរ្ម័នទី៧» របស់លោក មៀ-ឆន,
- «សកុន្តលា» (រឿងប្រែ) របស់លោក ពិយ-ប៊ុក,
- «មេម៉ាយម៉ាមួន» របស់លោក ថាច-ឈួន

។ល។ . . .



ផ្នែកទីពីរ.– ចាប់តាំងពី គ.ស.១៩៤២ ដល់មក ១៩៤៦, ជាសម័យមួយដែលអក្សរសាស្ត្រយើងផុះឡើង តាមផាកប្រលោមលោក, ទស្សនាវដ្ដី, រឿងល្ខោន ឬ សៀវភៅនិយាយពីទ្រឹស្ដីផ្សេង ៗ អ្នកនិពន្ធជាច្រើនឈ្មោះ បានទំព្រឡែងប្រជែងស្នាដៃគ្នា បោះពុម្ពផ្សាយពាសពេញ តាមស្រុកកូម៉ាជិតឆ្ងាយ ហើយស្នាដៃតាំងនោះ ក៏ឃើញថា មានសារៈគួរឲ្យចាប់ចិត្តណាស់ដែរ តាំងខាងផ្នែកសីលធម៌, តាំងផ្នែកអក្សរសាស្ត្រ ។ មធ្យោបាយបោះពុម្ពផ្សាយ ក៏បានស្រួលលើសពេលមុន ៗ ច្រើនណាស់ ព្រោះពិភពលោកបានជួបនឹងសេចក្ដីសុខបរិបូណ៌ ។ ទំនិញសព្វសារពើ បានហូរចូលមកកាន់ស្រុកយើងបានស្រួល លើសពេលមុន ៗ ។ អ្នកនិពន្ធជាច្រើនរូបស្ទើរតែកប់ឈ្មោះមិនអស់ បានទំព្រឡែកប្រជែងគ្នា ចេញផ្សាយនូវស្នាដៃរបស់ខ្លួន បង្ហាញដល់សាធារណជន ។ ឯស្នាដៃតាំងនោះសោតយើង ឃើញមានការចេញាសមធ្យគ្រាន់បើដែរ តាំងទំនងដែនរឿង,

ទាំងពាក្យពេចន៍ឆ្លើយឆ្លងជាដើម ។ អ្នកអានគ្រប់គ្នាបានយកចិត្តទុកដាក់ ពិនិត្យសង្កេតខ្លូវកម្រងរបស់អ្នកនិពន្ធជាតិខ្លួន យ៉ាងយកចិត្តទុកដាក់បំផុត ហាក់ដូចជាចង់ធ្វើការវិនិច្ឆ័យលើស្នាដៃទាំងនោះ ។ ហេតុនេះឯង ទើបអ្នកនិពន្ធប្រឹងដុះខាត់សិល្បៈរបស់ខ្លួន ឲ្យកាន់តែមានទឹកដមសម្រាប់ឲ្យអ្នកអានបានទទួលរសជាតិឆ្ងាញ់ពិសាតទៅទៀត ។ ប៉ុន្តែសម័យនេះ បណ្ណាគារ ដែលជាផ្សារសម្រាប់លក់ផ្សាយសៀវភៅមិនទាន់មានច្រើនគ្រប់គ្រាន់នៅឡើយទេ ព្រោះគេទុករបរនេះថាជាពុំទាន់មាំទាំនៅឡើយ ។ រោងពុម្ពដែលជាឫសគល់នៃការផ្សាយនេះ ក៏ពុំទាន់សម្បូណ៌ហូរហៀរនៅឡើយដែរ ។ ដូច្នេះឯងហើយ ទើបសៀវភៅយើងដែលចេញផ្សាយបានមួយ ១ កន្លងគ្រានោះមាន កម្រងថ្ងៃរទាំងផ្នែកសីលធម៌ និងទាំងផ្នែកសម្ភារៈ ។ គ្រានេះមានទស្សនាវដ្ដីខ្លះចេញផ្សាយដូចយ៉ាងទស្សនាវដ្ដីនារី, ទស្សនាវដ្ដីសុបិននិមិត្ត, ទស្សនាវដ្ដីកត្រីថ្ងៃសៅរ៍, ទស្សនាវដ្ដីមិត្តសាលាបាលី ។ល។ ដែលយើង

អាចសំគាល់បានថា ទស្សនាវដ្ដីទាំងនេះមានប្រយោជន៍ផ្សាយ ការចេះដឹងរបស់សាធារណជនផង និងជាទីប្រជុំហាត់ហ្វឹកហ្វឺន អ្នកនិពន្ធថ្មីៗ ទៀតផង ។ ដូចយើងពោលហើយខាងលើ សម័យនេះមានប្រលោមលោកចេញផ្សាយច្រើនណាស់ដែរ តែយើងសូមចង្អុលឈ្មោះខ្លះ ៗ គ្រាន់ជាសក្ខីភាព គឺ៖

រឿង «ចោរបិទមុខ» របស់លោក ហ៊ីល - ស៊ុំជា,

- «ព្រញមាស» - ទ - ឌូ,

- «មើលព្រះចន្ទ្រា» - រីម - គន,

- «ស្មើចិត្ត, សេរីស្វតន្ត្រ, រំដួលក្លូលែន»

របស់ លី - ធាមតេង,

- «ខេមរកុលបុត្រ, ទុយ៉ិសសន្សិក» របស់ ម៉ា-ឡាយខេម,

- «ព្រះទ័នកវ្យ, វិរបុរស, ព្រះចន្ទកជា, ...»

របស់ ប៉ិ - ផៃណាន,

- «ទៅនិសាទទុគ៌ត» របស់ អ្នកនិពន្ធ ស្រី - ម្យុច,

- «បណ្ដាយលន្លែក» - - រ. គោវិច ។ល។

មានការព្រឹត្តន៍មួយទៀត ដែលគួរគត់សំគាល់ក្នុងប្រវត្តិអក្សរសាស្ត្រយើងជាងគេនៅ គ.ស.១៩៥៦ នេះហើយដែលអ្នកនិពន្ធនិងកវីដែលមានឧត្តមគតិប្រពៃ បានរួបរួមគ្នាបង្កើតជា សមាគមអ្នកនិពន្ធខ្មែរ សំរាប់ជួយឧបត្ថម្ភដល់ការផ្សាយអក្សរសាស្ត្រទាំងក្នុងប្រទេស, ទាំងក្រៅប្រទេស ដើម្បីឲ្យបានសមនឹងឋានៈប្រទេសឯករាជ្យសម្បូណ៌ ។ ព្រះរាជក្រមលេខ ៦១ ន.ស. ចុះថ្ងៃមករា គ.ស.១៩៥៦ ក៏បានបើកសិទ្ធិដល់អ្នកនិពន្ធយ៉ាងបរិបូណ៌ឡើងថែមទៀតនៅគ្រានោះដែរ ។



ផ្នែកទី៣ . ចាប់តាំងពីគ.ស.១៩៥៧ មកដល់សព្វថ្ងៃនេះរបៀបសរសេរមានការប្ដូរផ្លាស់សឹងតែតាមជានពុំទាន់ អ្នកនិពន្ធពីមុនៗ បាត់រូបលែងឃើញមានសរសេរឲ្យញឹកញាប់ទៀតហើយ ។ អ្នកនិពន្ធថ្មីៗ បានលេចផុសឡើងដូចផ្សិតនៅរដូវភ្លៀងធ្លាក់ដំបូង គេទំប្រណាំងប្រជែងស្នាដៃគ្នាដែលមានចេញផ្សាយជាញឹកញាប់ក្រៃលែង ហើយស្នាដៃទាំងនោះច្រើនតែថ្មីៗ ពុំសូវមាននិក្ខេបបទ (thèse)

អ្វីត្រឹមត្រូវទេ ។ ចំពោះរបៀបរៀបចំសាច់រឿងវិញ គេក៏មិនសូវប្រើគម្រៀនដូចគ្រាមុនៗដែរ ព្រោះខាងអត្ថរសក្តី, ខាងចំណង់សេចក្តីក្តី ។ មូលហេតុទាំងនេះឯង បាននាំសមាអក្សរ-សាស្ត្រយើងឲ្យជួបប្រទះនឹងការគាក់រអួលមួយគ្រាដែរ ដ្បិតជួនកាលទៀត ស្នាដៃទាំងនេះ មានពោរពេញទៅដោយរឿងក៏ដែលពិបាកនឹងអានថែមទៀតផង ចំពោះចរិយា ឬ ប្រពៃណីរបស់ខ្មែរយើង ។ សម័យនេះ បង្កើតជាបញ្ហាយ៉ាងច្រើនលើពាក្យអក្សរសាស្ត្រខ្មែរ ព្រោះជនអ្នកស្នេហាអក្សរសាស្ត្រម្នាក់ៗសុទ្ធតែមានការត្រិះរិះ នឹង ការយល់ឃើញប្លែក ៗ ពីគ្នាហើយ ស្នាដៃទាំងនេះ ស្ទើរជាស្នាដៃបច្ចេកទេស ឬ ស្នាដៃធម្ម-ត. មិនអាចវែកញែកបាន ព្រោះអ្នកនិពន្ធបានកាឡៃបញ្ចូលបែបទាំងពីរធ្វើជារឿងមួយ ។ ម្ល៉ោះហើយ រឿងក៏ទាំងនោះពុំបានជាក់លាក់សំរាប់អ្នកអានទេ បានសេចក្តីថាគ្មានតែទាស់គំនិតអារម្មណ៍អ្នកអានឲ្យអណ្តែតអណ្តូង ទៅតាមចំណង់តណ្ហា ឬ មនោសញ្ចេតនារវើរវាយប៉ុណ្ណោះ ។

តែទោះបីយ៉ាងហ្នឹងក៏ដោយ យើងនូវយល់ថា ឧម្ភាកា
កសាងជាដំបូង ទោះការកសាងអ្វីក៏ដោយ រមែងតែងជួបប្រទះ
នឹងការខ្វះខាតជាមិនខាន ។ ដូចនេះ យើងគិតយ៉ាងណា
ទៀតបានបំពេនសិនចុះ ចាំផលវៃថ្ងៃក្រោយទៅសឹមយើងនាំ
គ្នាសំរិតសំរាំងទៅទៀត ។ ដោយឃើញថាអក្សរសាស្ត្រ
យើងត្រូវលាយច្របល់ដោយគោលគំនិត ពីបរទេសដូចនេះ
ហើយ អ្នកនិពន្ធដែលមានទុក្ខមកក្តីសុទ្ធសាធក្នុងការកសាង
កសាងអក្សរសាស្ត្រជាតិខ្មែរ នាំគ្នាក្រោកឈររួមកំឡាំងជា
មួយអង្គការអប់រំផ្សេងៗទៀត ប្រឆាំងនឹងឥទ្ធិពលនាអក្សរសាស្ត្រ
តែងបង្ខំ នាំឲ្យខូចដល់ខ្សែជាតិនេះ, ទាល់តែបានជោគជ័យ ។
តែពួករៀនអាសគ្រាម នឹងរូបតាក្រោកកាយ ក៏បានបាត់ស្រ-
គោលគំនិតលើទឹកខ្មែរតាំងលក់នានាអស់គ្មានសល់ ។

ព្រឹត្តិការណ៍ចំខ្សែកមួយទៀតនៅក្នុង គ.ស. ១៩៨
នោះ រាជរដ្ឋាភិបាលបានកែប្រែកម្មវិធីសិក្សានៅមធ្យម
បញ្ចូលឲ្យមានការសិក្សាអក្សរសាស្ត្រជាតិ យ៉ាងច្រើនពេ

ក្នុងវិស័យសិក្សាគ្រប់ជាន់ថ្នាក់ ដើម្បីឲ្យកុលបុត្រ-កុលធីតាយើងបានក្រេបជញ្ជក់ឲ្យអស់លក់ខ្លឹមសារជាតិវប្បធម៌ជាតិខ្លួន ៗ ដូចនេះសៀវភៅទាំងឡាយដែលណែនាំខាងការសិក្សា, ជាជំនួយស្មារតីក្នុងកិច្ចសិក្សា ក៏បានចេញផ្សាយជាច្រើនឈ្មោះបណ្ណនូវគំនិតស្រាវជ្រាវរកតម្លៃវប្បធម៌ជាតិកាន់តែខ្លាំងឡើង ៗ ។

នៅឆ្នាំ ១៩៥៨ នេះ អក្សរសាស្ត្រយើងបានលេចមុខលេចធ្លោយ៉ាងត្រចះត្រចង់នៅលើឆាកអន្តរជាតិ ដោយកាលនោះរដ្ឋាភិបាលយើងបានបញ្ជូនអ្នកនិពន្ធខ្មែរ (១) ឲ្យទៅរួមសន្និសីទខាងអក្សរសាស្ត្ររបស់អ្នកនិពន្ធជនជាតិអាស៊ី និង អាហ្វ្រិកនៅក្រុងតាស្កង់ (សហភាពសូវៀត) ។

អក្សរសាស្ត្រយើងបានចំរើនក្នុងស្រុកទៀត ដោយមានការផ្សាយតាមវិទ្យុ និងការធ្វើបាឋកថាតាមទីជនបទ ឬ ទីប្រជុំនៃការអប់រំផ្សេង ៗ ។ ក្រៅពីនេះ នៅមានការផ្សាយមួយទៀតយ៉ាងសំខាន់គឺនៅក្នុងទំព័រសារពត៌មានអ្នកជាតិនិយម ។

---

១– ប្រតិភូដែលកាត់ឡើងទៅកាលគ្រានោះគឺ អ្នកនិពន្ធ ម៉ា-ឡាយខេម និង លី-ធាមតេង ដែលអ្នកនិពន្ធក្នុងសមាគមបានបោះឆ្នោតជ្រើសរើស ។

ការសិក្សាពីអក្សរសាស្ត្ររបស់យើង សុំឈប់ត្រឹមនេះ ហើយយើងសង្ឃឹមថា នៅពេលក្រោយដែលយើងធ្វើការស្រាវជ្រាវ និង សិក្សាបានវែងឆ្ងាយទៅទៀត យើងនឹងបន្ថែមឲ្យកាន់តែបានពិស្តារឡើងជាលំដាប់ ៗ តែមុននឹងបញ្ចប់យើងត្រូវចងចាំថា មូលហេតុដែលនាំឲ្យចំរើនបានហូរហែមកក្នុ សម័យបច្ចុប្បន្ននេះ អាស្រ័យដោយមានសេចក្តីឧបត្ថម្ភយ៉ាង ហ្មឹងហ្មាត់របស់ព្រះអគ្គមគ្គុទេសក៍ និង ជាព្រះបិតាឯករាជ្យជាតិ គឺសម្តេចព្រះ នរោត្តម-សីហនុ ដែលព្រះអង្គទ្រង់ពុំដែល ភ្លេចម្តងណាទេ ចំពោះការស្ថាបនាវប្បធម៌ជាតិ ឲ្យរីកតែ វិសេសវិសាលឡើងសមនឹងឋានៈប្រទេស ដែលទ្រង់បាន ដឹកនាំឲ្យចំរើនគ្មានឈប់ឈរ ។ ជាកតញ្ញុតាគឺព្រះអង្គសព្ ព្រះទ័យទ្រង់ទូលព្រះឋានៈជា ប្រធានកិត្តិយសនៃសមាគមអ្ន និពន្ធខ្មែរដែលជានិមិត្តរូបនៃអក្សរសាស្ត្រនិងវប្បធម៌ជាតិ ។

